សារព័ត៌មាន ខ្មែរផុស ស.រ.អា
# KhmerPost USA
E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 1 (267) 253-3947

Free

Issue 155 June 07th-21th, 2014

មាតិការឿង



New Office: Tel: (978) 677-7163 Fax: (978) 677-7092
45 Merrimack St. Suite 218A Lowell, MA 01852

## សម្ភាសន៍ជាមួយព្រឹទ្ធសមាជិកខ្មែរ លោក សេង ម៉ារឌី

**ដោយ : ខ្មែរផុសស.រ.អា. បច្ចុប្បន្នភាពនយោបាយកម្ពុជា**

Intreveiw with Seng Maradi



លោក សេង ម៉ារឌី

លោក សេង ម៉ារឌី បច្ចុប្បន្ន ជាសមាជិកព្រឹទ្ធសភាគណបក្ស សមរង្ស៊ី បានអញ្ជើញមកធ្វើទស្សនកិច្ចនៅស.រ.អា. នាខែមិថុនានេះ ។ ខ្មែរផុសបានជួបធ្វើការសម្ភាសន៍ជាមួយលោក កាលពីថ្ងៃទី៤មិថុនា២០១៤ នៅទីក្រុងឡូវែលរដ្ឋម៉ាសាឈូសែត នៅទីស្នាក់ការខ្មែរផុសស្តីអំពីការវិវត្តន៍នយោបាយដែលកំពុងជាប់គាំងនៅកម្ពុជាដែលមានអត្ថន័យដូចតទៅ:

**ខ្មែរផុស** តើកិច្ចចរចាគ្នារវាងគណបក្សប្រជាជននឹងគណបក្សសង្គ្រោះជាតិដល់ដំណាក់ការណ៍ណាហើយ ?

**សេង ម៉ារឌី** បាទ! ក្នុងកិច្ចចរចារជាមួយគណបក្សប្រជាជន គណបក្សសង្គ្រោះជាតិបានដាក់សំណើរ១៤ចំណុច មានការទទួលយក១៣ចំណុចហើយ នៅសល់១ចំណុចទៀត ដែលគណបក្សប្រជាជនមិនទាន់យល់ព្រម ។ នៅក្នុង១៣ចំណុចដំបូង គឺជាចំណុចទាក់ទងទៅនឹងច្បាប់នឹងគណកម្មការបោះឆ្នោត រីឯចំណុចទី១៤ គឺទាក់ទងទៅនឹង **តទៅទំព័រទី ២៤**

# កម្មករប្ដេជ្ញាចិត្តតវ៉ាកាន់តែខ្លាំងឡើងបន្ទាប់ពីចេញពីពន្ធនាគារ



លោក វ៉ន ពៅ និងអតីតអ្នកជាប់ឃុំដទៃទៀតក្នុងពិធីសូត្រមន្ត និងបរិភោគអាហារពេលល្ងាចនៅផ្ទះរបស់លោក កឹម សុខា កាលពីម្សិលមិញ ។ Alex Consiglio/ The Cambodia Daily

***ដោយ ម៉ិច ដារ៉ា and អេឡិក ឧនស៊ីកលីអូ*** | *June 2, 2014*

ប៉ាង វណ្ណី និយាយថា នៅមុនឆ្នាំនេះ គាត់មិនដែលគិតអំពីការចូលរួមការតវ៉ា ឬការតស៊ូដើម្បីសិទ្ធិកម្មករឡើយ ប៉ុន្តែការជាប់ពន្ធនាគារប្រាំខែបានផ្លាស់ប្ដូរការគិតបែបនេះ ។ លោក វណ្ណី ត្រូវបានចាប់ខ្លួន កាលពីថ្ងៃទី៣ ខែមករា នៅពេលដែលកងរាជអាវុធហត្ថបង្ក្រាបទៅលើបាតុកម្មហិង្សានៅតាមផ្លូវវេងស្រេងដែលជាប់ពាក់ព័ន្ធនឹងការតវ៉ារបស់កម្មកររោងចក្រកាត់ដេរទូទាំងប្រទេស ដើម្បីទាមទារប្រាក់ខែគោលចំនួន១៦០ដុល្លារ ។ **តទៅទំព័រទី ១៣**

## វិទ្យាល័យឡូវែលចែកសញ្ញាប័ត្រដល់សិស្សានុសិស្សបញ្ចប់ការសិក្សាឆ្នាំ២០១៤

**ដោយ : សុខា**

**ក្រុងឡូវែល:** ការចែកសញ្ញាប័ត្របញ្ចប់ឧត្តមដល់សិស្សវិទ្យាល័យឡូវែលឆ្នាំ២០១៤ដែល **តទៅទំព័រទី ១៧**



# បទសម្ភាសន៍ជាមួយ រ៉ាឌី ម៉ម

**ដោយ : ខ្មែរផុស ស.រ.អា.**

*បេក្ខជនទីប្រឹក្សារដ្ឋអាមេរិកាំង State RepresentativeCandidate ដើមកំណើតខ្មែរម្នាក់*


លោក រ៉ាឌី ម៉ម

*ទៀត បានទទួលការចុះឈ្មោះស្របលក្ខណៈច្បាប់គ្រប់គ្រាន់មានឈ្មោះលើបញ្ជីបេក្ខជនទីប្រឹក្សារដ្ឋ គឺលោក រ៉ាឌី ម៉ម បានទទួលធ្វើបទសម្ភាសន៍នៅទីស្នាក់ការផ្ទះ ផែមហ្វត របស់លោកជាមួយកាសែតខ្មែរផុស កាលពីថ្ងៃអាទិត្យ ទី៨មិថុនា ២០១៤។ លោកបានបង្ហាញរូបថតគ្រួសារមានភរិយានឹងកូន៤នាក់នឹងចៅរបស់លោក ព្រមទាំងសម្ភារៈដែលលោកចូលចិត្តថែមទាំងមានជំនាញនឹងប្រើវា ដូចជាខ្លុយទ្រសោ សំលៀកបំពាក់ប្រដាល់ អាវុធក្បាច់គុណ រូបថតវាយកូនគោល... លោក រ៉ាឌី ម៉ម បានឆ្លើយនឹងសំនួរសម្រាប់ជាព័តិមានយ៉ាងនេះថា :*

**ខ្មែរផុស** តើលោកនឹងផ្តើមការឃោសនារបស់លោកនៅពេលណា?

**រ៉ាឌី ម៉ម** ពិធីជប់លៀងឃោសនារបស់ខ្ញុំនឹងផ្តើមនៅថ្ងៃទី២០ មិថុនា ២០១៤ វេលាម៉ោង៦ល្ងាចដល់១២យប់ នៅភោជនីយដ្ឋានហុងកុងដែលខ្មែរនៅឡូវែលនេះ ស្គាល់ច្បាស់ ។

**ខ្មែរផុស** តើលោកអាយុប៉ុន្មាន? សព្វថ្ងៃមានមុខរបរធ្វើអ្វី?

**រ៉ាឌី ម៉ម** ខ្ញុំមានអាយុ៤៥ឆ្នាំ ខ្ញុំជាអ្នកព្យាបាលផ្នែកសសៃរៀន៣៥ឆ្នាំហើយបានសញ្ញាប័ត្រចំនួន២ ថ្នាក់ខ្ពស់បំផុតជាគ្រូចាប់សរសៃ បន្ទាប់ពីរៀន២៥ឆ្នាំ រួចបានជោគជ័យមក ។ នៅឡូវែលនេះខ្ញុំជាសិស្សជាន់ខ្ពស់ជំនាន់ទី៣នៃសាលា វេងស្ទេង នឹង ហ្សាវលីង ។ លោកគ្រូធំខ្ញុំចុងក្រោយរហូតដល់សព្វថ្ងៃនេះ ឈ្មោះ អានលីង វ៉ង់ រស់នៅម៉ាសាឈូសែតជាអ្នកគ្រប់គ្រងសាលាស្រុកចិនដែរ ។

**ខ្មែរផុស** ងាកមករឿងបោះឆ្នោតវិញម្តង ហេតុអ្វីបានជាលោកមានបំណងឈរឈ្មោះជាបេក្ខជនទីប្រឹក្សារដ្ឋ ?

**រ៉ាឌី ម៉ម** តាមពិតទៅខ្ញុំបានធ្វើការជូនសង្គមជាង២០ឆ្នាំហើយ ដូចជានៅសាលាក្រុងជួយផ្តុងផ្តើមឱ្យ យូតិក ជួយដល់ស្ត្រីដែលខ្វះខាតសំលៀកបំពាក់ពេលចូលទៅធ្វើការខ្ញុំក៏ធ្លាប់ជាក្រុមប្រឹក្សារបស់សមាគមខ្មែររបស់សមាគមអង្គរធ្លាប់ជាប្រធានសមាគមពាណិជ្ជករ... ខ្ញុំមិនដែលគិតជាមុនថាខ្ញុំនឹងទៅជួយនរណាអ្វីទេ គឺទៅជួយដោយស្ម័យប្រវត្តតែម្តង ដូចជានៅបុណ្យអុំទូកជាដើម... ខ្ញុំមកដល់អាមេរិកឆ្នាំ១៩៨២មិនចេះភាសាគេមួយម៉ាត់ផង ខ្ញុំរៀនសាលាសាធារណៈបានរីកចំរើនតាមធម្មតា អ្វីដែលខ្ញុំចេះ គឺការភ្ជាប់ទំនាក់ទំនងល្អជាមួយមនុស្សគ្រប់គ្នាមិនថា តែខ្មែរប៉ុណ្ណោះទេ គឺពលរដ្ឋក្នុងសង្កាត់១៨ទាំងមូលដែលមានប្រមាណជាង៣៥ពាន់នាក់ថែមពីលើនេះ ទៅទៀតនោះ ខ្ញុំក៏អាចធ្វើការជាមួយអ្នក

**តទៅទំព័រទី ១១**

# បេក្ខនារីវៀតណាមកូនកាត់ខ្មែរ ប្រឡងបវរកញ្ញាឯកពិភពលោក

## Cambodian Vietnamese Miss World Contestant Truong Thi May









ដោយ ៖ សុខា

**ក្រុងមូស្គូប្រទេសរ៉ូស៊ីៈ** កាលពីឆ្នាំ២០១៣កូនខ្មែរកាត់វៀតណាម ទ្រុង ធី ម៉ាយ ឈ្មោះខ្មែរហៅថា រស្មី ត្រូវបានជ្រើសរើសឱ្យក្លាយជាស្ត្រីតំណាងប្រទេសវៀតណាម ដើម្បីទៅប្រកួតកញ្ញាឯកពិភពលោកនៅទីក្រុងមូស្គូប្រទេសរ៉ូស៊ី។ ផ្អែកតាមបទសម្ភាសន៍រវាងនាង ទ្រុង ធីម៉ាយ និងលោក រាសី នៃសារព័ត៌មានវី អូ អេ កន្លងទៅបានឱ្យដឹងថា នាង ទ្រុង ធីម៉ាយ គឺជាកូនខ្មែរកាត់វៀតណាមអាចនិយាយភាសាខ្មែរបានល្អទន្ទឹមនឹងភាសាវៀតណាម។

ម្តាយនាងជាខ្មែរ ហើយឪពុកជាវៀតណាម ។ ឪពុករបស់នាងបានទទួលមរណភាពតាំងតែពីនាងអាយុ៦ឆ្នាំមកម្ល៉េះ។ ដូច្នេះនាងធ្លាប់ឆ្លងកាត់ជីវិតលំបាកវេទនា ហើយគោលបំណងមួយក្នុងគោលបំណងសំខាន់ៗដែលនាងព្យាយាមតស៊ូឈានជើងឡើងដល់ការប្រកួតកញ្ញាឯកថ្នាក់ពិភពលោក ព្រោះនាងចង់ឱ្យឆាកអន្តរជាតិបានស្គាល់ស្វែងយល់ពីស្ត្រីខ្មែរ និងវៀតណាម និងយល់អំពីបញ្ហានានាដែលកើតឡើងជារឿយៗចំពោះពួកគេ ដើម្បីអ្នកទាំងនោះ អាចជួយអ្នកដែលគ្មានសំណាងទាំងនោះឱ្យមានជីវិតប្រសើរជាងមុន។

មានបីចំណុចដែលគួរឱ្យចាប់អារម្មណ៍អពីបេក្ខនារីស្រស់ស្អាតកូនកាត់រូបនេះ ទីមួយនាងជាពុទ្ធសាសនិក ហើយតែងតែងើបឡើងសូត្រប្រតិបត្តិធម៌តាំងពីម៉ោង៤ទៀបភ្លឺ។ ផ្ទះនាងនៅក្បែរវត្ត ហើយការរស់នៅប្រាស្រ័យទាក់ទងជាមួយអ្នកភូមិផង ទាំងសាសន៍ខ្មែរក្តី ឬវៀតណាមក្តី គឺប្រព្រឹត្តទៅល្អធម្មតា។ ទី២ នាងជាអ្នកញ៉ាំបួស។ ទី៣ គឺនាងតែងតែយកលុយដែលនាងសន្សំក្នុងកូនជ្រូកសិប្បនិម្មិតយកទៅទិញរបស់របរចែកចាយដល់អ្នកក្រីក្រ។

ទៅណាមកណាប្រសិនបើគេសួរនាងថា នាងមានកំណើតជាសាសន៍អ្វីនាងនឹងប្រាប់គេថា "ខ្ញុំកូនកាត់"មានន័យថា ខ្ញុំមានសញ្ជាតិខ្មែរកាត់វៀតណាម។











## Truong Thi May

**Hometown: Ho Chi Minh**

**Height: 5' 6"**

**Age: 25**

### រាចាររបស់ ទ្រឹង ធីម៉ាយ

*"Since my father died at a young age, my mom had to take care of all the children. She gave up so much for us and I want to be able to give back in any way I can."*

1. Truong Thi May is a dedicated Buddhist that wakes up everyday at 4a.m. to pray.
2. Truong Thi May saves money in her piggy bank from birthdays and holidays to donate to charities and help those less fortunate.
3. Truong Thi May is a vegetarian

Truong Thi May is a model and actress who was raised in An Giang, Vietnam. She is also a charity ambassador for a heart transplant charity that serves underprivileged children. Truong enjoys traveling, dancing and boxing. Truong Thi May dreams of one day becoming an international actress and opening her own store for vegetarians.

ប្រភពអត្ថបទពីគេហទំព័រកញ្ញាឯកពិភពលោក

# វិភាគនយោបាយខ្មែរ ជាប់គាំង ឬដើរទៅមុខ?

**ដោយៈ ពិន សំខុន**

ស្ថានភាពនយោបាយកំពុងតែតានតឹងនៅកម្ពុជាដោយគណបក្សមានអំណាចទាំងពីរមានកង្វល់ទាំងសងខាងដោយទឹកដូចៗគ្នាទៅដល់ថាអាត្មាអញអាចនឹងចាញ់គូរបដិបក្សទេដឹង? តែប្រជាពលរដ្ឋខ្មែរអ្នកម្ចាស់ឆ្នោតវិញ ក៏រឹតតែលែងយល់ដោយសារតែអ្នកមានការឱ្យយោបល់ខ្វែងគ្នាដ៏ច្រើន ចេះតែបែកមែកសាខាគ្មានទិសដៅបន់ណាច្បាស់លាស់នៅឡើយទេ ។

**គណបក្សមានអំណាចទាំងពីរៈ**

**ទី១**-គណបក្សប្រជាជនកម្ពុជាកាន់អំណាចរដ្ឋាភិបាលផង កាន់អំណាចសភាផង ធ្វើការដឹកនាំប្រទេសដោយមិនខ្វល់នឹងសុខទុក្ខរាស្ត្រមិនខ្វល់នឹងច្បាប់ដែលខ្លួនត្រូវគោរពកង្វល់ដ៏ធំរបស់គណបក្សនេះគឺ បើអញចាញ់គណបក្សសង្គ្រោះជាតិទៅនឹងក្លាយទៅជាអ្វី? ម្លោះហើយយកកម្លាំងកងទ័ពយកកម្លាំងព្រះមហាក្សត្រដែលខ្លួនប្រើបាននាពេលនេះ មកធ្វើជារនាំងខិតខំលាបពណ៌ជាអំណាចពិតធ្វើការបានដោយបន្លំភ្នែករាស្ត្រពីព្រោះតែអំណាចជាតិនេះជាឆ្នាំងបាយផ្ទាល់ខ្លួនរបស់ពួកនេះហ៊ានចំណាយការចែកអំណាចទៅឱ្យគណបក្សសង្គ្រោះជាតិតែត្រឹមឈ្មោះថា គណបក្សប្រឆាំងដ៏ខ្លាំងបំផុតតែប៉ុណ្ណោះ ។ ពួកនេះនៅតែចាត់ទុកថា ប្រទេសខ្មែរមិនមែនជាសម្បត្តិរបស់ប្រជាជាតិទេ តែជាជ័យភណ្ឌរបស់ពួកគេ ។

**ទី២**-គណបក្សសង្គ្រោះជាតិដែលទទួលបានដំណែងជាតំណាងរាស្ត្រជិត៥០ភាគរយ គឺមានអំណាចបញ្ហាការដឹកនាំប្រទេសស្របច្បាប់ជិត៥០ភាគរយដូចគ្នាតែក្រុមនេះបានមើលឃើញចលនានឹងរចនាសម្ព័ន្ធលួចសន្លឹកឆ្នោតរបស់គណបក្សប្រជាជនជាគន្លឹះដ៏សំខាន់បំផុតមួយដែលអាចធ្វើឱ្យអំណាចស្របច្បាប់របស់ខ្លួននោះកើនឡើងលើស៥០ភាគរយបានអាចនឹងទៅកាន់អំណាចរដ្ឋជំនួសគណបក្សប្រជាជនបានថែមទៀត។ គណបក្សសង្គ្រោះជាតិដើម្បីបើករបាំងឱ្យឃើញមុខពិតរបស់គណបក្សប្រជាជន ក៏ប្រមូលគាំងគររាស្ត្រមកធ្វើបាតុកម្មសំដែងមតិបង្ហាញកម្លាំងដែលរួមប្រជុំមនុស្សរាប់សែននាក់បានដែលជាចលនាមហាជនពុំដែលមានធំៗដូចនេះពីមុនមកទេ។ គណបក្សសង្គ្រោះជាតិនៅមានសមត្ថភាពមួយទៀត គឺថ្វីបើធ្វើពហិការមិនចូលរួមនៅសភាជាតិតែមានលទ្ធភាពនឹងរកធនធានបានរាប់លានដុល្លាពីសហគមន៍ខ្មែរនៅក្រៅប្រទេសដើម្បីទប់ទល់ចំណាយទ្រទ្រង់ចលនាដែលនឹងផ្លាស់ប្តូរប្រទេសរបស់ខ្លួន។

សំពាធលើគណបក្សប្រជាជនប្រឹងកាន់អំណាចដោយទស្សនៈប្រទេសខ្មែរជាជ័យភណ្ឌរបស់ខ្លួន គឺប្រឈមមុខនឹងចលនាប្រជាធិបតេយ្យដោយចំពោះជាហេតុធ្វើឱ្យបាត់ការគាំទ្រពីប្រទេសសេរីនឹងមហាអំណាចដែលរីកស្គុសស្គាយលើសកលលោកនឹងបាត់ការគាំទ្រពិប្រជាជាតិខ្លួនឯងដែលត្រូវគេបន្ថយសិទ្ធិជាពលរដ្ឋទៀតផង។






ករណីតែប៉ុណ្ណោះ ក៏អាចធ្វើឱ្យគណបក្សប្រជាជនមានកង្វល់មិនឈប់ឈរដែរ ពីព្រោះខ្លួនឯងជាអ្នកបង្កើតបញ្ហាធ្វើឱ្យប្រទេសគ្មានលំនឹងដោយមានផ្ទុះបាតុកម្មយ៉ាងងាយស្រួលប្រឆាំងនឹងរដ្ឋាភិបាលម្ចាស់នៃជ័យភណ្ឌពលរដ្ឋស្អប់រដ្ឋាភិបាលរបស់ខ្លួនប្រមូលផ្តុំគ្នាកាន់តែច្រើនឡើង ឥឡូវមានគណបក្សសង្គ្រោះជាតិដែលរាស្ត្រជឿថា នៅខាងគេជាពិសេសត្រូវទប់កុំឱ្យគណបក្សនេះមានការសើរើលទ្ធផលនៃការបោះឆ្នោតដែលអាចនឹងប្តូរអំណាចបានភ្លាម ។ គណបក្សប្រជាជនខិតខំទប់ទល់នឹងការប្តូរច្បាប់បោះឆ្នោតនឹងគណកម្មការរៀបចំការបោះឆ្នោតចាស់ចេញដែលមានទូរនាទីជាអ្នកធានាកែរលំអសម្ភស្សឱ្យគណបក្សប្រជាជន ថាជាអ្នកកាន់អំណាចដោយឈ្នះឆ្នោត ហើយនឹងទប់ទល់ចំពោះការបោះឆ្នោតមុនអាណត្តដែលរាស្ត្រលែងនៅក្នុងកណ្តាប់ដៃខ្លួនដូចមុនទៀតនោះផង។ នៅមានសម្ពាតធំច្រើនទៀតដែលគណបក្សប្រជាជនមិនមានលទ្ធភាពនឹងគ្រប់គ្រង គឺការមិនចុះសម្រុងផ្ទៃក្នុងនៅមានមហាអំណាចនយោបាយ គឺចៅហ្វាយយួននឹងចិនឈ្លោះគ្នាយ៉ាងជ្រាលជ្រៅមហាអំណាចសេដ្ឋកិច្ចក៏ទទួលសំពាតប្រឆាំងនឹងការសំរេចចិត្តរដ្ឋាភិបាលខ្មែរដែលផ្តន្ទាទោសកម្មករ រីឯយុវជនគណបក្សប្រជាជនក៏មិនទាន់ងើបមកជ្រោងមកជំនួសយុវចាស់ជំនាន់មុនបាននៅឡើយ។

**សំពាតលើគណបក្សសង្គ្រោះជាតិៈ**

មិនត្រឹមតែគណបក្សប្រជាជនដែលប្រឆាំងនឹងខ្លួនទេ គណបក្សរាជានិយមហ៊្វុនស៊ិនប៉ិច ឬគណបក្សទ្រង់រណប្ញទ្ធិ ក៏មិនអាចយកជាមិត្តបានសូម្បីតែព្រះមហាក្សត្រក៏នៅខាងគេទៅទៀតដែរ មិនតែប៉ុណ្ណោះ បើងាកទៅមើលស្ថាប័នជាតិវិញ ពុំមានស្ថាប័នណាមួយមានឯករាជ្យឬក៏យុត្តិធម៌ល្មមផ្ញើរសេចក្តីសង្ឃឹមតែបន្តិច ក៏មិនបានផង នៅក្នុងក្រុមប្រឹក្សាធម្មនុញ្ញមានស្តេចក្រុមឃុនជាសមាជិកធ្លាប់រាប់អាន សម រង្ស៊ី ជាមិត្តស្លាប់រស់ តែឥឡូវនៅសល់តែមិត្តរស់មិនស្លាប់ជាមួយទៀតទេ ដោយគ្មានបញ្ចេញប្រតិកម្មអ្វីបន្តិចសោះ... ទាំងអស់នេះ ធ្វើឱ្យមនុស្សជាច្រើនច្រឡំថា គណបក្សសង្គ្រោះជាតិគ្មានសម្ពន្ធមិត្រនបានយោបាយទន់ខ្សោយមិនអាចកាន់កាប់ប្រទេសបានទេ តែសំណាងល្អដែរដែលប្រជាពលរដ្ឋយ៉ាងច្រើននៅចងចាំពីវាសនាអាក្រក់របស់ខ្លួនជាមួយនឹងអ្នកនយោបាយខ្មែរទាំងនោះ មកគាំទ្រគណបក្សសង្គ្រោះជាតិ ធ្វើឱ្យមានលំនឹងមាំទាំឡើងវិញ ។

**ឥទៅទំព័រទី០៥**

## តមកពីទំព័រទី ០៤ វិភាគនយោបាយខ្មែរជាប់គាំង ឬទៅមុខ...

នៅលើវិស័យធនធានថវិការតាំងពីគណបក្សសង្គ្រោះជាតិមិនព្រមចូលសភាមកពុំមានធនធានទៀងទាត់ថ្មីជូនដល់មន្ត្រីខ្លួនទៀតទេ ដូច្នេះសង្ឃឹមលើវិភាគទានអំណោយពីប្រជាពលរដ្ឋទាំងមូលជាពិសេសវិភាគទានបានពីពលរដ្ឋខ្មែរនៅឯនាយសមុទ្រ ដើម្បីធ្វើការតស៊ូទម្លាក់គណបក្សប្រជាជនចេញពីអំណាចតែគណបក្សប្រជាជនប្រើវិធីអូសបន្លាយពេល ដើម្បីឱ្យសត្រូវខ្លួនក្ស័យទុនកណ្តាលផ្លូវ ឬក៏ធុញទ្រាន់នឹងការតស៊ូស្នេហាជាតិយូរអង្វែងពេក ក៏ទម្លាក់អាវុធឈប់ប្រយុទ្ធខ្លួនឯងហេតុដូច្នេះហើយបានជាគេឃើញមេចលនាសង្គ្រោះជាតិច្រើនចេញដំណើរទៅបរទេស ដើម្បីលើកទឹកចិត្តម្ចាស់ជំនួយខ្លួនឱ្យនៅតែបន្តតស៊ូជាមួយអ្នកក្នុងស្រុកតទៅទៀត ។ ភាពតស៊ូយូរអង្វែងនេះ បានបំពុលបរិយាកាសតស៊ូយ៉ាងច្រើនដោយមានអ្នកតស៊ូខ្លះបញ្ចេញមតិប្រឆាំងនឹងចលនាខ្លួនឯងគួរឱ្យជឿបានថា ជាវិធីប្រសើជាងមុនគួរតែគណកម្មការកណ្តាលកែប្រែដំណើរប្រយុទ្ធចាស់ចេញវិធីនេះខ្លះយល់ថា ជាអ្នកបំបែកគណបក្សសង្គ្រោះជាតិមិនអាចប្រយុទ្ធទៅឆ្ងាយបានឡើយ ។

**តស៊ូយូរអង្វែង នរណារឹងមាំជាង ?**

អ្នកកាន់អំណាចរដ្ឋសព្វថ្ងៃអាចនិយាយបានថា គឺឡើងកាន់អំណាចដោយប្រើវិញ្ញសន្លឹកឆ្នោត បើមិនមែនដូច្នោះទេ ត្រូវតែមានការឆែកឆេប្រកបដោយតម្លាភាពសម្រាប់គ្រប់គ្នាមិនមែនសម្រាប់តែគណបក្សប្រឆាំងទេ ករណីរបៀបនេះនឹងបង្កទំនាស់ទាមទារកយុត្តិធម៌មិនចេះចប់ទេ ហេតុនេះហើយបានជាគណបក្សសង្គ្រោះជាតិដែលយល់ថាខ្លួនគេជាអ្នករងគ្រោះ ដូច្នេះត្រូវតែតវ៉ាទោះជាយូរប៉ុណ្ណាក៏ដោយថែមទាំងទាមទារកែទម្រង់យន្តការណ៍បោះឆ្នោតតែម្តង បើទោះជាឈ្នះ ឬចាញ់ឱ្យគ្រប់ភាគីមានការអស់ចិត្តអាចទទួលយកលទ្ធផលនោះបានដោយមិនចាំបាច់ឡាំប៉ា ។

ការបានអំណាចហើយចាត់ទុកប្រទេសទាំងមូលជាជ័យភណ្ឌរបស់ខ្លួនក៏រឹតតែបង្កការរើបំរាស ដូចគ្នានឹងអនានិគមនិយមដែរ ពីព្រោះប្រទេសកម្ពុជាកើតមុនគ្រឹស្តសករាជ្យទៅទៀត មានដូនតាជាខ្មែរតាំងពីមុន ហ្វូជីមិញ កើតទៅទៀតផង ដូច្នេះមិនអាចនរណាម្នាក់ ឬ១ហ្វូងណាក៏មិនអាចជាម្ចាស់ដាច់ថ្លៃរបស់កម្ពុជាដែរ ។ ពិភពលោកបានក្លាយទៅជាពិភពប្រជាពលរដ្ឋទាំងមូលទៅហើយ ហើយនយោបាយទៀតសោត ក៏ក្លាយជាប្រជាធិបតេយ្យហើយដែរ ដូច្នេះរំដោះជាតិពីកណ្តាប់ដៃខ្មែរក្រហមប្រល័យពូជសាស្រ្តក៏ពុំមានផ្តល់សិទ្ធលើជីវិតនរណាម្នាក់ទៀតទេ ។

សម័យនេះគេចាយលុយច្រើនសម្រាប់រស់នៅតែទ្រឹស្តីគុណធម៌នៅតែលើកតំកើងភាពសុច្ចរិតយ៉ាងខ្ពង់ខ្ពស់ដដែលរដ្ឋធម្មនុញ្ញខ្មែរឱ្យសិទ្ធគណបក្សប្រជាជនស្មើគ្នានឹងគណបក្សសង្គ្រោះជាតិ។ គណបក្សប្រជាជនកាន់កាប់អំណាច៣០ឆ្នាំ ប្រមូលអំណាចស្រវ៉ាយកទ្រព្យគិតថា ឱ្យតែមានលុយ-មានអំណាច គឺមានអ្វីៗបានទាំងអស់ជាការមិនមែនពិតទេ ។ គណបក្សប្រជាជនមានប្រាក់នឹងសម្បត្តិតែឥឡូវសម្បត្តនេះទិញបាតុករមិនបានដូចមុនទៀតទេ។ គេសុខចិត្តយកលុយទោះតិចតួចនោះទៅផ្តល់ឱ្យគណបក្សសង្គ្រោះជាតិ ពីព្រោះតែជឿថា លុយរបស់គេអាចផ្តួលរំលំបញ្ចប់អំណាចជនផ្តេចការបាន។ រវាងទស្សនៈគុណធម៌ និងទ្រព្យសម្បត្តិ មនុស្សទូទៅជឿលើមនុស្សមានគុណធម៌ច្រើនជាងមនុស្សមានលុយ ។

ក្នុងការគាំទ្រគណបក្សនយោបាយរបបផ្តាច់ការតែងហាមឃាត់ការតវ៉ាការប្រឆាំងនឹងខ្លួន តែក្នុងរបបសេរីការតវ៉ា ឬការប្រឆាំងនេះជាមូលដ្ឋាននៃសេរីភាពជាគ្រឹះរបស់គណបក្សសង្គ្រោះជាតិដែលដឹណាងដោយ សម រង្ស៊ី នឹងកឹម សុខា ដែលមានប្រវត្តគួរឱ្យជឿបានថា នឹងឈរយ៉ាងមាំមួនលើជំហរនេះ។ រីឯស្នាដៃរបស់ហ៊ុន សែន ដឹណាងដ៏យូរអង្វែងនឹងតែមួយគត់របស់គណបក្សប្រជាជនបង្ហាញតែគំរូនៃរបបផ្តាច់ការនិយមមិនឈប់ឈរ។ ដូច្នេះការបញ្ចេញមតិខុសគ្នាឬក៏ផ្ទុយគ្នាដែលមានគេយកចិត្តទុកដាក់ស្តាប់បានពង្រឹងគណបក្សសង្គ្រោះជាតិឱ្យរឹតតែរឹងមាំនឹងគួរឱ្យចូលចិត្តទៅវិញ ចលនានៃមតិសេរីសម័យនេះ ចូលរួមដោយយុវជនសម័យទំនើប កំពុងហោះហើរដោយសេរី តាមរយៈហ្វេសបូក ឬ ទ្វីទ័រ... បានជាសម្បត្តិនឹង ក៏សាងជ័យជំនះរបស់អ្នកប្រើទៅអនាគតជាប្រាកដ។

ការតាំងដំណើរនៃកិច្ចចរចានយោបាយនៅកម្ពុជាជារលកក្នុងដ៏ស្ងប់មួយដែលពុំបានបញ្ឈប់ការវិវត្តសង្គមនៅឡើយទេ ពីព្រោះការចូលសភារបស់គណបក្សសង្គ្រោះជាតិជាដង្ហើមចេញចូលរបស់គណបក្សប្រជាជន ដូច្នេះភាពរឹងមាំរបស់គណបក្សសង្គ្រោះជាតិរង់ចាំបញ្ចប់កិច្ចចរចាឱ្យបានត្រឹមត្រូវនៅតែទទួលការគាំទ្រនឹងទ្រទ្រង់យ៉ាងរឹងប៉ឹងពីសំណាក់ប្រជាជាតិទាំងក្នុងនឹងក្រៅប្រទេសបានយូរអង្វែង៕

ទំព័រធ្វើដំណើរ



ថាន អេដែន និងសុបិន្ត ថតជាមួយ
អ្នកស្រី ឈុន ភិរុង ជាកសិករនៅផ្លរីដា





# ម៉ាយាមី នៃរដ្ឋ ផ្លរីដា ជាតំបន់កសិកម្មដែរ

តពីលេខមុន

**ដោយ : ពិន សំខុន**

**"ម៉ាយាមី" តំបន់កសិកម្ម**

"ម៉ាយាមី"មិនត្រឹមតែជាតំបន់ទេសចរណ៍តែប៉ុណ្ណោះទេ ថែមទាំងមានតំបន់ធ្វើកសិកម្មថែមទៀតផង។

យើងបានជួបស្ត្រីខ្មែរម្ចាស់ចំការមួយរូប ផ្ទះស្ថិតនៅតំបន់សមុទ្រហ្វតឡឺឌេលតែជាម្ចាស់ចំការតំបន់កសិកម្មផ្នែកខាងលិចលើដីម៉ាយាមីមានផ្ទៃក្រឡា២៥ហិចតា។ គាត់ឈ្មោះ អ្នកស្រី ឈុន ភីរង់ អតីតភរិយានាយទាហ៊ានជាន់ខ្ពស់ខ្មែរស្លាប់ដោយទារុណកម្មនៃរបបខ្មែរក្រហមក្រោយមកដល់ស.រ.អា។ គាត់បានជួបបុរសអាមេរិកាំងជាមនុស្សប្រពៃរ៍ម្នាក់រួមរស់ជាមួយកូន២នាក់យ៉ាងសុខសុខសាន្ត រហូតដល់ប្តីក្រោយចែកឋានទៅទៀត បន្សល់បានផ្ទះនឹងដីធំទូលាយក្នុងតំបន់អ្នកធូធារព្រមទាំងចំការដ៏ទំនើបសម្រាប់បន្តការរស់នៅសមរម្យ ជាពិសេសកូនប្រុសម្នាក់នឹងស្រីម្នាក់បានរៀនចប់បរិបូណ៌មានគ្រួសាររៀង១ខ្លួន មានទាំងចៅទៀតផង ។

ជីវិតអ្នកស្រី ភីរង់ នៅឆ្ងាយពីសហគមន៍ខ្មែរបន្តិចមែន ក៏ប៉ុន្តែនៅប្រកាន់ទំនៀមទំលាប់នឹងវប្បធម៌ខ្មែរយ៉ាងបានយ៉ាងប្រសើរនៅឡើយ ។ អ្នកស្រីនិងចេញដំណើរទៅកម្ពុជានៅប៉ុន្មានថ្ងៃខាងមុខចេះតែមុននឹងទៅកូន១គេរៀបពិធីទិវាមាតាជូនពរម្តាយរបស់ពួកគេពេញមួយថ្ងៃ នាថ្ងៃបន្ទាប់មកអ្នកស្រីបាននិមន្តព្រះសង្ឃពីអាត់លិនតាមកសូត្រមន្តសម្រាប់លើករាសីពេលធ្វើដំណើរឱ្យបានប្រកបតែនឹងសេចក្តីសុខសប្បាយក្នុងរយៈពេលជាង១ខែដែលអ្នកស្រីស្នាក់នៅកម្ពុជា ។ ហើយរសៀលថ្ងៃពុធនេះក៏ឆ្លៀតយកពេលកន្លះថ្ងៃមកជូនក្រុមគ្រួសារយើងបង្ហាញក្រុងម៉ាយាមីបង្ហាញចំការខ្មែរ ជាពិសេសជូនជាដំណឹងដល់លោកអ្នកអានខ្មែរផុសពីកសិករខ្មែរនៅស.រ.អា.នេះ ខុសគ្នាពីកសិករខ្មែររបៀបណា ?

ប៉ុណ្ណារ៉ូ សុបិន ឋាន ជាមិត្តស្រីម្នាក់របស់សុបិន នឹងខ្ញុំមានសេចក្តីរីករាយណាស់ ដោយដឹងថា នឹងបានឃើញចំការដំណាំនឹងផ្លែឈើដែលតាំងពីចេញពីស្រុកភូមិនៅកម្ពុជាមកមិនដែលបានឃើញស្រែចំការខ្មែរជាច្រើនឆ្នាំមក ហើយយើងធ្លាប់តែបរិភោគផ្លែឈើដែលទុំស្រាប់ដែលលក់នៅទីផ្សារតែប៉ុណ្ណោះ។ សំដៅទៅខាងជើងឈាងខាងលិចនៃរដ្ឋហ្លរីដាយើងនឹងប្រើពេលប្រមាណ១ម៉ោងប៉ុណ្ណោះ ដើម្បីទៅដល់ចំការគាត់...តែនៅកន្លះម៉ោងពីសណ្ឋាគារមុននឹងទៅដល់ចំការអ្នកស្រី ភីរង់ បាននាំយើងឱ្យស្គាល់គរហដ្ឋាន ឬរបស់គាត់ដែលជាកសិករដែលស្ថិតនៅពាក់កណ្តាលផ្លូវមុននឹងទៅដល់ចំការនោះ ។ គ្មានសញ្ញាណាមួយនាគេហដ្ឋាននោះ បង្ហាញថាគាត់ជាកសិករ ដូចនៅស្រុកយើងទេ គឺជាផ្ទះវីឡាដ៏ធំទូលាយស្ថិតនៅជាភូមិអ្នកធូធារមានរបងការពារភូមិចេញចូលការពារដោយរបងអេឡិកត្រូចិក បើកបិទតាមបញ្ជាពីចម្ងាយ ។ ផ្ទះរបស់អ្នកស្រីមានច្រើនបន្ទប់រៀបចំលំអជាផ្ទះអាមេរិកាំងទៅនើបខាងមុខមានកន្លែងចតរថយន្តបានច្រើន ផ្ទះបែរមុខទៅមាត់ទឹកទីធ្លាមានដាំដើមឈើយកផ្លែច្រើនដើម មានស្វាយ មានល្មុត មានចេក មានខ្នោ... ព័ទ្ធជុំវិញ ដែលពួកយើងទៅពីខាងជើងស្រុកអាមេរិកឆ្ងល់ថា ដល់ខែរងារដើមឈើទាំងនោះមិនងាប់អស់ទេ ឬអី? អ្នកស្រី ភីរង់ និយាយប្រាប់ថា នៅហ្លរីដា នេះធាតុអាកាស៥០-៦០ អង្សាត្រជាក់បំផុតហើយ! ឮដូច្នេះគួរឱ្យអាណិតដល់អ្នកផែនស៊ីលវេនា អ្នករ៉ូដអាយឡិន អ្នកម៉ាសាឈូសែតដែលមានធាតុអាកាសត្រជាក់៦ខែក្នុង១ឆ្នាំ គឺត្រជាក់ដល់ឆ្អឹងធាតុអាកាសនៅលើនឹងក្រោមសូន្យតែបន្តិចប៉ុណ្ណោះនាំគ្នាប្រឹងរីតក្បិនយ៉ាងតឹង ព្រោះរងារ! អ្នកនៅភូមិភាគកណ្តាល ឬខាងជើងសហរដ្ឋអាមេរិកច្រើនទឹកនាមករស់នៅរដ្ឋហ្លរីដានេះនៅពេលចូលនិវត្តន៍ស្ទើរគ្រប់គ្នាយ៉ាងហោចណាស់ក៏មកឆ្លងរិស្សមកាល២-៣ខែ នៅតំបន់ក្តៅនេះដែរ ។ អ្នកស្រី ភីរង់ មានសំណាងណាស់ដោយបានក្លាយជាអ្នកស្រុក ហ្លរីដា រួចទៅហើយ ដែលដីដំណាំ២៥ហិចតារបស់គាត់បានផ្តល់ផលសម្រាប់ចិញ្ចឹមក្រុមគ្រួសារជាកសិករទំនើបបានយ៉ាងគ្រប់គ្រាន់ ហើយធូរធាថែមទៀត។

យើងស្រស់ស្រូបថ្ងៃត្រង់ជាមួយអ្នកស្រី ភីរង់ រួចហើយក៏ចេញដំណើរបន្តទៅទៀត... នៅតាមសងខាងផ្លូវដំណាំដាំដុះមើលដាច់កន្ទុយភ្នែកមានកន្លែងខ្លះជាដីលិចទឹកគេសម្លាប់ដើមឈើដែលមិនបានការអីរាប់រយហិចតាបំរុងយកដីទៅធ្វើអ្វីផ្សេងបានន័យថា ផ្នែកខាងជើងនឹងខាង

**តទៅទំព័រទី ១៩**





ភិរុង បេះផ្លែល្មុត

# សម្ភាសន៍ជាមួយបេក្ខជនក្រុមប្រឹក្សារដ្ឋ ផលរដ្ឋា យ៉ែម

ដោយ : ខ្មែរប៉ុស្ដ៍ស.រ.អា.

នាឱកាសសម្ភោធយុទ្ធនាការឃោសនាលោក ផលរដ្ឋា យ៉ែម ដើម្បីដំណែងក្រុមប្រឹក្សារដ្ឋនៅគេហដ្ឋានក្បែរក្លេប៉ង់តេផាក ឬប៉ៃលិនផាកកាល ពីរសៀលថ្ងៃទី៦ មិថុនា ២០១៤ យើងបានសម្ភាសន៍ជាមួយបេក្ខជនដើមកំណើតខ្មែររូបនេះមកជូនលោកអ្នកអានជ្រាបជាពត៌មាន ។ លោក ផលរដ្ឋា យ៉ែម អាមេរិកាំង ដើមកំណើតខ្មែរ មានអាយុ៦១ឆ្នាំ មុខរបរជាក្រុមហ៊ុនខ្លួនឯងខាងលក់ទិញអចលនវត្ថុ។

**សួរ** តើបេក្ខជនមានប៉ុន្មាននាក់ ដែលឈរឱ្យគេបោះឆ្នោត?

**ផលរដ្ឋា យ៉ែម** បើតាមកាសែតឡូសាន់ថា មាន៥នាក់ ក្នុងនោះមានខ្មែរម្នាក់ផង រួមទាំងខ្ញុំទៀតមាន៦នាក់ ។

**សួរ** តើតួនាទីក្រុមប្រឹក្សារដ្ឋ ធ្វើអ្វីខ្លះ?

**ផលរដ្ឋា យ៉ែម** មុននឹងខ្ញុំឆ្លើយពីតួនាទី ខ្ញុំចង់បញ្ជាក់ពីបេក្ខភាពរបស់ខ្ញុំ ដែលបងប្អូនគួរដឹង គឺខ្ញុំបានដាក់ពាក្យទៅសាលាក្រុងជាមួយនឹងហត្ថលេខាអ្នកគាំទ្រខ្ញុំចំនួន២០០នាក់ គេត្រូវការតែ១៥០ទេ សាលាក្រុងបានបោះត្រាយល់ព្រមរួចហើយ ក៏បញ្ជូនទៅរដ្ឋទៀតនៅរដ្ឋគេបដិសេដ្ឋមិនទទួលស្គាល់លិខិតរបស់ខ្ញុំ គេថាលិខិតខ្ញុំខ្វះឈ្មោះក្រុងនឹងហ្សីបខូដ ពីព្រោះខ្ញុំមិនបានដាក់ឈ្មោះក្រុងនឹងហ្សីបខូដនៅប្រឡោះដែលគេទុកឱ្យយើងសរសេរ ដូច្នេះដោយសារខ្ញុំមិនមានសិទ្ធគ្រប់គ្រាន់អញ្ចឹងគេនឹងមិនដាក់ឈ្មោះខ្ញុំជាមួយឈ្មោះបេក្ខជនឯទៀតៗ សម្រាប់ឱ្យគេបោះឆ្នោតឱ្យទេ...សន្លឹកឆ្នោតហ្នឹងឥតមានឈ្មោះខ្ញុំមែនតែខ្ញុំមានសិទ្ធអញ្ជើញបងប្អូន មាមីងយាយតាឱ្យបោះឆ្នោតឱ្យខ្ញុំបានដោយសរសេរឈ្មោះខ្ញុំនៅលើសន្លឹកឆ្នោតត្រង់បន្ទាត់ដែលគ្មានឈ្មោះ ឬក៏បិត ស្ទីគឺរ ដែលមានឈ្មោះខ្ញុំនៅលើនោះ ទៅក្នុងប័ណ្ណបោះឆ្នោតនោះបាន។ ខ្លះថាខ្ញុំមិនមានសិទ្ធឈរឈ្មោះទេ ពាក្យនេះមិនត្រឹមត្រូវទេ ពីព្រោះខ្ញុំមានលិខិតឱ្យសិទ្ធខ្ញុំអាចចេញទៅឃោសនានឹងឱ្យគេបោះឆ្នោតឱ្យជាបេក្ខជនសរសេរឈ្មោះ ឬបិទឈ្មោះស្ទីគឺ។



ប្រធានគណកម្មការបោះឆ្នោត ផលរដ្ឋ យ៉ែម និងបេក្ខជន



គណកម្មការឃោសនាបោះឆ្នោតរបស់បេក្ខជន ផល រដ្ឋាយ៉ែម (រូបកណ្ដាលអាវខ្មៅ)

**សួរ** លោកដឹងទេថា វិធីនេះនាំឱ្យលំបាកច្រើនដល់អ្នកមកបោះឆ្នោតនឹងផលវិបាកធំដល់អ្នកឈរឈ្មោះ?

**ផលរដ្ឋា យ៉ែម** ថាអញ្ជឹងក៏បានតែនៅស្រុកនេះគេមានទម្លាប់តាំងពីដើមមកទោះជាសភាក៏អីចឹងប្រធានាធិបតីក៏អីចឹង បើយើងមិនចង់ធ្វើតាមលំដាប់លំដោយរបស់រដ្ឋនឹងសហរដ្ឋទេ យើងឈរទៅ ហើយអាចឱ្យប្រជាពលរដ្ឋអាចបោះឆ្នោតឱ្យបានសម្រាប់ខ្ញុំៗនឹងឱ្យ ស្ទីគី ទៅប្រជាពលរដ្ឋ សម្រាប់បោះឆ្នោតឱ្យខ្ញុំ។

ឥឡូវនេះ ឆ្លើយទៅនឹងសំនួរដំបូងថា តើទីប្រឹក្សារដ្ឋធ្វើអ្វីខ្លះ? គឺធ្វើច្បាប់នឹងកែរប្រែច្បាប់នៅលើច្បាប់ដែលមានរួចហើយ...

**សួរ** តើក្រុមប្រឹក្សារដ្ឋ ធ្វើការនៅឯណា?

ផលរដ្ឋា យ៉ែម ធ្វើការនៅ ស្តេតហាវ ក្រុង បូស្តុន ។ នៅឡូវែលនេះមានដំណាង៣រូប តំណាងឱ្យមីឌុលចិច ១៦-១៧-១៨ **តទៅទំព័រទី ០៩**

# Newly ED. of CMAA. Sovanna Pouv

## សមាគមខ្មែរ ឡូហ្គូថ្មី ទីតាំងថ្មី និងនាយកប្រតិបត្តិថ្មី



សុវណ្ណា ពៅ

**ដោយ : សុខា**

**ក្រុងឡូវែល:** ក្រៅពីការប្តូរទៅទីតាំងថ្មីនៅស្តូលស្រ្ទីត និងការតម្លើងឡូហ្គូថ្មីសមាគមខ្មែរមាននាយកប្រតិបត្តិថ្មី។ ថ្ងៃទី៩ ខែមិថុនា ឆ្នាំ ២០១៤ លោក សុវណ្ណា ពៅ នឹងចូលបំពេញការងារនៅសមាគមខ្មែរក្នុងនាមជានាយកប្រតិបត្តិថ្មី បន្ទាប់ពីលោក វ៉ាស៊ី អាន លាលែងពីសមាគមនេះកាលពីខែមករា។ លោក សុវណ្ណា ពៅ អាយុ ៣៣ឆ្នាំ មានដើមកំណើតជាជនខ្មែរ និងមានទីលំនៅក្នុងក្រុងឡូវែលទីដែលសមាគមនេះតាំងនៅ។

មានប្រសាសន៍មកកាន់សារព័ត៌មានខ្មែរផុសសហរដ្ឋអាមេរិកលោក សុវណ្ណ ពៅ បានថ្លែងថា លោកមានសេចក្តីរំភើបដែលទទួលបានឱកាសបំពេញការងារក្នុងសមាគមនេះ នៅមិនប៉ុន្មានថ្ងៃដ៏ខ្លីខាងមុខ។ លោកបានទទួលដំណឹងអំពីភាពទំនេរនៃតំណែងនាយកប្រតិបត្តិក្នុងសមាគមខ្មែរនៅពាក់កណ្តាលខែមីនា ហើយលោកបានបញ្ជូនឯកសារពាក្យសុំការងារនេះនៅដើមខែមេសា នឹងបានទទួលដំណឹងល្អអំពីការទទួលបានតំណែងសំខាន់មួយនេះនៅពាក់កណ្តាលខែឧសភា។

មានកត្តាគួបផ្សំមួយចំនួនដែលជ្រោមជ្រែងលោក សវណ្ណា ពៅឱ្យទទួលបានឱកាសជានាយកប្រតិបត្តិនៃសមាគមខ្មែរក្នុងនោះរួមមានភាពប៉ិនប្រសប់ក្នុងការប្រាស្រ័យទាក់ទងក្នុងសង្គមត្បិតលោកតែងតែឆ្លៀតពេលចូលរួមយ៉ាងសកម្មក្នុងកម្មវិធីការជួបជុំ ឬកិច្ចពិភាក្សានានាដែលមានក្នុងសហគមជាហេតុនាំឱ្យលោកបានស្គាល់អ្នកបំពេញការងារក្នុងសហគមទាំងជិត និងឆ្ងាយបង្កើតឱ្យលោកបានស្គាល់ និងចងទំនាក់ទំនងជាមួយមនុស្សជាច្រើន។ ជាមួយគ្នានោះការលើកទឹកចិត្ត និងការផ្តល់កម្លាំងចិត្តពីមិត្តភ័ក្តិរួមអាជីព និងមតិល្អៗពីសំណាក់វៀមច្បងក្នុងសង្គម ព្រមទាំងការសម្រេចចិត្តផ្ទាល់ខ្លួនដែលចង់សាកល្បងការទទួលខុសត្រូវការងារក្នុងកម្រិតខ្ពស់មួយបន្ថែមទៀត ជាកត្តាជម្រុញលោក សុវណ្ណា ពៅ កាន់តែតម្រង់ទិសភ្ជាប់ខ្លួនមកកាន់តួនាទីថ្មីនេះ។ ទន្ទឹមនឹងនោះដែរ សមាគមខ្មែរជាមូលហេតុមួយក្នុងចំណោមសត្យានុម័តសំខាន់ៗដែលបានធ្វើការផ្លាស់ប្តូរខ្សែជីវិតរបស់លោក សុវណ្ណា ពៅ និងក្រុមគ្រួសារពីសេចក្តីលំបាកមកកាន់អនាគតមួយដែលល្អប្រសើរ។

ប៉ុន្មានឆ្នាំចុងក្រោយនេះ សមាគមខ្មែរលែងស្ថិតនៅក្នុងឋាៈជាជនភៀសខ្លួនហើយ ហើយប្រឈមនឹងការកាត់ប្រាក់ជំនួយមួយចំនួនធំ។ យ៉ាងណាមិញសេចក្តីត្រូវការក្នុងការជួយជ្រោមជ្រែងទៅដល់ប្រជាជនក្នុងសហគមឡូវែលពីសំណាក់សមាគមខ្មែរនៅតែកើតមាន។ លោក សុវណ្ណា ពៅ បានអំពាវនាវឱ្យប្រជាជនក្នុងសហគមមានសេចក្តីក្លាហានមកសាកសួរព័ត៌មានពីសមាគមខ្មែរ ហើយទាញយកអត្ថប្រយោជន៍ពីសមាគមនេះឱ្យអស់លទ្ធភាព។ លោក សុវណ្ណា ពៅ បានថ្លែងដូច្នេះថា "លោកអាចនឹងមិនមានសមត្ថភាពឥតខ្ចោះឆ្លើយនូវគ្រប់សំណួរ និងបំពេញគ្រប់សេចក្តីត្រូវការរបស់អ្នកគ្រប់គ្នាតែលោកនឹងព្យាយាមឱ្យបានច្រើនបំផុតក្នុងការជួយអ្នករាល់គ្នា"។ ផ្អែកលើភាពជាក់ស្តែងដែលសមាគមបានបោះទីតាំងចូលទៅដល់ចំណុចកណ្តាលនៃក្រុងខ្មែរនៅទីតាំងស្តូលស្រ្ទីតលោកលើកទឹកចិត្តសារជាថ្មីម្តងទៀតដល់ប្រជាជនខ្មែរឱ្យមកទទួលសេវាល្អៗ និងអត្ថ-ប្រយោជន៍ពីសមាគមខ្មែររួមមានការទទួលបានចំណេះដឹងអំពីការទិញផ្ទះជាលើកដំបូងកម្មវិធីបង្រៀនអក្សរខ្មែរអក្ខរកម្មផ្នែកហិរញ្ញវត្ថុការបញ្ជូនកូនទៅសាលារៀនការអប់រំចិញ្ចឹមទុកដាក់កូនចៅ និងបញ្ហានានាដែលភាគច្រើនលោកអ្នកជួប្រទះក្នុងជីវភាពរស់នៅប្រចាំថ្ងៃ។ លោកភ្ជាប់ប្រជាជនខ្មែរទៅនឹងជនជាតិអាស៊ីទាំងឡាយដែលនៅឡូវែល ដូច្នេះថា សមាគមខ្មែរមិនត្រឹមតែបម្រើជនជាតិខ្មែរតែជាតិសាសន៍ដ៏ទៃមានថៃ



សុវណ្ណា ពៅ កាលនៅក្មេង (សញ្ញាព្រួញ)



សុវណ្ណា ពៅ និងកូនស្រី ប្រាយអិនណា អំរណរពៅ






សុវណ្ណា ពៅ និងគ្រួសារ

លាវ ភូមា ។ល។ ក៏អាចមកទទួលអត្ថប្រយោជន៍ពីសមាគខ្មែរបានដែរ។

គួរបញ្ជាក់ផងដែរ នាយកប្រតិបត្តិវ័យក្មេងរូបនេះ ជាអនុប្រធានគណកម្មការនាយកនៃក្រុមរបាំអង្គរ និងជាទីប្រឹក្សាគណកម្មការក្នុងកម្មវិធីជំនួញនៃមហាវិទ្យាល័យសហគមន៍មីដដលស៊ិក។ ក្រៅពីការងារជានាយកប្រតិបត្តិដែលលោកនឹងចូលកាន់តំនែងនោះ លោកក៏ជាឪពុកម្នាក់នៃកូនស្រីម្នាក់ដែលមានឈ្មោះថា ប្រាយអិនណា អរណ័រ ពៅ (Bryanna Honor Pouv)។ លោកបានបញ្ជាក់ថា លោកមានមោទនភាពក្នុងការក្លាយខ្លួនជាឪពុកម្នាក់ ត្បិតលោកថ្លែងដូច្នេះថា "ខ្ញុំចង់បំពេញតួនាទីជាឪពុកឱ្យបានល្អបំផុតសម្រាប់កូនស្រីរបស់ខ្ញុំ ព្រោះក្នុងពេលដែលខ្ញុំត្រូវការឪពុករបស់ខ្ញុំបំផុត លោកមិនបាននៅក្បែរខ្ញុំឡើយ "ប្រែសេចក្តីដែលនិយាយជាភាសាអង់គ្លេស **តទៅទំព័រទី ១១**

## តមកពីទំព័រទី ៧ សម្ភាសន៍ជាមួយ ផលរដ្ឋា យ៉ែម

នៅតំបន់១៨ហ្នឹង ហាយឡិន-អេគី សម្បូរខ្មែរនៅច្រើនជាងគេ ហើយថ្មីៗហ្នឹងទៀត គេទទួលស្គាល់ថា ជាក្រុងខ្មែរយើងគួរតែឱ្យមានតំណាងខ្មែរនៅទីនោះ ហេតុអ្វី? បើកាលណាមានសេចក្តីព្រាងច្បាប់ណាមួយប៉ះពាល់ដល់ផលប្រយោជន៍ខ្មែរ បើមានខ្ញុំនៅធ្វើការទីនោះ ខ្ញុំអាចតវ៉ាឱ្យដកច្បាប់នោះ ឬក៏កែរប្រែវាចេញ ។

**សួរ** តើនៅក្រុមប្រឹក្សារដ្ឋមានគ្នាប៉ុន្មាននាក់?

**ផលរដ្ឋា យ៉ែម** មានគ្នាជាង១០០នាក់ ប៉ុន្តែឡូវែលមានប្រជាពលរដ្ឋច្រើនជាងគេជាង១០ម៉ឺននាក់ ដូច្នេះមានតំណាងដល់ទៅ៧រូប តែតំណាងព្រឹទ្ធសភាមានតែ១រូបទេ ។

**សួរ** តើការងារហ្នឹងមានប្រាក់បៀវត្សរ៍ដែរឬទេ ?

**ផលរដ្ឋា យ៉ែម** បានតិចទេ មួយឆ្នាំ៦ម៉ឺន៥ពាន់ តែប៉ុណ្ណោះ

**សួរ** តើមានទំនាស់ជាមួយការងារសព្វថ្ងៃអ្វីខ្លះ?

**ផលរដ្ឋា យ៉ែម** មិនមានទេ! ដូចជា ខេវិន ម័រហ្វី គាត់ជាមេធាវី ពេលត្រូវទៅប្រជុំនៅបូស្តុន គាត់ទៅប្រជុំទៅដល់ត្រឡប់មកវិញ គាត់ធ្វើការងារជាមេធាវីដដែលលោក ថម ហ្គោលដិន គាត់ជា វាលអេស្តេត អេជិន ដូចខ្ញុំដែរ គាត់ធ្វើការប្រជុំបោះឆ្នោតនៅបូស្តុន រួចហើយប្រឡប់មករកស៊ីនៅឡូវែល ដូចខ្ញុំដែរ

**សួរ** គិតថា នឹងឈរឈ្មោះហ្នឹង តើមានគម្រោងអ្វីខ្លះ សម្រាប់ជួយសង្គមឡូវែលនេះ?

**ផលរដ្ឋា យ៉ែម** ខញុំមកបំរើក្រុងឡូវែល តាំងពីឆ្នាំ១៩៨៩ដោយចេញពីបូស្តុនមកមកបំរើការងារធានាគារខាងផ្នែកពង្រីងជំនួញនឹងការទុកចិត្តប្រធានាគារកុំឱ្យសន្សំលុយក្រោមពូកតទៅទៀត ។ បន្ទាប់មកខ្ញុំក៏ចូលជាសមាជិកគណកម្មការនាយកសមាគមខ្មែរ CMAA មួយរយក្រោយមកទៀត ខ្ញុំក៏ក្លាយជានាយកប្រតិបត្តរបស់សមាគម Cambodian-American League សម្រាប់ធ្វើអភិវឌ្ឍន៍តំបន់ឡូវែលដោយមានថវិការ២លានដុល្លារសម្រាប់ធ្វើផ្ទះឱ្យប្រជាជនដែលមានប្រាក់ចំណូលតិច ឥឡូវតំបន់នោះ មានមនុស្សចូលមកធ្វើពាណិជ្ជកម្មច្រើន។ ពីដើមតំបន់នោះជាតំបន់គួរឱ្យខ្លាចដោយសម្បូរស្រីខូចក្រុមក្មេងលក់គ្រឿងញៀនសម្បូរមនុស្សរស់នៅតាមចិញ្ចើមថ្នល់គ្មាននរណាហ៊ានទៅទេ កន្លែង៦០មីឌលសិចស្រីតហ្នឹង។

**សួរ** ចុះសម្រាប់ពលរដ្ឋខ្មែរដែលលោក រដ្ឋាមានដើមកំណើតដូចគ្នាដែរនោះ តើមើលឃើញអ្វីខ្លះ ហើយមានគម្រោងអ្វីដែរ?

**ផលរដ្ឋា យ៉ែម** សំខាន់ជាងគេនោះ គឺយើងគ្មានដំណាងខ្មែរសម្រាប់កាពារយើងគ្មានអ្នកការពារច្បាប់អន្តោប្រវេសន៍គ្មានអ្នកការពារសិទ្ធនៅពេលតែចាប់ចងទាំងបំពានច្បាប់ដែលគេបង្កើតឡើងគឺសម្រាប់ប្រជាពលរដ្ឋទូទៅមិនមែនបានន័យថាល្អសម្រាប់ប្រជាពលរដ្ឋខ្មែររស់នៅដែរនោះទេ បើមានខ្ញុំនៅក្បែរហ្នឹង ខ្ញុំអាចនឹងមានសម្លេងតវ៉ាបាន

**សួរ** កន្លែងមានតែមួយសម្រាប់ខ្មែរ២នាក់ប្រជែងគ្នា តើគួរទៅមុខទាំង២ ឬក៏បើខ្មែរ២នាក់វាទៅជាច្រើនពេក?

**ផលរដ្ឋា យ៉ែម** នៅប្រទេសមានប្រជាធិបតេយ្យមានសិទ្ធិសេរីភាព បើបងប្អូនចង់ឈរឈ្មោះឱ្យក៏ឈរទៅចុះ បើច្រើនក៏ជាការប្រសើរទោះជារើសតែម្នាក់ក៏ដោយ ក៏ប្រជាពលរដ្ឋអ្នកបោះឆ្នោតមានបញ្ញាឈ្លាសវៃច្បាស់លាស់អាចជ្រើសរើសមនុស្សមានសមត្ថភាពបាន

**សួរ** តើមានចង់និយាយពីទេព្យកោសល្យ ឬក៏ជំនាញ អ្វីដែលខ្ញុំមិនបានសួរដែរឬទេ?

**ផលរដ្ឋា យ៉ែម** ខ្ញុំមានចំណុចខ្លាំង ដើម្បីជម្រាបពីផែនការណ៍ទាក់ទងទៅបងប្អូនដែលមានសិទ្ធបោះឆ្នោត ហើយអ្នកបោះឆ្នោតហ្នឹងទាល់តែនៅក្នុងសង្កាត់ មីឌលសិច១៨ ហ្នឹងទើបបោះឆ្នោតបាន ។ ខ្ញុំជឿថា ខ្ញុំនៅមានចំណុចសំខាន់ៗជាច្រើន ដែលទាក់ទងនឹងជីវិតរស់នៅដែលចង់ឱ្យបងប្អូនដឹងនរណាដែលដឹងនឹងគាំទ្របេក្ខភាពរបស់ខ្ញុំ គឺកាងារអភិវឌ្ឍន៍សហគមន៍បង្កើតឱ្យមានផ្ទះសម្បែងសម្រាប់ប្រជាពលរដ្ឋជួយដល់ម្ចាស់ហាងជំនួញឱ្យអាចខ្ចីប្រាក់បានជួយដល់អ្នកចង់បើកហាងជំនួញ ជាពិសេសទៅទៀត ជួយដល់ការសិក្សាកូនចៅសំខាន់ទៅទៀតនោះ គឺរកថវិការឱ្យចូលសម្រាប់ប្រើប្រាស់នៅក្នុងសង្កាត់របស់យើង។ យើងក៏អាចធ្វើការសម្រាប់សន្តិសុខក្រុងយើងកុំឱ្យមានការលួច ឆក់ ប្លន់ នេះគឺជាការងាររបស់ខ្ញុំ ដែលត្រូវធ្វើការជាមួយអាជ្ញាធរក្រុង។ ជួយដល់យុវនារីផ្សេងៗដែលគ្មាឥតការធ្វើជួយដល់ក្មេងៗដែលទៅប្រព្រឹត្តអំពើឧក្រិដ្ឋឱ្យអាចគេចផុតពីអបាយមុខនេះបាន។

**សួរ** ជាបញ្ចប់សូមលោកធ្វើការរំលឹកបន្តិចថា បោះឆ្នោតលើកទី១ នៅថ្ងៃណា? លើកទី២នៅថ្ងៃណា?

**ផលរដ្ឋា យ៉ែម** បោះឆ្នោតលើកទី១ ហៅថាបឋមនៅថ្ងៃអង្គារ ទី៩ខែកញ្ញា លើកទី២ថ្ងៃអង្គារទី៤ ខែវិច្ឆិការ ២០១៤ ជាថ្ងៃផ្តាច់ព្រាត់ ។

**សួរ** សូមឱ្យលោកទទួលនូវសំណាងល្អ ៕

# មានបុគ្គលិកនិយាយភាសាខ្មែរ សម្រាប់ជួយលោកអ្នក

THE BIGGER THE BANK



The smaller the customer.

## Better Products, Better Service
## A community bank




| | Washington Savings Bank | Big Banks |
|---|---|---|
| ATMs | 60,000 Nationwide free ATMs | Much Less! |
| Free Checking | YES! | Are you kidding? |
| Online Banking | Everything the 'Big Banks' have: Online banking, Bill payment, mobile banking, mobile deposit | We'll give them this one, they have it too |
| Free Designer Debit Card | YES, OVER 80 DESIGNS! | They are not that creative |
| Unlimited Debit Card Cash Rewards | YES! Anytime, Anywhere | No |
| Customer Service | Friendly local people who really want to help solve problems | One word "Voicemail" |
| Lending | Local decisions, by local people who sincerely want to work with you. Your place or ours, day, evening or weekend | See above |
| Bank Headquarters | Lowell, MA - your money and loan payments stay in your community | Canada, Spain Scotland, North Carolina |

"I switched from a large bank several years ago and have never regretted it. This is a small town bank with large bank benefits and far superior service than you get at the larger banks." - Joe S."

"I recently switched from Bank of America and love it here. Should have done it sooner!" – Kelly P.



## PLUS RECEIVE A FREE kindle fire®

- Monthly Direct Deposit of at least $1,000
- At least one monthly automatic payment
- An active debit card




washingtonsavings.com

**978-458-7999**

Member FDIC/ Member DIF / Equal Housing Lender

See reverse side for terms and conditions

## តមកពីទំព័រទី ២ បទសម្ភាសន៍ជាមួយលោក រ៉ាឌី ម៉ម ...

វឌ្ឍការជាប់ឆ្នោតទាំងអស់បាន ដូចជា ខេរិន ម័រហ្វី ដែលកាលពីនៅជាទីប្រឹក្សារដ្ឋ ឥឡូវជាអ្នកគ្រប់គ្រងសាលាក្រុងឡូវែល ពេលនេះឱកាសផ្តល់ឱ្យខ្ញុំដើរតែមិនមែនជាការចាប់ប្តើមទេ ឱ្យខ្ញុំដើរតាមគន្លង ខេរិន ម័រហ្វី ពីព្រោះតែខ្ញុំចង់ជួយសហគមន៍យើងនោះឯង


លោកគ្រូ អន លីន វង និងសិស្ស រ៉ាឌី ម៉ម នៃសាលាសារពើង

**ខ្មែរផុស** លោកថា បន្តការងាររបស់ ខេរិន ម័រហ្វី បន្តពេញ១អាណត្តិ ឬក៏អាណត្តិដែលនៅសល់របស់គេ?

**រ៉ាឌី ម៉ម** អាណត្តិពេញ គឺ២ឆ្នាំគេបោះឆ្នោតម្តង

**ខ្មែរផុស** ខ្ញុំចង់លើកឧទាហរណ៍តែមួយដោយចង់យល់ឱ្យច្បាស់ពីទស្សនៈរបស់លោក គឺលោកនិយាយពីបុណ្យអុំទូកនៅឡូវែលដែល ឥឡូវនេះបានកន្លងផុតពីកណ្តាប់ដៃសហគមន៍ខ្មែរទៅហើយ តើលោកនឹងទៅជួយបុណ្យអុំទូកបច្ចុប្បន្នរបៀបណា?

**រ៉ាឌី ម៉ម** ខ្ញុំមិនមែនជាសមាជិកគណកម្មការបុណ្យអុំទូកនេះទេ តែខ្ញុំជាអ្នកស្ម័គ្រចិត្តមកជួយដរាបណានៅតែមានបុណ្យអុំទូក ខ្ញុំនៅតែសប្បាយនឹងជួយឱ្យអស់ពីចិត្តឱ្យតែពិធីវប្បធម៌នេះ នៅតែមានឈ្មោះខ្មែរជាបុណ្យអុំទូកដដែល ពីព្រោះឈ្មោះនេះផ្ទាប់ប្រវត្តិសាស្ត្រនៃការកសាងសង្គមខ្មែរនៅឡូវែលនេះ ។

**ខ្មែរផុស** នៅពេលដែលលោកជាប់ឆ្នោត តើអ្វីទៅដែលលោកយល់ថាមានសារៈសំខាន់បំផុតដែលលោកត្រូវផ្តោតអារម្មណ៍ខ្ពស់សម្រាប់សហគមន៍ទាំងមូល ឬក៏ផ្តោតអារម្មណ៍ទៅលើសហគមន៍ខ្មែរដែលលោកយល់ថា មានការប្រញាប់ជាងគេ ?

**រ៉ាឌី ម៉ម** មែន! ខ្ញុំជាកូនខ្មែរអាមេរិកាំង និយាយឱ្យចំទៅមិនមែនធ្វើសម្រាប់តែសង្គមខ្មែរទេ កិច្ចការនេះគឺខ្ញុំដំណាងឱ្យសង្កាត់១៨ គឺទាំងអស់គ្នា ប៉ុន្តែប្រសិនបងប្អូនខ្មែរត្រូវការខ្ញុំ ខ្ញុំនឹងធ្វើអ្វីដែលបងប្អូនចង់បានសម្រាប់ខ្ញុំ តាមការស្តាបស្តង់ចំពោះការព្រួយបារម្ភ បងប្អូន មាមីង ស្បែកស ស្បែកខ្មៅ គឺរឿងពន្ធដារ រឿងសាលរៀនកូនចៅរឿងសន្តិសុខដែលជារឿងទូទៅតែខ្ញុំក៏ដឹងដែរថា ពុក ម៉ែខ្ញុំពិបាកប៉ុណ្ណាទម្រាំខ្ញុំរៀនបានមកដល់ប៉ុណ្ណឹងនោះ ។

**ខ្មែរផុស** បើអ៊ីចឹង ហេតុអ្វីក៏មិនសូវឃើញខ្មែរធ្វើការចូលរួមជាមួយនឹងក្រុមសាស្ត្រដ៏ទៃចេះតែដកខ្លួនថយចេញ?

**រ៉ាឌី ម៉ម** ខ្ញុំគិតថាយើងមិនមែនជាសង្គម១សង្គម២ទេ គឺសហរដ្ឋអាមេរិកជាផ្ទះប្រជាជនតែ១ជាមួយគ្នា ហើយខ្ញុំមិនមែនជាមនុស្សឱ្យសង្គមបែកជា២ជា៣ទេ ខ្ញុំចង់ឱ្យសង្គមយើងមានសម្លេងតែ១ស្មើភាពគ្នា ហើយម្យ៉ាងទៀតលោកសួរថា ខ្មែរមិនធ្វើការចូលរួមនឹងសាស្ត្រដ៏ទៃ ប្រហែលជាអ្នកដឹកនាំយើងមិនបានណែនាំពីការចូលរួមនេះឱ្យបានច្បាស់លាស់ ឬក៏មានសម្លេងតិចតួចពេកសម្រាប់តំណាងសហគមន៍ខ្មែរហេតុនេះ ហើយបានជាខ្ញុំលើកទឹកចិត្តឱ្យអ្នកចេះដឹងខ្មែរ

Commonwealth of Massachusetts William Francis Galvin, Secretary of the Commonwealth

**Receipt for Nomination Papers**

DATE: 5/23/14 PARTY: DEMOCRAT

CANDIDATE'S NAME: RADY MOM

OFFICE: STATE REP DISTRICT: 18th MIDDLESEX

SIGNATURES NEEDED: 150 CERTIFIED SIGNATURES FILED: 204

CANDIDATE'S STATEMENT: NONE

BALLOT STATUS:
- [x] On ballot unless otherwise notified.
- [ ] Not yet on ballot. Reason:

Filed by: RADY MOM

Daytime Phone: (978) 866-5555

Contact Information:

Contact Phone:

CHECKLIST:
- [x] Written Acceptance
- [x] Enrollment Certificate
- [x] Ethics Receipt (excluding Federal Offices)

REC'D BY:

ក្រោកឈរជាដំណាងសហគមន៍ឱ្យបានច្រើនឡើង

**ខ្មែរផុស** ឱកាសខ្មែរឈរឈ្មោះ ហើយជាប់ឆ្នោតមានតិច ឥឡូវខ្មែរ២រូបឈរជាបេក្ខជនសម្រាប់ដំណែងតែមួយ តើគួរទុកឱ្យម្ចាស់ឆ្នោតជម្រះបញ្ជីនៅជុំទី១ ឬក៏មានម្នាក់ត្រូវដកខ្លួនចេញ?

**រ៉ាឌី ម៉ម** បើតាមន័យប្រជាធិបតេយ្យ នរណាឈរឈ្មោះក៏បានដែរឱ្យទេអាយុលើសពី១៨ឡើងទៅតែសម្រាប់បេក្ខភាពទីប្រឹក្សារដ្ឋលើកនេះ ខ្ញុំជាខ្មែរអាមេរិកាំងដំបូងបង្អស់នឹងតែម្នាក់គត់ដែលមានឈ្មោះក្នុងបញ្ជីប្រវត្តិសាស្ត្រឱ្យគេបោះឆ្នោតជាទីប្រឹក្សារដ្ឋ ខ្ញុំជឿថា ប្រជាពលរដ្ឋនឹងមានសុភវិនិច្ឆ័យជ្រើសរើសតែបេក្ខជនដែលល្អប្រសើរបំផុតសម្រាប់សហគមន៍ខ្លួនសម្រាប់គ្រួសារខ្លួន ៕

**ខ្មែរផុស សូមលោកទទួលបាននូវសំណាងល្អ**

## តមកពីទំព័រទី ៨ សមាគមខ្មែរឡូហ្គថ្មី ទីតាំងថ្មី និងនាយក...

"I am proud to be a father. I want to be here and there for my daughter because my father was not there for me when I needed him."

កង្វល់មួយក្នុងចំណោមកង្វល់នានាទាក់ទិននឹងឧបសគ្គបំពេញតួនាទីថ្មីនេះ គឺភាសា។ លោកអាចនិយាយភាសាខ្មែរបានល្អតែលោកនៅមានកម្រិតក្នុងការសរសេរ និងអាន។ តែយ៉ាងណាក៏ដោយលោកតាំងចិត្តរៀនភាសាខ្មែរ ពោលគឺចូលរួមលើកកម្ពស់កម្មវិធីភាសាខ្មែរដែលមានក្នុងសមាគមនេះ។

លោកសង្ឃឹមថា វត្តមានរបស់លោកក្នុងសមាគមខ្មែរសហការជាមួយនាយកប្រតិបត្តិរង វូប ជីវុលភៀល្យើរ៉ េ និងបុគ្គលិកទាំងអស់គួបផ្សំនឹងការអនុវត្តការងាររួមគ្នាជាមួយគណៈកម្មការនាយកដែលមានអ្នកស្រីបុប្ផាមេឡូនជាប្រធាននឹងបន្តអតិភាពសមាគមខ្មែរឱ្យនៅតែមានបម្រើប្រយោជន៍ជាសារវ័ន្តក្នុងសហគមន៍ ៕

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ជំពូកទីប្រែសម្រួលពីភាសាអង់គ្លេស　អត្ថបទដកស្រង់ និងឧទ្ទេសការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី　ច្បាប់ចេញផ្សាយថ្ងៃ ច័ន្ទ ទី០២ ខែមិថុនា ឆ្នាំ២០១៤

# កសិករនៅខេត្តក្រចេះសុខចិត្តទទួលយកការផ្ដល់ដីថ្មី ដោយរដ្ឋាភិបាល ប៉ុន្តែទាមទារជាលាយលក្ខណ៍អក្សរ

**ដោយ : សេក ឧត្ដម** | **May 31, 2014**

កសិករមួយក្រុមដែលត្រូវបានបណ្ដេញចេញ ដើម្បីបើកផ្លូវឱ្យក្រុមហ៊ុនចម្ការកៅស៊ូវៀតណាមមួយនៅក្នុងខេត្តក្រចេះសុខចិត្តទទួលយកសម្បទានដីសង្គមកិច្ចមួយពីរដ្ឋាភិបាលកាលពីម្សិលមិញ ប៉ុន្តែនឹងមិនចាកចេញពីមូលដ្ឋានតវ៉ារបស់ខ្លួននៅក្នុងរាជធានីភ្នំពេញទេ លុះត្រាពួកគាត់ឃើញប្លង់រឹងដែលបញ្ជាក់ថា ដីនោះជាដីថ្មីរបស់ខ្លួនសិន។

លោក ងួន វិបុល តំណាងប្រជាពលរដ្ឋគ្មានទីជម្រកចំនួន៣០១គ្រួសារបានឱ្យដឹងថា កសិករមួយក្រុមនឹងទៅកាន់ទីកន្លែងសម្បទានដីទំហំ៧៥០ហិកតា នៅក្នុងស្រុកស្នួលនៅថ្ងៃនេះ និងទាមទារឯកសារសមស្របនិងការសាងសង់លំនៅដ្ឋានជាបណ្ដោះអាសន្ន។

ប្រសិនបើការទាមទាររបស់ពួកគាត់មិនត្រូវបានដោះស្រាយទេ ពួកគាត់នឹងត្រឡប់មកភ្នំពេញវិញ ជាទីដែលពួកគាត់បានបោះជំរំនៅក្នុងវត្តសាមគ្គីរង្សីសង្កាត់ស្ទឹងមានជ័យអស់រយៈពេលជិតពីរសប្ដាហ៍។

លោក វិបុល បានមានប្រសាសន៍ថា "យើងយល់ព្រមទទួលយកសម្បទាននេះ ពីព្រោះយើងមិនចង់ខ្ជះខ្ជាយពេលវេលាច្រើន ឬធ្វើឱ្យប្រទេសមានអស្ថិរភាពទេ។ ប៉ុន្តែប្រសិនបើអាជ្ញាធររំពឹងថា យើងដេកនៅក្នុងសាលាស្រុកស្នួលយើងតវ៉ា។ នៅពេលយើងត្រឡប់ទៅខេត្តក្រចេះវិញ មន្ត្រីមូលដ្ឋានត្រូវផ្ដល់តង់ និងអាហារនៅលើដីថ្មី បើមិនអ៊ីចឹងទេយើងនឹងត្រឡប់មកភ្នំពេញវិញ"។

ក្រុមគ្រួសារទាំងនេះដែលភាគច្រើនក្នុងចំណោមនោះបានធ្វើចំណាកស្រុកទៅរស់នៅក្នុងស្រុកស្នួលពីខេត្តកំពង់ចាមក្នុងឆ្នាំ២០០៨ ត្រូវបានបណ្ដេញ **តទៅទំព័រទី ១៩**

# Kratie Farmers Accept Gov't Land Offer

**By Sek Odom | May 31, 2014**

A group of farmers evicted to make way for a Vietnamese rubber firm in Kratie province accepted a social land concession from the government Friday, but will not leave their protest base in Phnom Penh until they see hard proof of their new plots.

Nguon Vibol, a representative of the 301 displaced families, said a group of farmers would go to the site of the 750-hectare concession in Snuol district Saturday and demand appropriate documentation and temporary housing.

If their demands are not met, they will return to Phnom Penh, where they have been camped in Stung Meanchey commune's Samakki Raingsey pagoda for almost two weeks.

"We agree to take the concession because we don't want to waste any more time or destabilize the country," Mr. Vibol said. "But if the authorities expect us to sleep in the Snuol district office we will protest."

"When we go back to Kratie, the local officials must provide tents and food on the new land or we will go back to Phnom Penh."

The families, most of whom migrated to Snuol from Kompong Cham province in 2008, were evicted May 2 to make way for the Binh Phuoc 2 firm. When they refused to leave, their homes were burnt to the ground.

Kratie Governor Sar Chamrong said Friday that officials would prepare the necessary documents for the social land concession and hand it over to the farmers Saturday.

"If they chose not to live there, they can go and find something else by themselves," Mr Chamrong said. "They can go anywhere they want, just not the [Binh Phuoc 2] land concession."

Chan Soveth, senior investigator for human rights group Adhoc, said he would accompany the farmers' delegation to their new land-which the farmers say is less than 10 km from the Binh Phuoc 2 concession.

"If the local officials prepare the documents quickly, the people will move back to the province," Mr. Soveth said.

**odom@cambodiadaily.com**

# កងរាជអាវុធហត្ថរារាំងព្រះសង្ឃមិនឱ្យហែក្បួន ទៅកាន់វិទ្យាស្ថានពុទ្ធសាសនបណ្ឌិត

**ដោយ : ឃួន ណារិម** | **May 30, 2014**

កាលពីម្សិលមិញអ្នកតវ៉ាជាង១០០នាក់ រួមទាំងព្រះសង្ឃប្រហែល៦០អង្គផងបានប្រមូលផ្ដុំគ្នានៅមុខក្រសួងធម្មការ និងសាសនាដើម្បីតវ៉ា



សមត្ថកិច្ចដាក់របាំងខាងមុខក្រសួងធម្មការនិងសាសនារារាំងព្រះសង្ឃ និងប្រជាពលរដ្ឋមិនឱ្យដង្ហែក្បួនដាក់ញត្តិ ជូនរដ្ឋ មន្ត្រីក្រសួងនេះកាលពីម្សិលមិញ។ ស៊ីវ ចាន់ណា

ចំពោះពាក្យចចាមអារ៉ាមថា មានការលក់ដីនៅក្នុងវិទ្យាស្ថានពុទ្ធសាសនបណ្ឌិត្យទៅឱ្យកាស៊ីណូណាហ្គាវើលក្បែរនោះ។

លោក សេង សុមុនី អនុរដ្ឋលេខាធិការក្រសួងធម្មការ និងសាសនាបានធ្វើសន្និសីទកាសែតកាលពីដើមសប្ដាហ៍នេះ បដិសេធការសន្និដ្ឋានដែលថា ការវាយកម្ទេចខ្លោងទ្វារមុខរបស់វិទ្យាស្ថានពុទ្ធសាសនបណ្ឌិត គឺជាដំណាក់កាលទី១នៃគម្រោងដើម្បីប្រែក្លាយវិទ្យាស្ថានពុទ្ធសាសន **តទៅទំព័រទី ១៦**

# Military Police Barricade Road to Stop Monks From Marching

**By Khuon Narim | May 30, 2014**

More than 100 protesters, including about 60 monks, gathered in front of the Ministry of Cults and Religions on Thursday to protest the rumored sale of land within the Buddhist Institute to nearby Naga World Casino.

Seng Somony, undersecretary of state at the ministry, gave a press conference earlier this week to quash speculation that the demolition of the institute's front gate was the first stage of a plan to turn the institute into a parking lot for the hotel-casino complex.

Unconvinced, protesters Thursday marched down Sisowath Quay toward the Buddhist Institute in Chakmar Mon district's Tonle Basac commune to deliver a petition asking for guarantees that the land was protected.

But they were stopped in their tracks by a barricade manned by 200 military police officers.

At the barrier, the outspoken head of the Independent Monks' Network for Social Justice, Bun Buntenh, said if the land had been swapped or sold it would equate to a betrayal of the Khmer people.

"We want to see the face of Minister [of Cults and Religion] Min Khin who is betraying our nation," he said, before handing the petition to Mr. Somony.

Mr. Somony reiterated that the fencing that has recently been erected in the institute was to enable electrical work to be carried out by NagaWorld, while the company would rebuild the front gate once an underground road had been completed.

"[The Buddhist Institute] isn't for sale or rental, it isn't like that," he said.

Earlier in the day, Mr. Somony met about 200 Buddhist monks studying at Preah Suramarit Buddhist High School and asked them to stay away from the afternoon's protest and a second march planned for today.

"His Excellency Song Somony addressed 200 monks at 7.40 a.m. and told us not to join the Independent Monks' Network for Social Justice in the protests," said 17-year-old monk Sok Piseth.

"We are concerned about the possible loss of land but the Buddhist Institute is not lost," he said, adding that he believed Mr. Somony's explanation and thought preventing Thursday's march to the site was a fair decision.

"A monk is a person who must follow Buddhist rules," he said.

Another student at the Buddhist training school, 25-year-old Yim Heoun, disagreed.

"The ministry does not have the right to tell monks not to join the protest or to ban them from attending because the monks are worried and only wish to submit a petition seeking an explanation," he said.

"I think they have sold the land."

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសែតអង់គ្លេស អត្ថបទដកស្រង់ និងបកប្រែការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ច័ន្ទ ទី០២ ខែមិថុនា ឆ្នាំ២០១៤

តមកទំព័រទី ១

## កម្មករប្ដេជ្ញាចិត្តតវ៉ាកាន់តែខ្លាំង....

យ៉ាងហោចណាស់មនុស្សប្រាំនាក់ត្រូវបានបាញ់សម្លាប់ និងជាង៤០នាក់ទៀតបានរងរបួសអំឡុងពេលប៉ះទង្គិចគ្នានោះ ដែលលោក វណ្ណី បានបដិសេធថាមិនបានចូលរួម។ លោក វណ្ណី អាយុ៣៨ឆ្នាំ ដែលបានធ្វើការនៅក្នុងវិស័យកាត់ដេរអស់រយៈពេល១០ឆ្នាំបាននិយាយថា "វាអយុត្តិធម៌អ្វីដែលពួកគេបានធ្វើមកលើយើង។ ខ្ញុំនឹងចូលរួមការតវ៉ានៅពេលអនាគតដោយសារតែរឿងដែលបានកើតឡើងចំពោះខ្ញុំ"។

លោក វណ្ណី ស្ថិតក្នុងចំណោមមនុស្ស២៣នាក់ដែលបានជាប់ពន្ធនាគារ និងត្រូវបានចោទប្រកាន់ពីបទបង្ករបួសស្នាមដោយចេតនា និងបំផ្លាញទ្រព្យសម្បត្តិ អំឡុងការតវ៉ាកាលពីខែមករា ដែលធ្វើឡើងស្របពេលនឹងការធ្វើបាតុកម្មដែលដឹកនាំដោយគណបក្សសង្គ្រោះជាតិ។

សាលាដំបូងរាជធានីភ្នំពេញបានប្រកាសសាលក្រមកាលពីថ្ងៃសុក្រ ចោទបុរសទាំង២៣នាក់ ដោយការព្យួរទោស ដើម្បីអនុញ្ញាតឱ្យពួកគេចាកចេញពីតុលាការក្នុងនាមជាមនុស្សមានសេរីភាពជាមួយប្រវត្តិជាប់ទោស។

គាត់បាននិយាយថា មុនពេលចាប់ខ្លួនគាត់ លោក វណ្ណី មិនដឹងថា តើគាត់ជាប់ពាក់ព័ន្ធនឹងសហជីពឬអត់ទេ ។ នៅក្នុងពន្ធនាគារគាត់បានជួបមិត្តរួមទោស គឺលោក វន់ ពៅ ដែលជាមេដឹកនាំសហជីពដ៏ធំមួយ និងជាប្រធានសមាគមអ្នករត់ម៉ូតូឌុប និងអ្នករត់រ៉ឺម៉កម៉ូតូកង់បី។ លោក វណ្ណី បាននិយាយថា "យើងបាននិយាយជាច្រើនដងហើយ ។ គាត់បានបង្ហាញខ្ញុំអំពីភាពអយុត្តិធម៌ទាំងអស់។ គាត់បង្ហាញខ្ញុំថាយើងអាចតស៊ូឡើងវិញ"។

កាលពីម្សិលមិញ លោក វណ្ណី បានចូលរួមជាមួយលោក វន់ ពៅ ជាមួយអតីត អ្នកទោសផ្សេងទៀត និងព្រះសង្ឃដើម្បីនិមន្តលោកសូត្រមន្ត និងបរិភោគអាហារពេលល្ងាចនៅផ្ទះរបស់លោក កឹម សុខា អនុប្រធានគណបក្សសង្គ្រោះជាតិ។

លោក កឹម សុខា ដែលគណបក្សរបស់លោកបាត់មុខគួរឱ្យកត់សម្គាល់ពីការតវ៉ាទាមទារឱ្យមានការដោះលែងអ្នកទោសទាំងនេះបានមានប្រសាសន៍ថា គ្រួសាររបស់លោកជាអ្នករៀបចំពិធីនេះមិនមែនគណបក្សរបស់លោកជាអ្នករៀបចំទេ។

ក្នុងរយៈពេលប៉ុន្មានខែដែលមនុស្សទាំងនេះបានជាប់ពន្ធនាគារលោក កឹម សុខា បានមានប្រសាសន៍ថា គណបក្សសង្គ្រោះជាតិមិនសូវបានចូលរួមតវ៉ាទាមទារឱ្យដោះលែងមនុស្សទាំងនេះទេ ដើម្បីកុំឱ្យគេយកករណីនេះធ្វើនយោបាយទៀត។ រដ្ឋាភិបាលអះអាងថា ការតវ៉ាដោយហិង្សានៅខាងក្រៅរោងចក្រនៅចុងឆ្នាំមុនជាប់ពាក់ព័ន្ធដោយផ្ទាល់ជាមួយការធ្វើបាតុកម្មរបស់គណបក្សសង្គ្រោះជាតិនៅក្នុងទីលានប្រជាធិបតេយ្យ។

លោក កឹម សុខា បានប្រាប់អ្នកយកព័ត៌មានដែលមកជួបជុំគ្នានៅផ្ទះរបស់លោកថា "តាងនាមឱ្យមេដឹកនាំគណបក្សយើងមិនចង់ទៅទេ ពីព្រោះយើងមិនចង់ឱ្យអ្នកផ្សេងចោទយើងថា នៅពីក្រោយបញ្ហានេះ"។

លោក វន់ ពៅ ប្រធានសមាគមប្រជាធិបតេយ្យឯករាជ្យនៃសេដ្ឋកិច្ចក្រៅប្រព័ន្ធបាននិយាយថា ផែនការភ្លាមៗរបស់លោក គឺត្រូវប្ដឹងជំទាស់សាលក្រមប្រឆាំងរូបលោក និងអ្នកតវ៉ាផ្សេងទៀត ព្រមទាំងដាក់ពាក្យបណ្ដឹងជាផ្លូវការប្ដឹងកងរាជអាវុធហត្ថដែលបានបាញ់សម្លាប់មនុស្សយ៉ាងហោចណាស់ប្រាំនាក់។ លោកបាននិយាយថា "យើងប្ដេជ្ញានិងស្បថនៅចំពោះមុខព្រះសង្ឃថា ទោះបីជាយើងបានជាប់ពន្ធនាគារប្រាំខែហើយ ក៏ដោយក៏យើងមិនបាក់ស្មារតីដែរ។ បេសកកម្មរបស់យើងមិនទាន់ចប់ទេ ឱ្យតែនៅមានការរំលោភសិទ្ធិមនុស្សសិទ្ធិកម្មករ និងប្រទេសជាតិនៅតែមិនមានលទ្ធិប្រជាធិបតេយ្យ"។

ផ្ដៅ សារ៉ាត់ អាយុ២៦ឆ្នាំដែលបានជាប់ពន្ធនាគារអស់រយៈពេលប្រាំខែដែរនោះ គឺជាសន្តិសុខនៅកន្លែងកម្សាន្តមួយមុនពេលកងរាជអាវុធហត្ថធាក់ទម្លាយទ្វារគាត់កាលពីថ្ងៃទី៣ ខែមករា។ គាត់ក៏បដិសេធថា មិនបានជាប់ពាក់ព័ន្ធនៅក្នុងការតវ៉ាដែលនាំឱ្យមានការចាប់ខ្លួនគាត់ និងចោទប្រកាន់ពីបទព្រហ្មទណ្ឌនេះទេ។ ប្រពន្ធរបស់លោក សារ៉ាត់ ដែលជាកម្មកររោងចក្រកាត់ដេរបានសម្រាលកូនដំបូងរបស់ពួកគាត់បួនថ្ងៃមុនការចាប់ខ្លួនប្ដីគាត់។ គាត់បាននិយាយថា "ខ្ញុំយំក្នុងពន្ធនាគារជារៀងរាល់ថ្ងៃ ។ ខ្ញុំនឹកប្រពន្ធនិងកូនខ្ញុំ"។

លោក សារ៉ាត់ បាននិយាយថា គាត់ក៏មានបំណងចូលរួមការតវ៉ារបស់កម្មករផងដែរ ជាពិសេសការខំប្រឹងប្រែង ដើម្បីកែលម្អលក្ខខណ្ឌការងារសម្រាប់កម្មករកាត់ដេរ ប្រហែល៦០០.០០០នាក់នៅទូទាំងប្រទេសដែលភាគច្រើនជាស្ត្រីវ័យក្មេងដូចជាប្រពន្ធរបស់គាត់អ៊ីចឹងដែរ ។ លោក សារ៉ាត់ បាននិយាយថា "ខ្ញុំខឹងណាស់។ ខ្ញុំមិនដឹងអីទេ ហើយគេបានចាប់ខ្ញុំដាក់ពន្ធនាគារ។ ចាប់ពីពេលនេះទៅ ប្រសិនបើមានការតវ៉ាណាមួយខ្ញុំនឹងចូលរួម។ ចៅកែខ្ញុំដឹងថា ខ្ញុំមិនខុសទេ ហើយបាននិយាយថា ខ្ញុំនឹងទទួលបានការងារខ្ញុំធ្វើវិញ។ ប៉ុន្តែខ្ញុំនឹងមិនទទួលបានប្រាក់ប្រាំខែនោះមកវិញទេ"៕ **គឹម ហឿន**

## Convicts Emerge From Prison With Activist Zeal

**By Mech Dara and Alex Consiglio | June 2, 2014**

Pang Vanny says that before this year, he never thought of joining protests or fighting for labor rights.

Five months in prison changed that.

Mr. Vanny was arrested on January 3, when military police cracked down a violent demonstration on Veng Sreng Street—part of nationwide garment worker protests demanding a minimum monthly wage of $160.

Labor leader Vorn Pao, center left, and CNRP leader Kem Sokha, center right, take part in a traditional Buddhist ceremony Sunday at Mr. Sokha's Phnom Penh residence. (Alex Consiglio/The Cambodia Daily)

At least five people were shot dead and more than 40 were injured during the clash, both of which Mr. Vanny denies taking part in.

"It is an injustice what they did to us," said Mr. Vanny, a soft-spoken 38-year-old who has been working in the garment sector for 10 years. "I will join future protests because of what happened to me."

Mr. Vanny was among 23 men who were locked up in prison and charged with intentional violence and property damage during the January protests, which dovetailed with demonstrations being led by the opposition CNRP.

The Phnom Penh Municipal Court handed down a verdict on Friday, convicting all 23 men with suspended sentences, allowing them to leave the court as free men with criminal records.

Before his arrest, Mr. Vanny didn't even know if he was part of a union, he said. In prison, he met fellow inmate Vorn Pao, a prominent labor leader and president of an association of mostly motorbike and tuk-tuk drivers.

"We spoke many times," said Mr. Vanny. "He showed me the injustice of it all. He showed me we can fight back."

On Sunday, Mr. Vanny joined Mr. Pao, with other former inmates and monks, for a Buddhist ceremony and dinner at the Phnom Penh home of Kem Sokha, vice president of the CNRP.

Mr. Sokha, whose party was noticeably absent from protests demanding the prisoners' release, said his family, and not his party, organized the event.

During the months the men spent in prison, Mr. Sokha said the CNRP kept a low profile in efforts to free the men so that the case would not be further politicized. The government claimed that the violent protests outside factories around the end of last year were directly linked to demonstrations being led by the CNRP in Freedom Park.

"On behalf of the leader, we did not go because we do not want others to accuse us of being behind the issue," Mr. Sokha told reporters gathered at his house.

Mr. Pao, president of the Independent Democracy of Informal Economic Association, said his immediate plans are to appeal the convictions against him and other protesters and file a formal complaint against the military police that killed at least five workers.

"We commit and swear in front of monks that although we have been imprisoned for five months it will not break our spirit," he said during the ceremony. "Our mission…has not finished as long as there are violations of human rights, workers' rights and the country still does not move toward democracy."

Baor Sarath, 26, who also spent the past five months in prison, was a security guard at a disco before his door was kicked down by military police on January 3. He also denies any involvement in the protests that led to his imprisonment and criminal conviction.

Mr. Sarath's wife, a garment worker, had given birth to their first child four days before his arrest.

"I was crying everyday in prison," he said. "I missed my wife and child."

Mr. Sarath said he also plans to become active in the country's labor movement, particularly in efforts to improve working conditions for the country's 600,000 garment workers, mostly young women, like his wife.

"I feel very, very angry. I was innocent and they put me in jail. From now on, if there are any protests, I will join," Mr. Sarath said.

"My bosses know that I'm innocent and said they'll give me my job back," he added. "But I won't get those five months back."

dara@cambodiadaily.com,
consiglio@cambodiadaily.com

### ដំណឹងមរណភាពភរិយា ប៊ុនរិទ្ធ សាត

អ្នកស្រី យីសុគន្ធា ភរិយាលោក ប៊ុនរិទ្ធ សាត បានទទួលមរណភាពដោយសារជម្ងឺមហារីកក្នុងជន្មាយុ៣២ឆ្នាំ។ ពិធីបុណ្យសពរបស់អ្នកស្រីនឹងប្រព្រឹត្តទៅនៅ Funeral Home ដែលមានទីតាំងលើផ្លូវ Middlesex ក្បែរវត្តត្រៃរតនារាម។ ថ្ងៃអាទិត្យ ទី១៥ ខែមិថុនា ឆ្នាំ ២០១៤ ម៉ោង ៩ព្រឹកនឹងជួបជុំនៅ Funeral Home ម៉ោងពារសៀល រំកិលសពចេញពី Funeral Home ទៅកាន់វត្តខ្មែរ (ឈ្មោះវត្តនឹងប្រកាសនៅពេលក្រោយ)។

សារព័ត៌មានខ្មែរផុសសូមចូលរួមរំលែកមរណៈទុក្ខនៃដំណឹងក្រៀមក្រំខាងលើ។

# រំលឹកពីការបាត់បង់ទឹកដីកម្ពុជាក្រោម


លឹម គិមយ៉ា

កាលព្រឹកថ្ងៃទី២ មិថុនាអាជ្ញាធរសាលារាជធានីភ្នំពេញមិនអនុញ្ញាតឱ្យអង្គការសមាគមខ្មែរកម្ពុជាក្រោមរៀបចំធ្វើវេទិកាសាធារណៈរំលឹកពីការបាត់បង់ទឹកដីកម្ពុជាក្រោមខួបលើកទី៦៥ជាដាច់ខាតតែអនុញ្ញាតិត្រឹមតែពិធីរាប់បាត្រព្រះសង្ឃជិត ២ពាន់អង្គនៅវត្តសាមគ្គីរង្សី នៅថ្ងៃទី៤ មិថុនា ដើម្បីរំលឹកខួបបាត់បង់ទឹកដីកម្ពុជាក្រោម។

អ្នកនាំពាក្យសាលារាជធានីភ្នំពេញលោក ឡុងឌីម៉ង់ បានប្រកាសថា : វេទិកាសាធារណៈប្រធានបទខ្មែរកម្ពុជាក្រោមបើយើងគ្រប់គ្រងមិនបានត្រឹមត្រូវទេ នោះអ្នករៀបចំគាត់អាចឈានទៅជាវេទិកាមួយអុចអាលញុះញង់ធ្វើឱ្យមានការស្អប់ខ្ពើមប្រទេសជិតខាងវាខុសនឹងរដ្ឋធម្មនុញ្ញដូចសម្តេចតេជោនាយករដ្ឋមន្ត្រីមានប្រសាសន៍អ៊ីចឹងថាប្រទេសកម្ពុជាមិនអាចក្លាយជាប្រទេសមួយប្រឆាំងនឹងប្រទេសជិតខាងឬប្រទេសណាផ្សេងបានទេ។

តែកាលពីថ្ងៃទី៣០ ខែឧសភាអ្នកនាំពាក្យសាលារាជធានីភ្នំពេញដដែលនេះឱ្យដឹងថាអាជ្ញាធររាជធានីភ្នំពេញមិនអាចអនុញ្ញាតឱ្យអង្គការសមាគមខ្មែរកម្ពុជាក្រោមប្រារព្ធពិធីបុណ្យបាត់បង់ទឹកដីនៅវត្តសាមគ្គីរង្សីបានឡើយដោយលោកអះអាងថាសព្វថ្ងៃវត្តនេះកំពុងមានប្រជាពលរដ្ឋទាមទារដីធ្លីមកពីខេត្តក្រចេះកំពុងស្នាក់នៅ ។ ដោយថា: យើងបានសម្រេចថា យើងនឹងមិនអនុញ្ញាតឱ្យធ្វើការជួបជុំគ្នាធ្វើនៅវត្តសាមគ្គីរង្សីហ្នឹងទេដោយសារមកពីយើងបានដឹងស្រាប់ហើយថា រាល់ថ្ងៃនេះនៅវត្តសាមគ្គីរង្សីកំពុងតែមានបញ្ហាខ្លះដោយសារតែមានបងប្អូនប្រជាពលរដ្ឋមកពីខេត្តក្រចេះគាត់កំពុងស្នាក់នៅហ្នឹងទាមទាអីណារបស់គាត់ហ្នឹងអ៊ីចឹងទេ យើងមិនអនុញ្ញាតឱ្យធ្វើស្ទើជាន់គ្នាដូចអ៊ីចឹងទេ។

យើងឃើញថា លេសដែលអ្នកនាំពាក្យសាលារាជធានីភ្នំពេញលើកយកមកដើម្បីទប់ស្កាត់កុំឱ្យអង្គការសមាគមខ្មែរកម្ពុជាក្រោមរៀបចំប្រារព្ធខួបលើកទី៦៥ថ្ងៃបាត់បង់ទឹកដីកម្ពុជាក្រោមគឺខុសគ្នាស្រឡះ។ ដោយគ្មានពឹងផ្អែកទៅលើច្បាប់អ្វីសោះគឺពឹងផ្អែកទៅលើសំដី ហ៊ុន សែន តែប៉ុណ្ណោះនេះបានសេចក្តីថា សាលារាជធានីភ្នំពេញអនុវត្តរបបផ្តាច់ការមិនឱ្យខ្មែរបញ្ចេញមតិគ្រប់បែបយ៉ាងដូចជាការជួបជុំគ្នាការហែរបាតុកម្មគង់តែការជួបជុំគ្នានៅក្រៅពីលានប្រជាធិបតេយ្យក៏ដោយក៏វាបញ្ជាកងកំលាំងខុសច្បាប់វាឱ្យមកដេញវាយបំបែកការជួបជុំនេះដែរ ។

ការដែលក្រុមផ្តាច់ការធ្វើយ៉ាងនេះដើម្បីផ្គាប់ចិត្តយួនដែលវាបានបន្ទុបឱ្យកាន់អំណាច។ គង់តែយួនមិនអាចធ្វើអ្វីប្រឆាំងនឹងពួកវាក៏ដោយពី




ព្រោះរដ្ឋអំណាចខ្មែរបូរណភាពនយោបាយ និងទឹកដីខ្មែរត្រូវបានការពារដោយសន្ធិសញ្ញាទីក្រុងប៉ារីសកាលពីថ្ងៃទី២៣ តុលា១៩៩១។ ក៏ប៉ុន្តែពួកអស់នេះវាថោកពេកគង់តែអន្តរជាតិគេការពារខ្មែរយ៉ាងណាក៏ដោយក៏ពួកវាលើកប្រទេសខ្មែរទៅឱ្យយួនដែរ។ លើសពីនេះក្រុមផ្តាច់ការបានរំលោភរដ្ឋធម្មនុញ្ញដែលការពារសិទ្ធិប្រជាពលរដ្ឋក្នុងការជួបជុំគ្នានិងបញ្ចេញមតិ ។ មិនត្រឹមតែប៉ុណ្ណោះទេ ក្រុមផ្តាច់ការនេះរំលោភលើទ្រព្យសម្បត្តិឯកជនប្រជាពលរដ្ឋដោយដុតផ្ទះដេញប្រជាពលរដ្ឋចេញពីលំនៅឋានដែលតាមច្បាប់អន្តរជាតិ គឺពួកអស់នេះប្រព្រិត្តបទឧក្រិដ្ឋប្រឆាំងមនុស្សលោក ។ ថែមទៅទៀតវាចាប់បញ្ជូនប្រជាពលរដ្ឋខ្មែរដែលមានដើមកំណើតជាខ្មែរក្រោមទៅស្រុកយួន បើអាជ្ញាធរយួនវាស្នើរគង់តែបុគ្គលនេះមិនបានប្រព្រឹត្តអំពើអ្វីខុសច្បាប់ក៏ដោយ ។ ដូចជាលោកសង្ឃ ទិន សាខន ពួកវាចាប់ផ្សឹកហើយបញ្ជូនឱ្យយួនយកទៅដាក់គុកដោយកុហកថា លោកសង្ឃនេះទាមទារទៅស្រុកកំណើតវិញគង់តែដឹងថា យួននឹងដាក់គុកក៏ដោយ ។ ដែលនៅពេលនោះប៉ូលិសខ្មែរដឹកលោកសង្ឃ ទិន សាខន យកទៅឱ្យប៉ូលិសយួនយកទៅឃុំ ។ ប្រជាពលរដ្ឋខ្មែរដែលមានដើមកំណើតជាខ្មែរក្រោមនៅស្រុកខ្មែរតែងតែទទួលសំពៀតពីអាជ្ញាធរខ្មែរជាញឹកញាប់ ។ ដូចជាពួកវាវាយកំចាត់លោកសង្ឃខ្មែរក្រោមនៅពេលធ្វើបាតុកម្មទាមទារសិទ្ធិឱ្យពុទ្ធសាសនាខ្មែរនៅកម្ពុជាក្រោម។

ក្រុមផ្តាច់ការថោកទាបអស់នេះមិនត្រឹមតែរំលោភរដ្ឋធម្មនុញ្ញនោះទេ ពួកវាបានទាំងក្លែងប្រវត្តិសាស្ត្រជាតិដែលយួនមកជិះជាន់រំលោភប្រទេសខ្មែរធ្វើបាបប្រជាពលរដ្ឋខ្មែរបែជាពួកវានាំគ្នាស្រែកអរគុណយួនទៅវិញ ហើយថែមទាំងពួកវាចោទពួកអ្នកជាតិនិយមដែលរំលឹកប្រវត្តិសាស្ត្រដ៏ជូរជត់នេះឱ្យប្រជាពលរដ្ឋប្រុងប្រយ័ត្នថាជាពួកប្រកាន់ពូជសាសន៍ទៅវិញ។

តទៅទំព័រទី ១៦

ពលកម្មពិភពលោក

# ស្ថានភាពការងារយ៉ាប់យ៉ឺនមិនថាតែក្នុងអាស៊ីអាគ្នេយ៍ គឺជុំវិញពិភពលោក

**របាយតម្លៃចំពោះស្ថានភាពការងារ១៣៩ប្រទេសផ្អែកលើឯកសារស្រាវជ្រាវនៃកម្រងសហជីពពាណិជ្ជកម្មអន្តរជាតិ (The International Trade Union Confederation's Global Rights)**

**ដោយ : សុខា**





បច្ចុប្បន្នការងារពិបាករក ហើយតម្លៃពលកម្មការងារស្តួចស្តើងមិនគ្រប់គ្រាន់ ហើយមិនអាចឆ្លើយតបនឹងការចំណាយធ្វើឱ្យប្រជាជនធ្វើការលើសម៉ោង ឬមានការងារពីរ ឬបីក្នុងពេលតែមួយ ឬផ្លាស់ប្តូរការងារជាប្រចាំ ។ ស្ថានភាពបែបនេះកើតឡើងមិនថាតែនៅកម្ពុជាឡើយ ។ ការសិក្សាទៅលើស្ថានភាពការងារដែលកម្មករ ឬនិយោជិតបំពេញនៅតាមរោងចក្រ និងក្រុមហ៊ុននានាក្នុង១៣៩ប្រទេសផ្អែកទៅលើសូចនាករណ៍ចំនួន៩៧ចំណុច បានបង្ហាញឱ្យឃើញនូវប្រទេសទាំង១៣៩ នូវលក្ខខណ្ឌការងារយ៉ាប់






យ៉ឺនបំផុតដែលកំណត់ដោយលេខ៥ និងលក្ខខណ្ឌការងារល្អប្រសើរបំផុតកំណត់ដោយលេខ១ ។

ក្នុងរបាយវាយតម្លៃចំពោះស្ថានភាពការងារ១៣៩ប្រទេសផ្អែកលើឯកសារស្រាវជ្រាវនៃកម្រងសហជីពពាណិជ្ជកម្មអន្តរជាតិ (The International Trade Union Confederation's Global Rights) បានឱ្យដឹងថា ប្រទេសកម្ពុជាចប់ចំណាត់ថ្នាក់លេខ៥ជាប្រទេសដែលមានស្ថានភាពការងារយ៉ាប់យ៉ឺនបំផុត ហើយប្រទេសដែលមានចំណាត់ថ្នាក់ដូចប្រទេសកម្ពុជាមាន ឡាវ ហ្វីលីពីន និងម៉ាលេស៊ី ។

ឯប្រទេសថៃដែលនៅក្បែរខាងភូមិផង របងជាមួយប្រទេសកម្ពុជា ក៏មានស្ថានភាពការងារមិនល្អប្រសើរប៉ុន្មានឡើយ មិនដល់ថ្នាក់យ៉ាប់យ៉ឺនបំផុត តែក៏នៅក្នុងកម្រិតមួយមិនប្រសើរឡើយ ពោលគឺលេខ៤។ ប្រទេសក្នុងតំបន់អាស៊ីអាគ្នេយ៍ដែលមានស្ថានភាពការងារមិនល្អប្រហាក់ប្រហែលនឹងប្រទេសថៃរួមមានប្រទេសឥណ្ឌូណេស៊ី និងប្រទេសភូមា។

តែដែលគួរឱ្យចាប់អារម្មណ៍ខ្លាំងនោះ គឺអាមេរិកក៏ត្រូវបានវាយតម្លៃថា ជាប្រទេសមានស្ថានភាពការងារក្នុងចំណាត់ថ្នាក់លេខ៤ ពោលគឺមិនវិជ្ជមានឡើយ គឺដូចជាករណីប្រទេសថៃ ប្រទេសភូមា និងឥណ្ឌូនេស៊ីដែរ ។

និយាយដល់ស្ថានភាពយ៉ាប់យ៉ឺននៃការងារមានចំណុចសំខាន់១ដែលត្រដមត្រសងនឹងបញ្ហានេះ គឺបញ្ហាសិទ្ធមនុស្សពលកម្មការងារច្បាប់ការងារ និងការធ្វើបាតុកម្មពីសំណាក់កម្មករ ឬសហជីពតទល់នឹងក្រុមហ៊ុន **តទៅទំព័រទី១៦**

## តមកពីទំព័រទី ១២ កងរាជអាវុធហត្ថរារាំងព្រះសង្ឃមិនឱ្យ...

បណ្ឌិតទៅជាកន្លែងចតយានយន្តរបស់កាស៊ីណូនិងសណ្ឋាគារ។

ដោយគ្មានការជឿជាក់ កាលពីម្សិលមិញ ក្រុមអ្នកតវ៉ាបានហែក្បួនតាមតីរវិថីព្រះស៊ីសុវត្ថិ ឆ្ពោះទៅវិទ្យាស្ថានពុទ្ធសាសនបណ្ឌិតស្ថិតក្នុងសង្កាត់ទន្លេបាសាក់ខណ្ឌចំការមនដើម្បីដាក់ញត្តិស្នើសុំឱ្យមានការធានាថា ដីនេះពិតជាត្រូវបានការពារ។ ប៉ុន្តែអ្នកតវ៉ាទាំងនោះត្រូវបានរារាំងមិនឱ្យបន្តដំណើររបស់ខ្លួនដោយសារមន្ត្រីកងរាជអាវុធហត្ថចំនួន២០០នាក់បានដាក់របាំងបិទផ្លូវ។

នៅកន្លែងដាក់របាំងនោះ ព្រះតេជគុណ ប៊ុត ប៊ុនទិញ ប្រធានបណ្តាញព្រះសង្ឃឯករាជ្យដើម្បីយុត្តិធម៌សង្គមដែលឥតសំចៃមាត់បានមានសង្ឃដីកាថា ប្រសិនបើដីនេះត្រូវបានដោះដូរ ឬលក់មែននោះ វាស្មើនឹងការក្បត់ប្រជាជនខ្មែរ។ ព្រះតេជគុណបានមានសង្ឃដីកាមុនពេលប្រគល់ញត្តិទៅលោក សេង សុមុនី ថា "យើងចង់ឃើញមុខលោក មិន ឃិន រដ្ឋមន្ត្រីក្រសួងធម្មការ និងសាសនាដែលក្បត់ជាតិយើង"។

លោក សេង សុមុនី បានបញ្ជាក់ឡើងវិញថា ការសង់របងក្នុងពេលថ្មីៗនេះនៅក្នុងដីវិទ្យាស្ថានពុទ្ធសាសនបណ្ឌិតនោះ គឺដើម្បីរៀបចំបណ្តាញអគ្គិសនីរបស់កាស៊ីណូណាហ្គាវើលប៉ុណ្ណោះ ហើយក្រុមហ៊ុននេះនឹងធានាសាងសង់ខ្លោងទ្វារមុខនេះឡើងវិញនៅពេលស្ពានផ្លូវក្រោមដីរួចរាល់។ លោកបានមានប្រសាសន៍ថា "ឱ្យវិទ្យាស្ថានពុទ្ធសាសនបណ្ឌិតមិនមែនសម្រាប់លក់ឬជួលឡើយ។ វាមិនដូចការចោទប្រកាន់ទេ"។

វេលាព្រឹកថ្ងៃនោះ លោក សេង សុមុនី បានមកជួបសមណសិស្សប្រហែល២០០អង្គដែលបានសិក្សានៅពុទ្ធិកវិទ្យាល័យព្រះសុរាម្រឹត ហើយបានសុំកុំឱ្យព្រះសង្ឃនិមន្តចូលរួមការតវ៉ានៅពេលរសៀលនិងការហែក្បួនលើកទី២ដែលគ្រោងធ្វើនៅថ្ងៃនេះ។

ព្រះតេជគុណ សុខ ពិសិដ្ឋ ព្រះជន្ម១៧ វស្សា បានមានសង្ឃដីកាថា "ឯកឧត្តម សេង សុមុនី បាននិយាយទៅកាន់ព្រះសង្ឃ២០០អង្គនៅម៉ោង៧ និង៤០នាទីព្រឹក ហើយបានទូលកុំឱ្យទៅចូលរួមការតវ៉ារបស់បណ្តាញព្រះសង្ឃឯករាជ្យដើម្បីយុត្តិធម៌សង្គម"។

ព្រះតេជគុណបានមានសង្ឃដីកាថា "យើងបារម្ភពីការដែលអាចបាត់បង់ដីនោះ ប៉ុន្តែវិទ្យាស្ថានពុទ្ធសាសនបណ្ឌិត្យមិនបានបាត់បង់ទេ"។ ព្រះអង្គបន្ថែមថា ព្រះអង្គជឿលើការពន្យល់របស់លោក សេង សុមុនី ហើយគិតថា ការរារាំងការហែក្បួនកាលពីម្សិលមិញមិនឱ្យទៅកាន់កន្លែងនោះគឺជាការសម្រេចចិត្តត្រឹមត្រូវ។ ព្រះតេជគុណបានមានសង្ឃដីកាថា "ព្រះសង្ឃគឺជាអ្នកដែលត្រូវប្រព្រឹត្តតាមធម៌វិន័យព្រះពុទ្ធ"។

ព្រះតេជគុណ យឹម ហឿន ព្រះជន្ម២៥ វស្សាជាសមណសិស្សមួយអង្គទៀតមិនយល់ស្របដូច្នេះឡើយ។ ព្រះអង្គមានសង្ឃដីកាថា "ក្រសួងគ្មានសិទ្ធិទូលព្រះសង្ឃមិនឱ្យនិមន្តចូលរួមការតវ៉ា ឬហាមឃាត់ព្រះសង្ឃមិនឱ្យនិមន្តចូលរួមឡើយ ពីព្រោះព្រះសង្ឃមានការបារម្ភ ហើយគ្រាន់តែចង់ដាក់ញត្តិដើម្បីសុំការពន្យល់តែប៉ុណ្ណោះ។ អាត្មាគិតថា ពួកគេបានលក់ដីនេះហើយ"៕ **សារុន**

## តមកពីទំព័រទី ១៤ រំលឹកពីការបាត់បង់ទឹកដីកម្ពុជាក្រោម

បើប្រសិនណាជាពួកវាកាន់អំណាចតែ២អាណត្តិទៀត ប្រទេសខ្មែរសព្វថ្ងៃយួននឹងយកដូចកម្ពុជាក្រោម។ តែពួកវានឹងធ្លាក់ពីអំណាចពិតបាក្រដគឺចាំតែពេលតែប៉ុណ្ណោះទេ។ ក្រុមផ្តាច់ការអស់នេះធ្វើអំពើហិង្សា និងបទឧក្រិដ្ឋយ៉ាងនេះនឹកស្មានតែស្របតាមច្បាប់ ឬមួយពួកវាមិនគិតពីផលពិបាកទៅអនាគតនៅពេលដែលពួកវាធ្លាក់ពីអំណាចនោះទេឬ?។ ចំពោះពួកហ៊ុនសែនហេងសំរិនជាស៊ិមវាដឹងដែរបានជាវាស្នើថាបើវាចុះចេញពីអំណាចសុំធ្វើច្បាប់មួយលើកលែងទោសឱ្យពួកវា ។ វាស្នើយ៉ាងនេះមែនតែពួកវានៅតែបញ្ជាឱ្យមានអំពើហិង្សា និងបទឧក្រិដ្ឋតទៅទៀតដូចជាបាញ់សំលាប់ប្រជាពលរដ្ឋនិងចាប់ប្រជាពលរដ្ឋដាក់គុកដោយគ្មានកំហុសអ្វី ។

គណបក្សសង្គ្រោះជាតិតែងតែប្រកាសថាមិនប្រើអំពើហិង្សាទេក៏ប៉ុន្តែគណបក្សសង្គ្រោះជាតិនឹងអនុវត្តច្បាប់ដែលមានចំពោះជនណាដែលបានប្រព្រឹត្តអំពើហិង្សាគង់តែទទួលបញ្ជាពីណាក៏ដោយ ។ កុំយកលេសថាគេបញ្ជាខ្លួនចេះតែអនុវត្តនោះ ។ បុគ្គលិកអាជ្ញាធរទាំងអស់ត្រូវតែមានខួរក្បាលគិតថា តើបញ្ជានេះត្រូវតាមសីលធម៌ ឬអត់ ។ បើខុសពីសិលធម៌បុគ្គលិកអាជ្ញាធរទាំងអស់មិនត្រូវធ្វើតាមបញ្ជាទេ បើនៅតែធ្វើតាមបញ្ជាអស់នេះបុគ្គលនោះនឹងទទួលទោសទៅតាមអំពើរបស់ខ្លួន។

**លិម គិមយ៉ា**

*បេក្ខជនតំណាងរាស្ត្រជាប់ឆ្នោតគណបក្សសង្គ្រោះជាតិនៅខេត្តកំពង់ធំ*

## តមកពីទំព័រទី ១៥ ស្ថានភាពការងារយ៉ាប់យឺន...

ឬរោងចក្រ ដើម្បីទាមទារតម្លៃតបស្នងសមរម្យទៅលើកម្លាំងពលកម្មដែលគេខិតខំចំណាយទៅនឹងប្រាក់ខែដែលគួរទទួលបានតាមស្តង់ដារការងារ។ តែជារឿយៗបញ្ហានេះ ក្នុងលក្ខខណ្ឌប្រទេសខាងលើទទួលបានលទ្ធផលមិនគាប់ប្រសើរឡើយ ដែលអាចឱ្យអ្នកវិភាគវាយតម្លៃថា ស្ថានភាពសិទ្ធមនុស្សតម្លៃតបស្នងការងារច្បាប់ការងារ និងច្បាប់ពាក់ព័ន្ធនានានៅមានកម្រិត។ ជាក់ស្តែងក្នុងករណីនៃប្រទេសកម្ពុជា នាពេលថ្មីៗនេះ នៅដើមខែមករា ឆ្នាំ២០១៤ ខណៈដែលកម្មកររោងចក្ររាប់ពាន់នាក់ងើបឡើងធ្វើបាតុកម្មនៅទីក្រុងភ្នំពេញ ដើម្បីទាមទារតម្លើងប្រាក់ខែគោលពី៨០ដុល្លារក្នុង១ខែទៅ១៦០ដុល្លារក្នុង១ខែកម្មករទាំងនេះ ត្រូវបានទទួលប្រតិកម្មហឹង្សាពីខាងអាវុធហត្ថនៃប្រទេសក្នុងនោះមាន៥នាក់ត្រូវស្លាប់ក្នុងហេតុការណ៍នោះ។

យ៉ាងណាមិញនៅអាស៊ីប្រភពដដែលធ្វើការចង្អុលបង្ហាញថា ប្រទេសជប៉ុនជាប់ចំណាត់លេខ២ដែលបង្ហាញថា ស្ថានភាពពលកម្មការងារនៃប្រទេសនេះមានភាពល្អប្រសើរ ហើយប្រទេសដែលមានចំណាត់ថ្នាក់ល្អដូចគ្នាទៅនឹងប្រទេសជប៉ុនគឺ ដិនម៉ាក និងណរវេយ។

ទោះជាយ៉ាងណាក៏ដោយលេខ៥ និងលេខ ១ ជាតួលេខដែលត្រូវបានកំណត់ខាងលើនៅមានប្រទេសដែលស្ថិតក្នុងចំណាត់ថ្នាក់លើសលេខ៥ គឺស្ថានភាពការងារយ៉ាប់ខ្លាំងក្នុងនោះមានប្រទេសសូម៉ាលីបញ្ជាក់ពីភាពទន់ខ្សោយនៃនីតិភាពសិទ្ធមនុស្ស ។ល។

ប្រភពអត្ថបទពីសារព័ត៌មាន វ៉លស្ទ្រីត (May 26, 2014, The Wall Street Journal) និង គេហទំព័ររបស់ប្លក់ជី ដាហ្វ (Ho Chi Minh City, Bangkok, and beyond)



តមកពីទំព័រទី ១

# វិទ្យាល័យឡូវែលចែកសញ្ញាប័ត្រ...






បញ្ចប់មធ្យមសិក្សាទុតិយម ពោលគឺមុនពេលសិស្សានុសិស្សឈានជើងមួយជំនាក់ទៀតទៅកាន់មហាវិទ្យាល័យ ឬសាកលវិទ្យាល័យដែលជាថ្នាក់ឧត្តមសិក្សានោះ បានប្រព្រឹត្តនៅមជ្ឈមណ្ឌលសុងហ្គាសចំកណ្ដាលក្រុងឡូ-វែល។ កម្មវិធីនេះចាប់ផ្ដើមនៅម៉ោង៦ល្ងាចដោយមានការចូលរួមជាអធិបតីពីលោកប្រធាននាយកសាលាឡូវែល ប្រាយអិន ម៉ាទីន (Headmaster Brian Martin, Lowell High School) ទន្ទឹមនឹងវត្តមានរបស់អភិបាលក្រុង រ៉ដនី អេលៀត (Mayor Rodney Elliot, City of Lowell) ព្រម ទាំងសាកលវិទ្យាធិការនៃសាកល វិទ្យាល័យយូម៉ាស លោក ម៉ារទីន មីហាន(Chancellor Marty Meehan, University of Massachusetts Lowell)។

ក្នុងចំណោមមហាជនដ៏ច្រើនកុះករនៃកម្មវិធីចែកសញ្ញាប័ត្រខាងលើប្រជាជនខ្មែរដែលបានមករស់នៅសហរដ្ឋអាមេរិក និងមានទីលំនៅជុំវិញ និងក្នុងក្រុងឡូវែលបានមកចូលរួមអបអរសាទរក្រុមគ្រួសារ កូន ចៅ ដែលបញ្ចប់ការសិក្សាពីវិទ្យល័យនេះ។

មុនកម្មវិធីចាប់ផ្ដើមប្រហែលមួយម៉ោង ទាំងក្នុងនិងក្រៅមជ្ឈមណ្ឌលសុងហ្គាសមានភាពអ៊ូរអរមានមនុស្សព្រោងព្រាតតម្រង់ចូលសហសាលដ៏ធំនេះ។ ពួកគេស្លៀកពាក់ស្អាតបាត ខ្លះកាន់ដៃក្មេងតូចៗ ត្រូវជាកូន ឬចៅដែលមានបំណងចង់មកសាទរនឹងគេ ខ្លះទៀតកាន់បាច់ផ្កាតុក្កតាកាដូអនុស្សាវរីយ៍សម្រាប់ជូនទៅដល់អ្នកទទួលសញ្ញាប័ត្រ។ ជាមួយគ្នានោះដែរ ក្រុមសិស្សសាលាយោធាដែលស្លៀកឯកសណ្ឋានពណ៌ខៀវឈរជាជួរប្រកបដោយរបៀបរៀបរយត្រៀមខ្លួនសាទរដល់សិស្សទាំងអស់ដែលត្រៀមដើរចូលក្នុងសហសាលពេលកម្មវិធីចាប់ផ្ដើម។

ចម្រៀងភ្លេងជាតិអាមេរិកបានពញាក់ស្មារតីនៃអង្គពិធីទាំងមូលឱ្យក្រោកឈរឡើង។ បន្ទាប់ពីសម្រួលឥរិយាបថរបៀបវារៈនៃកម្មវិធីមានចាប់ផ្ដើម និងប្រព្រឹត្តទៅជាហូរហែរួមមានប្រសាសន៍ដែលផ្ដល់ដោយលោកប្រធាននាយកសាលាឡូវែល ប្រាយអិន ម៉ារទីន (Headmaster Brian Martin, Lowell High School) ទន្ទឹមនឹងវត្តមានរបស់អភិបាលក្រុង រ៉ដនី អេលៀត (Mayor Rodney Elliot, City of Lowell) ព្រមទាំងសាកលវិទ្យាធិការនៃសាកលវិទ្យាល័យយូម៉ាស លោក ម៉ារទីន មីហាន (Chancellor Marty Meehan, University of Massachusetts Lowell) មតិថ្លែងអំណរគុណពីតំណាងសិស្សពីររូបរួមមានសិស្សអ៊ីប្រាហ៊ីម នីហ្សាមី (Ibrahim Nizami) និងសិស្សថូម៉ាស ស្គីនណឺ (Thomas Skinner)។


នាយកសាលាប្រាយអិន ម៉ាទីន

អ៊ីប្រាហ៊ីម នីហ្សាមី (Ibrahim Nizami) បានលើកឡើងនៅចំណុចមួយគួរឱ្យចាប់អារម្មណ៍ខណៈដែលគេមានមតិថ្លែងអំណរគុណ។ គេលើកឡើងពីពាក្យមួយ "Unknown" មានសេចក្ដីថា សេចក្ដី ដែលអ្នកមិន ដឹង។ ទាក់ទិននឹងពាក្យនេះគេបានលើកទឹកចិត្តឱ្យសិស្សជំនាន់ដែលបញ្ចប់ការសិក្សាក្នុងឆ្នាំជាមួយគ្នានោះ សូមកុំខ្លាចភាពមិនដឹង ព្រោះអនាគតការតស៊ូការស្វែងរកគោលដៅ គឺផ្ដើមចេញពីចំណុចដែលអ្នកមិនដឹង ហើយពេលដែលអ្នកស្វែងរកនូវភាពមិនដឹងនោះដល់ពេលមួយគោលដៅការចង់ដឹងរបស់អ្នកនឹងអាចរកនូវចម្លើយឃើញ។

ជាមួយគ្នាអង្គពិធីក៏ធ្វើការផ្ដល់កិត្តិយសដល់សិស្សឆ្នើមទាំង៦នាក់នៃវិទ្យាល័យឡូវែលដែលអង្គុយនៅលើវេទិការួមនឹងភ្ញៀវកិត្តិយសសំខាន់ៗ។ សិស្សឆ្នើមទាំង៦នាក់នោះរួមមាន ថូម៉ាស ស្គីនណឺ (Thomas Skinner) អ៊ីប្រាហ៊ីម នីហ្សាមី (Ibrahim Nizami) ចាស់ស្ទីន ង្វៀន (Justin Nguyen) ខាស៊ី ថាំងហ្គារីហ្វ (Kathy Tangarife) ផល្លីណា ព្រាប (Paulina Preap) និង ជីលៀន ភីធីស្សល (Jillian Pattershall)។

តទៅទំព័រទី ១៩






ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសែតអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ច័ន្ទ ទី០២ ខែមិថុនា ឆ្នាំ២០១៤

# បន្ទាប់ពីការលាលែងពីតំណែងរបស់លោកស្រី ម៉ម សូម៉ាលី អង្គការក្រៅរដ្ឋាភិបាលព្រួយបារម្ភអំពីអនាគត

**ដោយ : ឃី សុវុទ្ធី and ល័រិន គ្រុធឺរ ।**

**June 5, 2014**

នៅពេលរឿងរ៉ាវបានស្ងប់បន្ទាប់ពីលោកស្រី ម៉ម សូម៉ាលី លាលែងពីតំណែងជាប្រធាននៃមូលនិធិសង្គ្រោះស្ត្រីរងគ្រោះកាលពីសប្តាហ៍មុនអង្គការប្រឆាំងការជួញដូរមនុស្សកំពុងព្រួយបារម្ភខ្លាចក្រែងរឿងអាស្រូវរបស់លោកស្រីអាចជះឥទ្ធិពលដល់កេរ្តិ៍ឈ្មោះរបស់អង្គការក្រៅរដ្ឋាភិបាលនៅក្នុងវិស័យប្រឆាំងការជួញដូរមនុស្សនេះ។

ការលាលែងពីតំណែងរបស់លោកស្រី ម៉ម សូម៉ាលី បានកើតឡើងបន្ទាប់ពីអត្ថបទមួយនៅក្នុងទស្សនាវដ្តីញូវស៊ីក (Newsweek) បានទម្លាយការភូតកុហកទាក់ទិននឹងប្រវត្តិផ្ទាល់ខ្លួនរបស់លោកស្រី ម៉ម សូមាលី ក៏ដូចជាប្រវត្តិរបស់ស្ត្រីវ័យក្មេងដែលមូលនិធិរបស់លោកស្រីបានជួយសង្គ្រោះផងដែរ។ មុនពេលទស្សនាវដ្តីញូវស៊ីកបានចេញផ្សាយអត្ថបទដែលសរសេរដោយលោក Simon Marks អតីតនិពន្ធនាយករបស់កាសែតខេមបូឌា ដេលី មូលនិធិ ម៉ម សូម៉ាលី បានស្នើឱ្យមានការស៊ើបអង្កេតឯករាជ្យមួយលើសេចក្តីរាយការណ៍ដែលត្រូវបានចុះផ្សាយនៅក្នុងទំព័រកាសែតនេះទាក់ទិននឹងរឿងដែលថា លោកស្រី ម៉ម សូម៉ាលី បានជួយប្រឌិតរឿងទុក្ខវេទនារបស់ក្មេងស្រីដែលស្ថិតក្រោមការមើលថែទាំពីមូលនិធិរបស់លោកស្រី។

ប៉ុន្តែនៅពេលអង្គការនេះនៅតែមិនបានធ្វើការស៊ើបអង្កេតឯករាជ្យ និងទន្ទឹមនឹងមានការលាលែងពីតំណែងរបស់លោកស្រី ម៉ម សូម៉ាលី ផងនោះ អង្គការក្រៅរដ្ឋាភិបាលមួយចំនួនដែលមានមូលដ្ឋាននៅក្នុងប្រទេសកម្ពុជាបានលើកឡើងនៅក្នុងសប្តាហ៍នេះថា ពួកគេកំពុងតែព្រួយបារម្ភអំពីផលប៉ះពាល់ដល់ការងាររបស់ខ្លួន ។

លោក សំលៀង សិលា នាយកប្រចាំប្រទេសនៃអង្គការសកម្មភាពដើម្បីកុមារ (APLE) ជាអង្គការដែលធ្វើការដើម្បីទប់ស្កាត់ការរំលោភបំពានផ្លូវភេទលើកុមារបានឱ្យដឹងថា លោកកំពុងព្រួយបារម្ភខ្លាចក្រែងបញ្ហានេះអាចប៉ះពាល់ដល់កេរ្តិ៍ឈ្មោះរបស់អង្គការក្រៅរដ្ឋាភិបាលដែលកំពុងធ្វើការនៅក្នុងវិស័យប្រឆាំងការជួញដូរមនុស្ស។

លោកបានមានប្រសាសន៍ថា "វាអាចជាសារមួយដែលធ្វើឱ្យមានការយល់ច្រឡំយ៉ាងខ្លាំងចំពោះការជួញដូរមនុស្សនៅក្នុងប្រទេសកម្ពុជា និងចំនួននៃជនរងគ្រោះ ហើយថាតើនរណាជាជនរងគ្រោះ។ វាអាចបង្កើតឱ្យមានការយល់ច្រឡំអំពីការជួយដល់ជនរងគ្រោះទាំងនោះ ពីព្រោះគេនឹងគិតម្តងទៀតថា តើជនរងគ្រោះមួយចំនួនដែលអង្គការ និងមូលនិធិបានជួយពិតជាជនរងគ្រោះពិតប្រាកដមែន ឬក៏អត់ ហើយវាអាចនឹងធ្វើឱ្យប៉ះពាល់យ៉ាងខ្លាំងដល់ការជួយសង្គ្រោះចំពោះជនរងគ្រោះពិតប្រាកដ ពីព្រោះម្ចាស់ជំនួយអាចនឹងដកទំនុកចិត្តរបស់ខ្លួន"។

លោក គង់ សុឃឿន នាយកប្រតិបត្តិនៃអង្គការប្រឆាំងអំពីអនាចារ និងការជួញដូរកុមារ (Ecpat) ក៏មានការព្រួយបារម្ភដូចនេះដែរ ហើយលោកបានលើកឡើងថា ទំនុកចិត្តរបស់ម្ចាស់ជំនួយអាចនឹងបាត់បង់ទៅដោយមិនអាចទាក់ទាញត្រឡប់មកវិញបានឡើយ ។

លោកបានមានប្រសាសន៍ថា ទាក់ទិននឹងមូលនិធិគឺពីដើមឡើយយើងធ្លាប់ទទួលបានមូល

តទៅទំព័រទី ២១

# Somaly Mam Steps Down After Exposé

**By Joshua Wilwohl and Khy Sovuthy | May 30, 2014**

Somaly Mam, a prominent anti-sex-trafficking activist whose back-story as a sex slave has been the center of controversy after it was exposed as a fabrication, has resigned from the organization that bears her name.

Ms. Mam's resignation comes just days after a Newsweek magazine story exposed the lies, and months after The Cambodia Daily revealed inconsistencies in Ms. Mam's biography and false claims she has made about supposedly trafficked girls.

Somaly Mam speaks with Sheryl Sandberg, the chief operating officer of Facebook, at the Fortune Most Powerful Women Summit in Laguna Niguel, California, in 2011. (Asa Mathat)

"We have accepted Somaly's resignation effective immediately," reads a statement posted on the Somaly Mam Foundation's website on Wednesday by its executive director, Gina Reiss-Wilchins.

The statement says that in March, the foundation retained the U.S.-based law firm Goodwin Procter to conduct an independent, third-party investigation into allegations concerning the personal history of Ms. Mam as well as the story of one of the foundation's symbols of sex slavery, Long Pros.

"We are permanently removing Ms. Pros from any affiliation with the organization or our grant partner, but will help her to transition into the next phase of her life," the statement says.

"While we are extremely saddened by this news, we remain grateful to Somaly's work over the past two decades and for helping to build a foundation that has served thousands of women and girls, and has raised critical awareness of the nearly 21 million individuals who are currently enslaved today," it continues.

Since she co-founded the Somaly Mam Foundation in 2007, Ms. Mam has risen to stardom with her tale as a former sex slave.

In 2009, she was ranked among Time magazine's 100 most influential people in the category of heroes and icons. In 2011, she was placed on The Guardian newspaper's list of the world's top 100 women.

She has also built a Rolodex of celebrities and politicians who championed her cause and helped raise millions for the foundation.

The foundation's board of directors and global advisory board includes Sheryl Sandberg, chief operating officer of Facebook; actresses Susan Sarandon and Daryl Hannah; and U.S. ambassador-at-large for global women's issues Melanne Verveer.

Ms. Mam co-founded the Somaly Mam Foundation with the help of two U.S. Air Force Academy graduates as a way to raise funds for the work being done by Ms. Mam's Phnom Penh-based organization Agir pour les femmes en situation precaire (Afesip) and five other sex trafficking organizations.

The statement says the foundation will continue to work with Afesip, which Ms. Mam established in 1996.

"We look forward to moving past these events and focusing all of our energies on this vital work, ensuring that the hundreds of women and girls that are currently being served in our grant partner AFESIP's three centers for recovery and rehabilitation, receive the care that they so desperately need, and that we safeguard their identities and privacy to every extent possible," it says.

Ly Monirath, director of the Afesip center in Siem Reap province, said Ms. Mam resigned last year from her position at Afesip.

"She resigned from her position as executive director. They [donors] did not want her to have two positions at the same time, as she was the president of the Somaly Mam Foundation in the U.S.," he said.

Ms. Mam's story began to publicly unravel in April 2012 when she said during a U.N. meeting on human trafficking in New York that the Cambodian army killed eight girls after a raid on Afesip's center in Phnom Penh in 2004.

Shortly after, Cambodian authorities said Ms. Mam's story was not true, while the Office of the High Commissioner for Human Rights in Phnom Penh said there was no evidence of such killings.

In the two years that followed, more evidence began to pile up against Ms. Mam, culminating with the Newsweek cover story published last week detailing numerous inconsistencies and falsehoods in Ms. Mam's story that she was abused and sold into slavery.

**Continued to page 21**

## តមកពីទំព័រទី ០៦ ម៉ាយ៉ាមី រដ្ឋផ្លរីដា...

លិចនេះ ពុំមែនជាតំបន់ទេសចរណ៍ទៀតទេ គឺគេនាំគ្នាធ្វើកសិកម្មឆ្លៀតឱកាសពីតំបន់សមុទ្រត្រូពិខល យកទឹកភ្លៀងជួយស្រោចដំណាំទៀតផង។

បន្ទាប់ពីជិះរថយន្ត ឡិកសិស ជាងកន្លះម៉ោង ឬប្រមាណ៤០ម៉ាយ ពីផ្ទះទើបយើងមកដល់ចំការ ពុំមែនជីះរទេះគោដូចដែលយើងធ្លាប់ឃើញនៅស្រុកយើងទេ ។ មើលពីក្រៅពុំសូវមានផ្លែធំៗច្រុងច្រាងទៀតទេ ដូច្នេះក៏ពុំដឹងថាដើមអ្វីជាអ្វីដែរ ពីព្រោះយើងស្គាល់តែរូបរាងនៃផ្លែប៉ុណ្ណោះ អ្នកស្រី ភីរង់ និយាយថា ខ្ញុំទើបនឹងបេះផលិតផលខែមុននេះរួចរាល់ហើយ តែនៅសល់ខ្លះដែរដែលយើងអាចបេះបានយកទៅផ្ទះ ។ ដីដាំដំណាំកំណត់ដោយរបងបិទជិតមិនអាចនរណាចេញចូលដោយគ្មានអនុញ្ញាត្តិបានទេ មានផ្លូវកៅស៊ូ ឬផ្លូវដីចេញចូលដោយរថយន្តខ្វាត់ខ្វែងយ៉ាងស្រួល កន្លែងខ្លះគេដាក់កាមេរាសម្រាប់ត្រួតពិនិត្យចំការបន្ថែមទៀត។ នៅក្នុងចំការមានសំណង់២ធ្វើពីស៊ីម៉ង់ចាក់គ្រឹះ គឺ១បំរុងជាផ្ទះនៅ១ទៀតជារោងធ្វើការនឹងដាក់សម្ភារៈ ។ ពីរោងនោះទៅយើងបានដើរសំដៅទៅដើមឈើខ្ពស់ទាបដែលមានផ្លែ ដូចជា មានផ្លែខ្នោ ផ្លែល្មុត ផ្លែល្ហុង ផ្លែត្របែក ផ្លែទឹកដោះ ផ្លែស្វាយ ។ល។ ប៉ុណ្ណារ៉ូ រីករាយជាងគេ ពីព្រោះគ្រាន់តែដើររើសផ្លែដែលទើបនឹងជ្រុះនោះយកមិនអស់ ម្លោះហើយរត់ពីដើមមួយទៅដើមមួយផ្មៀតរើសផ្លែឈើមកបង្ហាញម្តាយមិនព្រមនឿយហត់។ គ្មានស្មៅ ឬសម្រាមគ្រខ្វក់នៅក្រោមដើម ឬនៅចន្លោះរងដំណាំទេ ទោះបីជាដីនោះធំធេងក៏ដោយ ពីព្រោះគេប្រើគោយន្តសម្រាប់ជំរះស្មៅយ៉ាងលឿននឹងដោយមិននឿយហត់ ដូច្នេះនឹងមិនមានជម្រកសត្វល្អិត ឬពស់ដែលគួរឱ្យខ្លាចនឹងចូលថែទាំចំការនោះទេ ។ ថ្វីត្បិតតែភ្លៀងជួយស្រោចដំណាំខ្លះក៏ដោយក្តីគេនៅមានប្រព័ន្ធទឹកដែលផ្តល់ទឹកគ្រប់ពេលដែលត្រូវការនៅលើដើមនិមួយៗតែមិនស្រោចលើផ្ទៃកដីដែលគ្មានដំណាំនៅទេ។ គ្រួសារអ្នកស្រី ភីរង់ បានធ្វើវិនិយោគទៅលើម៉ាស៊ីនបូមទឹកមួយនឹងជីកអណ្តូងមួយនៅក្បែរនោះគាត់ពង្រាយទុយោទឹកទៅដល់ដើមដែលនៅលើរងទាំងអស់នៃដំណាំរបស់គាត់គាត់អាចស្រោចមួយថ្ងៃ២-៣ម៉ោងនៅលើដំណាំទាំងអស់ក៏បាន ឬនៅផ្នែកខ្លះនៃដីខ្មាំដំណាំក៏បានមានដំណាំខ្លះមិនចាំបាច់ស្រោចទឹករាល់ថ្ងៃទេ ។ អ្នកចំការសម័យគេមិនរង់ចាំទឹកភ្លៀងសម្រាប់ដំណាំគេទេ ។

នៅសល់ការងាររបស់កសិករខ្លះទៀតដែលត្រូវធ្វើម្តងម្កាល ដូចជា ការដាក់ជី ឬបាញ់ថ្នាំសម្លាប់សត្វចង្រៃគាត់ប្រើម៉ាស៊ីនផ្សេងៗ ទៀត។ នៅមានដើមចម្លែកមួយទៀត គឺដើមត្របែកដែលដើមតូចមួយតែផ្លែប៉ុណ្ណាប៉ុណ្ណី គឺគាត់ផ្សាំដើមចាស់ដែលអាចមានផ្លែហើយស្រេច ហើយកាត់មែកដែលមានផ្លែហើយ យកមកដាំតែម្តងងាយស្រួលក្នុងការថែនឹងការពារផ្លែកុំឱ្យសត្វបំផ្លាញបាន ។

នៅជាប់របងគ្នានោះ ចំការអ្នកឯទៀត ច្រើនធ្វើតំរូវភ្ញៀវអាមេរិកាំងក្នុងទំហំធំៗដូចគ្នា ។

យើងចេញពីចំការមកវិញ ដៃកាន់កញ្ចប់ យើងរយោងពេញដៃដោយមានផ្លែឈើខ្មែរច្រើនមុខទូវដំណាំដាំដុះនៅរដ្ឋ ហ្វ្លរីដា ដើម្បីហូបខ្លួនឯងផង នឹងចែកជូនញាតិមិត្ត ខ្លះទៀតផង ។

**(នៅមានតទៅលេខក្រោយទៀត)**

## តមកពីទំព័រទី ១២ កសិករនៅខេត្តក្រចេះសុខចិត្តទទួលយក...

ចេញកាលពីថ្ងៃទី២ ខែឧសភា ដើម្បីបើកផ្លូវឱ្យក្រុមហ៊ុន Binh Phouc 2។ នៅពេលពួកគាត់បដិសេធមិនព្រមចេញផ្ទះរបស់ពួកគាត់ត្រូវបានដុតកម្ទេចចោល។

លោក ស ចំរុង អភិបាលខេត្តក្រចេះបានមានប្រសាសន៍កាលពីម្សិលមិញថា ក្រុមមន្ត្រីនឹងត្រៀមរៀបចំឯកសារចាំបាច់សម្រាប់សម្បទានដីសង្គមកិច្ច និងប្រគល់ដីនេះឱ្យប្រជាកសិករនៅថ្ងៃនេះ។

លោក ចំរុង បានមានប្រសាសន៍ថា "ប្រសិនបើពួកគាត់ចង់រស់នៅទីនោះ ពួកគាត់អាចទៅនិងស្វែងរកអ្វីផ្សេងទៀតដោយខ្លួនឯង។ ពួកគាត់អាចទៅកន្លែងណាមួយដែលពួកគេចង់ មិនមែនតែសម្បទានដីរបស់ក្រុមហ៊ុន [ Bin h Phuoc2] ប៉ុណ្ណោះទេ"។

លោក ចាន់ សុវ៉េត ប្រធានផ្នែកស៊ើបអង្កេតប្រចាំអង្គការសិទ្ធិមនុស្សអាដហុកបានមានប្រសាសន៍ថា លោកនឹងអមដំណើរក្រុមកសិករទៅកាន់ដីថ្មីរបស់ពួកគាត់ដែលកសិករនិយាយថា មានចម្ងាយមិនដល់១០គីឡូម៉ែត្រពីដីសម្បទានរបស់ក្រុមហ៊ុន Binh Phouc2។ លោក សុវ៉េត បានមានប្រសាសន៍ថា "ប្រសិនបើមន្ត្រីមូលដ្ឋានរៀបចំឯកសារបានរហ័សប្រជាពលរដ្ឋនឹងត្រឡប់ទៅកាន់ខេត្តនេះវិញ"៕ **ប៊ុននី**

## តមកពីទំព័រទី ១៧ វិទ្យាល័យឡូវែលចែកសញ្ញាប័ត្រដល់សិស្ស...

លោកប្រធាននាយកសាលាឡូវែលប្រាយអិន ម៉ារទីន (Headmaster Brian Martin, Lowell High School) បានថ្លែងដោយអត្ថន័យទៅកាន់សិស្សដែលបញ្ចប់ការសិក្សាឆ្នាំ២០១៤ថា សូមធ្វើឱ្យខ្សែជីវិតដែលអ្នកក្តោបក្តាប់ក្លាយទៅជាសាច់រឿងមួយដែលសំខាន់ និងជារឿងដ៏ល្អមួយសម្រាប់ខ្លួនអ្នក និងសង្គម។


អភិបាលក្រុង រ៉ដនី អេល្យេត

អភិបាលក្រុង រ៉ដនី អេល្យេត (Mayor Rodney Elliot, City of Lowell) បានមានប្រសាសន៍អំពីប្រវត្តិផ្ទាល់ខ្លួនមួយអំពីសត្យានុម័តដែលបព្វបុរសរបស់លោកក៏ជាជនអន្តោប្រវេសន៍ដែលឆ្លងដែនមកកាន់ទឹកដីសហរដ្ឋអាមេរិកក្នុងក្តីសង្ឃឹមថា នឹងកសាងអនាគតមួយដែលប្រសើរ។ ក្នុងន័យនេះលោកលើកទឹកចិត្តឱ្យសិស្សទាំងអស់បន្តការខិតខំ និងប្រកាន់យកស្មារតីព្យាយាមឱ្យបានខ្ជាប់ខ្ជួនតទៅអនាគត ព្រោះការងារភាពជោគជ័យទាំងឡាយសុទ្ធតែមាន ឬសគល់ពីសេចក្តីអត់ធ្មត់ និងព្យាយាមនេះឯង។

សាកលវិទ្យាធិការនៃសាកលវិទ្យាល័យយូម៉ាស លោក ម៉ារទីន មីហាន (Chancellor MartyMee han, University of Massachu setts Lowell) បានមានមតិផ្តល់តម្លៃ ពិសេសអំពីល្បាយជាតិសាសន៍ចម្រុះនៃក្រុងឡូវែលដែលឡូវែលតំណាងឱ្យយ៉ាងហោចណាស់៤៧ជាតិសាសន៍ និងផ្តល់នូវគន្លឹះ៤ចំណុចសម្រាប់ឱ្យជីវិតបានល្អប្រសើរ គឺទី១ធ្វើជាមនុស្សដែលពូកែស្តាប់ (Be a good listener) ទី២ តម្រង់ទិសទៅមុខទីបី ដើរតាមនូវមនសិការរបស់ខ្លួន ទី៤ គឺការដាក់ខ្លួនពោលគឺមិនត្រូវបំភ្លេចដើមកំណើតខ្លួនឡើយ ៕


សាកលវិទ្យាធិការ ម៉ារទី មីហាន





ក្រុមគ្រួសារខ្មែរទៅអបអរកូនជាប់សញ្ញាប័ត្រឆ្នាំ២០១៤

# “ដុល្លាស្ទ័រ” នៅកម្ពុជា

# At City's 2,500-Riel Shops, It's Buyers Beware

**By Hay Pisey and Simon Henderson**
**June 2, 2014**

Customers may not expect top-of-the-line products when they shop in discount stores for shampoos, shower gels or beauty creams. But as a police raid on a 2,500-riel store in Phnom Penh last week showed, neither should they expect to get exactly what they are paying for.

Following a complaint from Pich Beauty Co. Ltd. that the 2500 Riel Mini Mart in Daun Penh district was peddling fake lotion in Leivy's branded containers, economic police raided the store last Monday and confiscated hundreds of bottles of counterfeit toiletries and beauty products.




Customers browse items for sale last week at a 2,500-riel store on Sihanouk Boulevard in Phnom Penh. (Siv Channa)

The scale of the potential knock-off problem is unclear, but growing fast. Authorities have only a vague idea of how many 2,500-riel shops are operating in Phnom Penh, but say they are formulating a plan to make sure their deals are real.

Ly Kong, director of the municipal commerce department, said there are only seven 2,500-riel shops officially registered in the city. But he estimated that there are between four and 10 in every city commune-anywhere between about 300 to more than 700 such shops across the city.

"These sort of shops have been open for more than a year at least, but we have not got numbers for the total amount in Phnom Penh yet," he said, adding that he would begin asking commune officials to get the figures.

Long Sreng, chief of the Ministry of Interior's economic police department, who led last Monday's raid, said it is highly likely that other products stocked by the city's numerous 2,500-riel marts do not comply with trading standards, whether they are fake, rebranded or simply well past expiry dates.

For the economic police department, cutting off the supply chain of such fake goods will become a priority, he said.

"First of all, we intend to find out who produced the fake shampoos and other products we found [last Monday] because they pose a threat to the country's economy and public safety," Brigadier General Sreng said.

Police believe that empty branded bottles seized last week were imported from Vietnam and then filled with counterfeit product in Cambodia, and have compiled a report on last week's raid and sent it on to Camcontrol, the Commerce Ministry's customs inspection unit, he added.

"I don't know when they will take action, but we have informed Camcontrol authorities and they will then go and carry out quality control checks in 2,500-riel **Continued to page 25**

# មូលហេតុដែលបង្កឱ្យកើត ជំងឺមហារីក



ការស្រាវជ្រាវមួយបានបង្ហាញឱ្យដឹងថា មានមូលហេតុជាច្រើនដែលអាចបង្កឱ្យកើតជំងឺមហារីក ដោយមិនដឹងខ្លួន ដូចជាការប្រើប្រាស់ថ្នាំពន្យារកំណើត ទឹកខ្មុរមាត់ អាវទ្រនាប់ ។

**-ថ្នាំពន្យារកំណើត :** ស្ត្រីប្រើប្រាស់ថ្នាំពន្យារកំណើតមានការប្រឈមកើតមហារីកបំពង់.ក ខ្ពស់ ជាង បើប្រៀបធៀបជាមួយនឹងអ្នកមិនប្រើប្រាស់ ។ តែប្រសិនបើឈប់ប្រើថ្នាំហានិភ័យកើតជំងឺនឹងថយចុះ ។ នោះគឺដោយសារថ្នាំពន្យារកំណើតបង្កការបាត់តុល្យភាពអ័រម៉ូន ។

**-ទឹកខ្មុរមាត់ :** ការស្រាវជ្រាវទាំងឡាយបង្ហាញថា ទឹកខ្មុរមាត់ផ្ទុក តេហាន់ុល មានពាក់ ព័ន្ធដល់មហារីកបំពង់.ក ។ សារជាតិចម្រុះនេះ អាចបំផ្លាញជាលិកាក្នុងមាត់ធ្វើឱ្យអ្នកងាយក្លាយជាជនរងគ្រោះរបស់សារជាតិបង្កើតមហារីក ដូចជាសារជាតិនៅក្នុងបារី ។

**-អាវទ្រនាប់:** ការស្រាវជ្រាវមួយនៅឆ្នាំ១៩៩៥បង្ហាញឱ្យដឹងថា អាវទ្រនាប់មួយចំនួនអាចបង្កជំងឺមហារីកដោះ ។ ទោះបីលទ្ធផលនៃការស្រាវជ្រាវនេះ ពុំទាន់ត្រូវបានបញ្ជាក់ច្បាស់លាស់តែពួកអ្នកវិទ្យាសាស្ត្របាននិយាយថា ស្ត្រីមិនពាក់អាវទ្រនាប់កម្រជួបបញ្ហាពាក់ព័ន្ធដល់ជាលិកាដោះជាងហេតុនេះហានិភ័យកើតមហារីកក៏ទាបជាងដែរ ៕

តមកពីទំព័រទី ១៨

## បន្ទាប់ពីការលាលែងពីតំណែងរបស់...

និធិពីមូលនិធិ ម៉ម សូម៉ាលី ។ ប៉ុន្តែចំពោះយោបល់ផ្ទាល់ខ្លួនរបស់ខ្ញុំវិញ ខ្ញុំគិតថា ម្ចាស់ជំនួយមួយចំនួននឹងលែងមានទំនុកចិត្តក្នុងការផ្តល់ប្រាក់ដល់មូលនិធិ ម៉ម សូម៉ាលី ទៀតហើយ ហើយបន្ទាប់មកគេមិនអាចផ្តល់ជំនួយមកឱ្យយើងបានទេ"។

បញ្ហាទាក់ទិននឹងការជួញដូរមនុស្សនៅក្នុងប្រទេសកម្ពុជាក៏ធ្លាប់ត្រូវបានគេលើកឡើងជាច្រើនឆ្នាំមកហើយផងដែរ។ ចំនួននៃមនុស្សដែលរងផលប៉ះពាល់ដោយសារការជួញដូរមនុស្សមានការប្រែប្រួលចន្លោះពីរាប់ពាន់នាក់ទៅរាប់រយពាន់នាក់។

ទិន្នន័យដែលប្រមូលនៅក្នុងឆ្នាំ២០០៨ដោយលោក ថូម៉ាស ស្តេនហ្វេត (Thomas Steinfatt) សាស្ត្រាចារ្យផ្នែកស្ថិតិនៅសាកលវិទ្យាល័យម៉ាយអាមី (Miami) បានប៉ាន់ប្រមាណថា ចំនួននៃជនរងគ្រោះដោយសារការជួញដូរមនុស្សនៅក្នុងប្រ-ទេសកម្ពុជាមានចំនួន១.០៥៨នាក់។

នៅពេលនិយាយតាមទូរស័ព្ទពីសហរដ្ឋអា-មេរិកមកកាលពីម្សិលមិញលោកបានលើកឡើងថា ចំនួននៃជនរងគ្រោះទាំងនោះនៅតែមិនប្រែប្រួល។ លោកបានលើកឡើងបន្តថា បញ្ហាទាក់ទិននឹងការជួញដូរមនុស្សគួរតែត្រូវបានដោះស្រាយឱ្យបានខ្លាំងក្លា ហើយវាជាបញ្ហាដែលសំខាន់ជាងការវិភាគដែលចង់ដឹងថា តើមូលនិធិចំនួនប៉ុន្មានឱ្យពិតប្រាកដដែលត្រូវបានប្រើប្រាស់ ដើម្បីជួយជនរងគ្រោះនោះ។

លោកបានមានប្រសាសន៍ថា "វាពិតជាមានបញ្ហាមែនទាក់ទិននឹងការជួញដូរមនុស្ស។ ប្រសិនបើអ្នកឬក៏ខ្ញុំក្បត់នឹងឆន្ទៈរបស់យើងចំពោះការជួញដូរមនុស្សនោះ គឺជាបញ្ហាដ៏ធំ។ វាមិនអាស្រ័យលើចំនួននៃជនរងគ្រោះនោះទេ ឱ្យតែមានជនរងគ្រោះគឺយើងត្រូវតែជួយ"។

ទាក់ទិននឹងអនាគតនៃការប្រឆាំងនឹងការជួញដូរមនុស្សលោកសាស្ត្រាចារ្យ ស្តេហ្វេត ដែលរៀបរាប់ថា លោកស្រី ម៉ម សូម៉ាលី គឺជាបុគ្គលពុករលួយដូចដែលយើងអាចបានឃើញហើយនោះ បានមានប្រសាសន៍ថា លោកសង្ឃឹមថា "មនុស្សដែលនិយាយថា ខ្លួនចាប់អារម្មណ៍នៅក្នុងការជួយសង្គ្រោះមនុស្សប្រាកដជានឹងធ្វើរឿងនេះ"។

លោក ប៉ែន ឈុនហេង ឪពុកមារបស់លោកស្រី ម៉ម សូម៉ាលី បានឱ្យដឹងកាលពីសប្តាហ៍មុនថា គាត់សោកស្តាយណាស់ដែលតំណែងរបស់លោកស្រីនៅមូលនិធិ ម៉ម សូម៉ាលី ត្រូវបានបញ្ចប់ ហើយគាត់ជឿជាក់ថា ប្រហែលជាមាន "នរណាម្នាក់ច្រណែននឹងលោកស្រី" ហើយចង់ធ្វើឱ្យ "ខូចកេរ្តិ៍ឈ្មោះរបស់លោកស្រី"។

ប៉ុន្តែរឿងអាស្រូវដែលពាក់ព័ន្ធដោយផ្ទាល់ចំពោះលោកស្រី ម៉ម សូម៉ាលី ត្រូវបានគេផ្សព្វផ្សាយយ៉ាងសុសសាយទៅហើយឥឡូវនេះ ហើយរឿងអាស្រូវនេះវាឆ្លុះបញ្ចាំងឱ្យឃើញពីការអនុវត្តគ្មានក្រមសីលធម៌ដែលជួនកាលត្រូវបានគេប្រើប្រាស់ដើម្បីទទួលបានមូលនិធិសម្រាប់វិស័យប្រឆាំងការជួញដូរមនុស្ស។

នៅក្នុងករណីរបស់លោកស្រី ម៉ម សូម៉ាលី នេះ លោកស្រីត្រូវបានគេចោទប្រកាន់ថា បានប្រឌិតអំពីរឿងរ៉ាវរបស់ស្ត្រីវ័យក្មេងយ៉ាងតិចចំនួនពីរនាក់ ហើយបង្រៀនពួកគេឱ្យចេះភូតកុហកប្រព័ន្ធផ្សព្វផ្សាយអន្តរជាតិថែមទៀត។ រឿងលម្អិតជាច្រើននៅក្នុងប្រវត្តិរបស់លោកស្រីក្នុងរឿងមួយមានចំណងជើងថា "The Road of Lost Innocence" ក៏ត្រូវបានគេរកឃើញថា មានការប្រឌិតជាមួយនឹងការអះអាងដែលលោកស្រីបានធ្វើឡើងអំឡុងការថ្លែងសុន្ទរកថា ចំពោះមុខមហាសន្និបាតអង្គការសហប្រជាជាតិផងដែរ។

នៅពេលភាពល្បីល្បាញរបស់លោកស្រីបានកើនឡើង ជំនួយសម្រាប់មូលនិធិ ម៉ម សូម៉ាលី ក៏ត្រូវបានគេឃើញថា មានការកើនឡើងដូចគ្នា។ យោងតាមរបាយការណ៍ហិរញ្ញវត្ថុដែលត្រូវបានដាក់ជូនទៅកាន់ទីភ្នាក់ងារប្រាក់ចំណូលផ្ទៃក្នុងសហរដ្ឋអាមេរិក (US International Revenue Service) បានឱ្យដឹងថា កាលពីឆ្នាំ២០០៨ ការចំណាយរបស់មូលនិធិ ម៉ម សូម៉ាលី មានចំនួន ៣៤៨.២៨៣ដុល្លារ។ ហើយបើគិតមកត្រឹមឆ្នាំ ២០១១ ការចំណាយនេះបានកើនឡើងដល់៣.៥៣លានដុល្លារ។ លោកស្រី ម៉ម សូម៉ាលី ដែលមិនទទួលបានអ្វីសោះពីមូលនិធិរបស់លោកស្រីនៅក្នុងឆ្នាំ២០០៨ រកបានប្រាក់ចំនួន៨៥.០០០ដុល្លារនៅក្នុងឆ្នាំ២០០៩ និង៩៦.០០០ដុល្លារនៅក្នុងឆ្នាំ ២០១០ ហើយ១២៥.៦៤២ដុល្លារក្នុងឆ្នាំ២០១១។

លោកស្រី ហេលេន ស្វន (Helen Sworn) ស្ថាបនិកអង្គការចាប់ដៃ (Chab Dai) ជាសម្ព័ន្ធនៃអង្គការក្រៅរដ្ឋាភិបាលចំនួន៥៨ដែលធ្វើការដើម្បីបញ្ចប់ការរំលោភបំពានផ្លូវភេទ និងការជួញដូរមនុស្សបានលើកឡើងថា បន្ទាប់ពីភាពល្បីល្បាញរបស់លោកស្រី ម៉ម សូម៉ាលី បានធ្លាក់ចុះ អង្គការដែលធ្វើការនៅក្នុងផ្នែកការជួញដូរមនុស្សគួរតែខិតខំចាត់វិធានការដើម្បីសិក្សាខ្លួនឯងឱ្យបានច្បាស់។

លោកស្រីបានមានប្រសាសន៍កាលពីម្សិលមិញថា "វាក្លាយទៅជាចលនានៃភាពល្បីល្បាញពោលគឺភ្លេចពីសារៈសំខាន់នៃចលនាទៅហើយ។ យើងបានដើរចេញឆ្ងាយពីក្របខណ្ឌសិទ្ធិមនុស្ស ហើយធ្លាក់ចូលក្នុងក្របខណ្ឌនៃភាពអស្ចារ្យទៅវិញ។ នេះគឺជាការសោកស្តាយយ៉ាងខ្លាំងបំផុតរបស់ខ្ញុំវាមិនមែនជារឿងត្រឹមត្រូវដែលត្រូវធ្វើនោះទេ"។

លោកស្រីបានលើកឡើងទៀតថា ការផ្តោតក្នុងពេលឥឡូវនេះគួរតែផ្តោតទៅលើការវាយតម្លៃសេចក្តីសុចរិតនៃកម្មវិធី និងផ្តោតលើការទទួលស្គាល់ការយល់ឃើញខុសដែលលើកតម្កើងលោកស្រី ម៉ម សូម៉ាលី ឱ្យក្លាយជាបុគ្គលល្បី។

លោកស្រីបានមានប្រសាសន៍ថា "វាគឺជារឿងស្មុគស្មាញរបស់បុគ្គលធ្វើការផ្នែកសង្គ្រោះ។ យើងត្រូវតែចេញឱ្យឆ្ងាយពីបញ្ហានេះ"៕

**ស៊ុយឈាង**



Continued to page 18

## Somaly Mam Steps Down After...

The story, written by an editor for The Cambodia Daily, was based on a number of investigations published in this newspaper since 2012 that revealed fabrications in Ms. Mam's story as well as stories told by Ms. Mam to bolster her foundation's fundraising efforts.

In October 2012, for example, Ms. Pros' story of imprisonment as a young teenager at a brothel in Phnom Penh--where she was supposedly held as a sex slave and mutilated at the hands of the owner when she refused to have sex with customers-was found to be false.

Ms. Pros' parents denied that their daughter had ever been a victim of human trafficking, had ever been enslaved in a brothel, or had lost her right eye at the hands of a brothel owner. They said Ms. Pros lost her eye as the result of a non-malignant tumor that had developed when she was just seven years old.

Ms. Pros' father, Long Hon, declined to comment Thursday on the Somaly Mam Foundation's separation with his daughter.

"I don't dare comment about Mam Somaly's resignation because I don't know a lot of details about her organization," he said.

In a similar case, an investigation in October revealed another sex slave story was totally fabricated.

Meas Ratha told The Cambodia Daily that she was selected by Ms. Mam to appear on a French television channel in 1998 after undergoing rehearsals with a group of other girls to falsely recount how she was sold to a brothel owner in Phnom Penh.

Following the report, Ms. Ratha said she was approached by a member of the Somaly Mam Foundation and told not to speak with the media.

Relatives of Ms. Mam who still live in Cambodia declined to comment Thursday.

# CLASSIFIED ADS




រឿងរាមកេរ្តិ៍ ដោយសាគូ សាមុត តម្លៃ $10




របាំបុរាណខ្មែរ ដោយសាគូ សាមុត តម្លៃ $10




រឿងរាមកេរ្តិ៍ ដោយសាគូ សាមុត តម្លៃ $10




ក្រុងភ្នំពេញមុនឆ្នាំ១៩៥៤ តម្លៃ $10




CAMBODGE តម្លៃ $5




អង្គការជានរណា? បីភាគ តម្លៃ $5/1

| | |
|---|---|
| Name | Phone # |
| Shipping Address | Email |
| City, State, Zip | Book Title(s) |

BOOK ORDER FORM

Checks or Money Order Payable to KhmerPost USA, LLC
**អាចទិញនៅអាស័យដ្ឋាន៖** 45 Merrimack St., Suite 218A, Lowell, MA 01852

## Your Bussiness
### Card is Here for $50/mon
**ពាណិជ្ជកម្មរបស់អ្នកនៅទីនេះចំណាយ ត្រឹមតែ $50 ក្នុង១ខែ**

សំអាងការជីតាសួគ៌
THYDA SOUR CAMBODIA BRIDAL
-មានសំអាងការបុរាណ សម័យ
-កាត់សក់ បួងសក់ ផាត់មុខ ក្នុងកម្មពិធីផ្សេងៗ
-មានអាហារ ភ្លេងខ្មែរ ថតរូប ថតវីដេអូ
តែងផ្ទះ និងម៉េក្រូ
2PINE ST.#A
LOWELL MA.018 51
CHENDA : 978-328 9336
PAULA : 978-996 6109
SOVANN : 978-328-9335

## សិក្សាពីឥស្លាម
**សួរ :** មានចម្ងល់អ្វីទេពីឥស្លាម?
**ឆ្លើយ :** សូមទៅមើលគេហទំព័រ www.peacetv.tv ឬគេហទំព័រ មួយទៀត www.gainpeace.com.
Q) Any Questions on Islam?
A) watch www.peacetv.tv
visit www.gainpeace.com.

## ប្រូវីដិនខ្មែរវីដេអូ
មានជួសជុល និងលក់កុន
ចិន-ថៃ-ខ្មែរ-ឥណ្ឌា
គ្រប់ប្រភេទមានចម្រៀងសម័យវីដេអូ
ខារ៉ាអូខេថ្មីៗ
742 Potters Avenue
Providence, RI 02907
ទូរស័ព្ទ : (401) 787 6663

www.vmlaptops.com
## Computer Repair
Repair, Buy , Sale, and Trade
VM LAPTOPS CENTER
VANNAK MOEUN(VICTOR)
President
(401)-314-7777
(513)-518-4938
E-mail: van@vmlaptops.com
301 Reservoir Ave Unit 2
Providence, RI 02907
Fax#: (401)-461-2220

## We Buy Broken Laptops
Free, Free, Free,Free
Computer Diagnostic
VM LAPTOPS CENTER
Laptops Motherboard Replacement
Virus, Spy ware, Ad ware Removal
Laptops DC Jack Replacement
Laptops Screen Replacement
Scan to view our Website!

## Grow your bussiness
Call: **978-677-7092**

ជំនួញ និង ការរកទទួលទានរបស់អ្នកនៅក្រុងឡូវែល នឹងបានជោគជ័យរឹតតែប្រសើរ
បើលោកអ្នកហៅមកកាន់ផ្នែកផ្សាយពាណិជ្ជកម្ម របស់ខ្មែរផុសសហរដ្ឋអាមេរិក **978-677-7092**

# រមណីយដ្ឋានកោះមរកត (កោះពស់)

កាលពីប៉ុន្មានឆ្នាំមុនកោះពស់គ្រាន់តែជាកោះមួយសម្រាប់អ្នកទេសចរផ្សងព្រេងទៅលេងកម្សាន្តជាមួយធម្មជាតិ ឬ ស្នូចត្រី និងមុជមើលផ្កាថ្មប៉ុណ្ណោះ ប៉ុន្តែសព្វថ្ងៃនេះកោះពស់បានក្លាយទៅជាទីគោលដៅទេសចរណ៍"មាស"មួយនៅតំបន់អាស៊ីអាគ្នេយ៍ហើយ ដែលគេរំពឹងថាជាទេសចរណ៍ធម្មជាតិដ៏អស្ចារ្យនៅដែនសមុទ្រក្រុងព្រះសីហនុ និងនៅក្នុងតំបន់ ។ កោះមរកតជាឈ្មោះរមណីយដ្ឋានមួយបង្កើតឡើងនៅលើកោះពស់ដែលពោរពេញទៅដោយសោភ័ណភាពបែបធម្មជាតិពិតៗ។ គេគ្រាន់តែធ្វើដំណើរឆ្លងស្ពានថ្មមួយសាងសង់ថ្មីភ្ជាប់ទីក្រុងព្រះសីហនុទៅកោះតែ ៤ ឬ ៥ នាទីប៉ុណ្ណោះ ។

កោះមរកតមានអគារស្នាក់នៅប្រណីតៗចំនួន ៣៦ ខ្នង សង់ តាមបណ្តោយឆ្នេរសមុទ្រនៅលើផ្ទៃដីទំហំ ៤៥០ ទៅ ៥៧០ ម៉ែត្រការ៉េ។ ផ្ទះនីមួយៗមាន បន្ទប់ដេកពី ៣ ទៅ ៥ បន្ទប់ មានចំណតរថយន្តសម្រាប់រថយន្តពីរគ្រឿង និងសង់តាមលំនាំបស្ចិមប្រទេសជឿនលឿនមានបន្ទប់ ទឹកបំពាក់ដោយសម្ភារៈទំនើបៗ មានរានហាលមានអាងហែលទឹកដែលមើលឃើញសមុទ្រល្វឹងល្វើយ ។

ថ្មីៗនេះមានគម្រោងអភិវឌ្ឍតាមបែបអន្តរជាតិដោយមានក្រុមជំនាញៗមកធ្វើការព្រមជាមួយគម្រោងបង្កើតសហគមន៍ទេសចរណ៍ និងលំនៅស្ថានឯកជនយ៉ាងល្អប្រណីតដែលស្ថិតនៅលើកោះដ៏ស្រស់ត្រកាលមួយរបស់កម្ពុជា គឺកោះពស់ដែលមានផ្ទៃក្រឡាប្រមាណជា១.១៦៦.០៦១ ម៉ែត្រការ៉េ ។ នេះជាគម្រោងអភិវឌ្ឍសំខាន់បំផុតមួយរបៀបឧស្សាហកម្មទេសចរណ៍ថ្មីតាមបណ្តោយឆ្នេរប្រទេសកម្ពុជា។

កោះមរកតមានទីតាំងស្ថិតនៅក្នុងសមុទ្រនៃក្រុងព្រះសីហនុក្នុងចម្ងាយ៩៥០ម៉ែត្រ ត្រង់ភាគខាងត្បូង ហើយកោះមរកតមានគោលបំណងនឹងអភិវឌ្ឍឱ្យមានស្តង់ដារអន្តរជាតិខ្ពស់បំផុតរួមជាមួយស្ពានសម្រាប់ឆ្លងកាត់មន្ទីរពេទ្យលំនៅស្ថានឯកជន និងបង្កឱ្យមានភាពងាយស្រួលក្នុងវិស័យពាណិជ្ជកម្ម និងការសម្រាកវិស្សមកាលបូករួមជាមួយនឹងសម្រស់ឆ្នេរស្អាតដាច់គេរបស់ប្រទេសយើងផងដែរ។ ដំណាក់កាលដំបូងមានការសាងសង់ផ្ទះវីឡាដ៏ប្រណីតចំនួន៣៦នៅប្រប់នឹងមាត់ឆ្នេរ និងផ្ទះល្វែងចំនួន១៩៨ ៕





តមកពីទំព័រទី ១

# សម្ភាសន៍ជាមួយព្រឹទ្ធសមាជិក សេង ម៉ារឌី...

## បុណ្យផ្កាសាមគ្គីការពារ បូរណភាពទឹកដី

ខ្ញុំ សេង មារឌី ជាសមាជិកព្រឹទ្ធសភាខ្មែរ មានដើមកំណើតនៅខេត្តស្វាយរៀងមានបំណងនឹងធ្វើបុណ្យផ្កាសាមគ្គីមួយ ដើម្បីប្រមូលបច្ច័យ ដើម្បីធ្វើការងារផែនទីមួយដែលនឹងបញ្ជាក់ពីដែនដីខ្មែរច្បាស់លាស់បាត់បង់ ឬគង់វង្សប៉ុណ្ណានោះ ។

កាលបរិច្ឆេទថ្ងៃអាទិត្យ ទី១៥មិថុនា ឆ្នាំ២០១៤ ប្ដើមបុណ្យនៅម៉ោង ៩ព្រឹក

ទីកន្លែងភោជនីយដ្ឋាន សាធិដា ឡូវែល

ទូរស័ព្ទទាក់ទង (774) 331 5262

ខ្ញុំនឹងបង្ហាញជូននូវគម្រោងតំបូងនៃការបាត់បង់ទឹកដីខ្មែរដោយការវាស់វែងផែនទីថ្មីរវាងខ្មែរ-វៀតណាមជូនបងប្អូននិងពុទ្ធសាសនិកនៅឡូវែលនេះ នាវេលាថ្ងៃត្រង់នៃថ្ងៃពិធីបុណ្យផ្កានោះ ។

*សូមបងប្អូនពុទ្ធសាសនិកអញ្ជើញចូលរួមឱ្យបានច្រើន សូមអរគុណ ។*



ការបរិច្ឆេទនៃការបោះឆ្នោតខាងគណបក្សប្រជាជនគេថា បោះឆ្នោតឡើងវិញគេមិនព្រមទេ ពីព្រោះនេះបានន័យថា មិនទទួលស្គាល់លទ្ធផលនៃការបោះឆ្នោតតែបើរំកិលពេលមកមុខ ដូចជា ៤-៥ខែមុនពេលកំណត់នោះទើបគេយល់ព្រម ។ ឥឡូវគេអាចព្រមបោះឆ្នោតមុនអាណត្តិរហូតដល់២ឆ្នាំមុនក៏បានតែបោះឆ្នោតសារជាថ្មីមិនទទួលទេ ។ ខ្មែរផុសការខុសគ្នាតែបន្តិចហ្នឹង តើមានបញ្ហានយោបាយអ្វីដែលនាំឱ្យរំខានពីក្រោយកិច្ចចរចានេះ?

**សេង ម៉ារឌី** គណបក្សសង្គ្រោះជាតិនឹងប្រជាពលរដ្ឋចង់បោះឆ្នោតសារជាថ្មីឱ្យបានឆាប់ រីឯគណបក្សប្រជាជនចង់ពន្យាពេលឱ្យបានឆ្ងាយ ពីព្រោះបើបោះឆ្នោតឆាប់ៗគណបក្សប្រជាជននឹងចាញ់តាមពីតទៅគណបក្សសង្គ្រោះជាតិ ក៏ដូចជាប្រជាពលរដ្ឋមិនទទួលស្គាល់ការបោះឆ្នោតលើកក្រោយនេះទេ ។

**ខ្មែរផុស** ប្រសិនបើគណបក្សប្រជាជនអាចអូសបន្លាយការបោះឆ្នោត រហូតដល់ឆ្នាំ២០១៨បាននោះ តើលោកមើលឃើញទេថា តើគណបក្សប្រជាជនមានយុទ្ធសាស្ត្រអ្វីសម្រាប់ទប់ទល់យកឈ្នះវិញបាន? ខ្ញុំឃើញថាគណបក្សប្រជាជនអាចចាញ់ពេលនេះ ក៏អាចចាញ់នៅឆ្នាំ២០១៨ទៀត ពីព្រោះប្រជាពលរដ្ឋច្បាស់ជាពុំទាន់ភ្លេចការតស៊ូរបស់ខ្លួននៅឡើយទេ។

**សេង ម៉ារឌី** ចំណុចនេះខ្ញុំអត់ដឹងច្បាស់ទេ ក៏ប៉ុន្តែដឹងថាគណបក្សប្រជាជនគេនឹងរៀបបណ្ដាញគេឡើងវិញ គេបង្ខំឱ្យថ្នាក់ដឹកនាំគេចុះតាមមូលដ្ឋាន ម្យ៉ាងទៀតប្រជាពលរដ្ឋឆាប់ភ្លេចឱ្យតែហេតុការណ៍ស្ងប់ស្ងាត់៣-៤ខែ ឬក៏១ឆ្នាំអីទៅ គេសង្ឃឹមថាជាចំណុចមួយអាចជួយដល់គេដែរ

**ខ្មែរផុស** មួយទៀត បើនៅឆ្នាំ២០១៨ គណបក្សប្រជាជនចាញ់មិនទទួលស្គាល់លទ្ធផល ហើយមិនព្រមថយចេញគិតយ៉ាងម៉េចវិញ?

**សេង ម៉ារឌី** នៅឆ្នាំ១៩៩៣ គេចាញ់ហើយ មិនទទួលស្គាល់លទ្ធផល ហើយក៏មិនថយចេញ ឆ្នាំ២០១៣គណបក្សប្រជាជនដឹងថា ចាញ់ហើយ មិនប្រកាសថាចាញ់ ហើយក៏មិនថយចេញ បើមានទម្លាប់យ៉ាងនេះហើយ តើនៅឆ្នាំ២០១៨ ហេតុអ្វីក៏ត្រូវចាញ់ ហើយព្រមចុះចេញ?

**ខ្មែរផុស** ក្នុងករណីបោះឆ្នោតមុនអាណត្តិហ្នឹង បើគណបក្សសង្គ្រោះជាតិឈ្នះ តើនឹងធ្វើអ្វីដើម្បីឱ្យគណបក្សប្រជាជនព្រមចុះចេញ?

**សេង ម៉ារឌី** ខ្ញុំមិនដឹងថាគណបក្សនឹងធ្វើយ៉ាងម៉េចទេ តែយើងបានឃើញហើយ យើងបានធ្វើរួចអស់ហើយ ដូចជាប្ដឹងទៅអន្តរជាតិកុំឱ្យទទួលស្គាល់រដ្ឋាភិបាលហៅវាស្ត្រមកធ្វើបាតុកម្មអហិង្សា ពីព្រោះយើងមិនចង់ឱ្យមានការបាត់បង់ជីវិតមនុស្ស

**ខ្មែរផុស** ចំពោះទស្សនៈអហិង្សាហ្នឹងមានខ្លះយល់ថា យើងមានគ្នាច្រើនណាស់ហើយ ហេតុអ្វីក៏យើងមិនធ្វើបញ្ចប់តែម្ដងទៅ ?

**សេង ម៉ារឌី** យើងបានគិតទៅដល់ការខាត-ចំណេញធ្វើសកម្មភាពអហិង្សាបានចំណេញច្រើនជាងតែត្រូវប្រើពេល ដូចជាមហាត្មកគន្ធីនៃប្រទេសឥណ្ឌា ម៉ាទីន លូធ័រឃីង នៃសហរដ្ឋអាមេរិកនឹងអ្នកតស៊ូអហិង្សាទាំងអស់ធ្វើការបានជោគជ័យ គឺគេត្រូវការពេលវេលានឹងត្រូវការភាពអត់ធ្មត់ ដូចជានៅពេលយើងធ្វើបាតុកម្មអហិង្សា ហើយមានគេមកវាយយើងឱ្យបែកក្បាលហូរឈាមវាធ្វើឱ្យបាតុកររឹតតែឈឺចាប់ធ្វើឱ្យប្រជាពលរដ្ឋលើសកលលោកឈឺចាប់ជំនួសយើង ការឈឺចាប់ហ្នឹងហើយ ដែលនឹងជម្រុញឱ្យរដ្ឋាភិបាលផ្លាស់ប្ដូរនៅភ្នំមាគ្មាននរណាជឿថា នឹងមានការផ្លាស់ប្ដូរទេ តែសម្ពាតសហគមន៍អន្តរជាតិនឹងអ្នកផ្សេងៗដែលឃើញភាពអយុត្តិធម៌នេះ ហើយដែលជម្រុញឱ្យមានការផ្លះប្ដូរ ។

**ខ្មែរផុស** មហាត្ម័គគន្ធីបានពន្យសឱ្យអង់គ្លេសធ្វើហឹង្សាមុនដោយយល់ថា នរណាធ្វើហឹង្សាមុននរនោះនឹងចាញ់គាត់បានជម្រុញឱ្យក្រុមបាតុករទាមទាររំដោះប្រទេសពីអាណានិគមឱ្យដើរជាក្រុមតូចៗចូលទៅរកទាហ៊ានអង់គ្លេសក៏វាយនឹងតំបងបណ្ដាលឱ្យរបួសហូរឈាមច្រើនរយនាក់ រហូតដល់ទាល់តែបានជ័យជំនះ តើរូបភាពនោះឬដែលគណបក្សសង្គ្រោះជាតិជម្រុញឱ្យគណបក្សប្រជាជនភ្លាត់ធ្វើអំពើហឹង្សានោះ?

**សេង ម៉ារឌី** យើងឥតបានញុះញង់ឱ្យអំពើហឹង្សាទេ ក៏ប៉ុន្តែច្បាប់អនុញ្ញាតឱ្យយើងធ្វើបាតុកម្ម ប៉ុន្តែរដ្ឋាភិបាលធ្វើផ្ទុយនឹច្បាប់អនុញ្ញាតនឹងរដ្ឋធម្មនុញ្ញទៅបិទទីលានប្រជាធិបតេយ្យមិនឱ្យយើងធ្វើបាតុកម្មលោកស្រី មូរ សុខហួរ ក្រុមនិស្សិតក្រុមបាតុករបានយកផ្កាទៅឱ្យក្រុមប៉ូលីសទាំងនោះ ទៅរាំច្រៀងនៅមុខទីនោះ ជាសញ្ញាថាយើងជាខ្មែរដូចគ្នាទេកុំវាយគ្នាតែដល់មេគេបញ្ជាមកក៏វាយយើងតែម្ដង ។

**ខ្មែរផុស** ក្នុងពេលឥតឡូវនេះ បាតុកម្មនៅតែបន្តទៅទៀត ឬដោយសារតែហាមក៏បានផ្អាកទៅហើយ?

**សេង ម៉ារឌី** ប្រជាពឡរដ្ឋខ្មែរឥឡូវ មិនដូចពីមុនៗទេ កាលពីឆ្នាំ៩៦-៩៧ ទាល់តែមានមេដឹកនាំ ដូចជាលោកប្រធាន សម រង្ស៊ី ចេញមុខទើបមានបាតុកម្មតែឥឡូវនេះ ប្រជាពលរដ្ឋឥតរង់ចាំនរណាដើម្បីធ្វើបាតុកម្មទេ ដោយការឈឺចាប់នឹងបាត់បង់ដីធ្លី ផ្ទះសម្បែង ដើម្បីជីវភាពគាត់ហ៊ានចេញខ្លួនឯងតែម្ដង នៅគ្រប់ទីកន្លែងផ្ទុះឡើងដោយគ្មាននរណារៀបចំឱ្យជាមុនទេ ។

**ខ្មែរផុស** តើបាតុកម្មប្រជាពលរដ្ឋខ្មែរនោះនៅក្នុងក្របខណ្ឌនៃគណបក្សសង្គ្រោះជាតិដែរ ឬទេ?

**សេង ម៉ារឌី** អត់ទេ! នេះហើយជាចំណុចខ្លាំងរបស់យើងខ្ញុំគិតថា ទន្លេមេគង្គដែលបាក់ហើយ មិនបាច់លីចប លីបង្គី កាប់ដីមកទប់ទេ ចង់ទុបក៏មិនជាប់ដែរ !

**ខ្មែរផុស** ត្រឡប់មកចំណុចសំខាន់នៃកិច្ចចចរចាវិញ គណបក្សទាំង២ យល់ព្រមគ្នា១៣ចំណុចហើយ នៅសល់តែ១ចំណុចប៉ុណ្ណោះនឹងស្របគ្នាទាំងស្រុងហើយ ស្រាប់តែគាំងដំណើរនៅត្រង់នេះ តើនៅមានអ្វីសម្រាប់គាស់កិច្ចប្រជុំឡើងមកវិញបានទេ ?

**សេង ម៉ារឌី** ដោយសារខ្ញុំនៅក្រៅប្រទេស ២-៣អាទិត្យហើយនោះ ខ្ញុំមិនដឹងច្បាស់ទេ តែយើងដឹងគ្រប់គ្នាតាមរយៈឯកសារ តាមរយៈសារព័តិមានថា គណបក្សសង្គ្រោះជាតិឈប់និយាយពីការបោះឆ្នោតឡើងវិញហើយ តែនិយាយពីការកែរទម្រង់ស៊ីជម្រៅលើគ.ជ.ប.ទៅវិញ នេះជាចំណុចនៃការផ្លាស់ប្ដូរដ៏សំខាន់មួយ ហើយឥឡូវនេះទៀត ស្ថានទូតជប៉ុនគេបានឱ្យក្រុមបច្ចេកទេសរបស់គេមកជួយរៀបចំ គ.ជ.ប.ទៀត ខ្ញុំជឿថានឹងមានកិច្ចចរចាឡើងវិញ ។

**ខ្មែរផុស** តើប្រជាពលរដ្ឋនឹងយល់ព្រមដែរឬទេ ?

**សេង ម៉ារឌី** ខ្ញុំជឿថា បាតុកម្មមិនអាចឈប់បានទេ ខាងគណបក្សគេធ្វើរឿងបោះឆ្នោត រីឯប្រជាពលរដ្ឋគេទាមទាររឿងដីធ្លីរឿងជីវិតរបស់គេ បើសិនជាខ្ញុំវិញខ្ញុំមិនឈប់ទេ រហូតដល់ខ្ញុំបានផ្ទះបានដីធ្លីមកវិញ បានប្រាក់ខែ១៦០ដុល្លាទើបឈប់ខ្មែរផុស សូមអរគុណ លោកសេង មារឌី ។

Contimued from page 20

# At City's 2,500-Riel Shops...

marts, especially on food products that may have already expired."

Mom Dany, 50, who runs four 2,500-riel shops in Phnom Penh, the first of which she opened two years ago, said she had heard all about the police bust on Monday but had no worries about a similar raid on her own outlets.

"I do not worry about police investigating my shops because the products are all listed with the correct expiry date and there are no expired or fake products," she said at one of her shops in Chamkar Mon district, adding that her daughter and son-in-law travel to Thailand and China and purchase stock directly from wholesalers.

Ms. Dany said that as 2,500-riel shops are becoming ever more popular, with increasing competition between them, many retailers are likely feeling threatened.

"There must be some supermarket owners making complaints to the police because they charge more than 2,500 riel for the same product," she said.

The 2,500-riel shops are also facing the threat of being undercut, with 2,400-riel stores now popping up. In a crowded market, discounted name-brands and household miscellanies are being sold for a fraction of the price they can be bought for at the supermarket, or even at the local market.

Chiv Ty owns two 2,400-riel shops and claims to have come up with the idea for discount shops in Cambodia after visiting Japan and seeing the success of similar stores there. Since he opened his first shop in Tuol Kok district's Phsar Doeum Kor commune just one year ago, the venture has proved very successful.

"I make about $750 in an average day, earning a profit of between $100 to $200 per day," he said, adding that he employs 10 people in each store.

His success, he says, is based on a simple premise-he sells products at prices that customers who earn low salaries can afford to buy, though everything on sale is not being sold at the eponymous price.

"My prices start at 2,400 riel and go up to $10," he said. "But the same products in a market are hard to bargain, while my prices are low and they are set."

He buys his goods exclusively from middlemen who come to him with whatever they have on offer. "About 80 percent of the products I buy are from China and the rest are from Thailand, Vietnam, or here in Cambodia," he said.

But keenness for a bargain does not inure all customers to the potential risks involved. At a 2,500-riel shop on Sihanouk Boulevard, shoppers said they were not surprised at the police's discovery.

"I would buy only some types of products in this kind of shop," said 23-year-old Her Rainer. "I wouldn't buy food and snacks or beauty products because I don't trust those types of products when they are very cheap."

Another customer, Hang Monika, also 23, said she shops at 2,500-riel stores for kitchen products such as dishwashing soap, plates and anything that doesn't pose a health risk.

"I would never buy food and lotions at discount shops because I know they will not be good quality," she said.

And the pay-off for all 2,500-riel-shop entrepreneurs is not guaranteed. The overabundance and proximity of selfsame discount shops selling similar or identical products has introduced some business owners to the law of diminishing returns.

Kim Leang said there are about six of the same shops on the same street as her store in Chamkar Mon district, all of which sell similar goods -all bought from the same wholesalers.

"I have been running my business for about a year now, and for the first half of the year, business was fine," she said.

Now, many people are running the same kind of business and the glut of 2,500 shops now open on Street 271 has left her pessimistic about the future of her enterprise.

"My business is slow now. There are just too many shops on the same street."

pisey@cambodiadaily.com, henderson@cambodiadaily.com

KhmerPost USA, LLC
សារពត៌មានខ្មែរផុសសហរដ្ឋអាមេរិក
អាស័យដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852
លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092
អ៊ីម៉ែល info@khmerpost.us
អានកាសែតនៅគេហទំព័រ www.khmerpost.us
តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA
ផ្សាយពាណិជ្ជកម្ម Advertising
អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*
លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office) |
អ៊ីម៉ែលsobenpin@khmerpost.us
អ្នកនិពន្ធ Editorials
និពន្ធនាយក ពិន សំខុន Roger Samkhon Pin, *Publisher & Editor-in-Chief*
(978) 942 - 1641 | rogerpin@khmerpost.us

អ្នកនិពន្ធកិត្តិយស **Contributed Writers:**
Kim Phien, Kim Sos, Mao Chan Somnom, Mam Yin, Richard Howe Esq. Sengly Kong, Ph.D. James Ostis
ច្នៃសោភ័ណភាពកាសែត **Design Artist**
Heng Chhunleng
ជំនួយការរដ្ឋបាល **Administrative Assistant**
Sokha Lim

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at $60.00 or 70 Euros in Europe per year.

# ស្ករសជួយបំបាត់អារម្មណ៍ឆេវឆាវ និងខឹងសម្បា

ក្រុមអ្នកស្រាវជ្រាវបានរកឃើញថា កម្រិតជាតិស្ករ.សខ្ពស់អាចជួយគ្រប់គ្រងអារម្មណ៍ឆេវឆាវបាន ។ ក្រុមអ្នកសិក្សាជឿថាឥទ្ធិពលនេះគឺបណ្តាលមកពីសារធាតុគ្លុយកូសជាស្ករធម្មតាមួយដែលត្រូវបានរកឃើញនៅក្នុងចរន្តឈាមដែលផ្តល់ថាមពលដល់ខួរក្បាល ។

សាស្ត្រាចារ្យលោក ប្រាត ប៊ូសមែន មកពីសាកលវិទ្យាល័យអូហាយ៉ូសហរដ្ឋអាមេរិកនិយាយថា "សារធាតុគ្លុយកូសផ្តល់ថាមពលដល់ខួរក្បាល ។ ផឹកទឹកក្រូចមានជាតិផ្អែមជួយផ្តល់ថាមពលរយៈពេលខ្លីដែលជួយទប់កំហឹងឆេវឆាវបាន" ។ ក្នុងការសិក្សាលោកសាស្ត្រាចារ្យ ប៊ូសមែន បានរកឃើញថា មនុស្សដែលមានបញ្ហាខាងជាតិស្ករបានបង្ហាញឱ្យឃើញពីភាពគឃ្លើន និងមិនចេះអត់ឱនដល់អ្នកដទៃឡើយ ។ ការមានសារធាតុគ្លុយកូសច្រើនអាចរួមចំណែកជួយឱ្យសង្គមមនុស្សកាន់តែមានសន្តិភាពដោយផ្តល់ដល់មនុស្សនូវកម្រិតថាមពលខ្ពស់ក្នុងការគ្រប់គ្រងចិត្តខ្លួនឯងបាន ។

គេបានសិក្សាទៅលើនិស្សិតចំនួន៦២នាក់ដោយបានឱ្យនិស្សិតខ្លះផឹកទឹកក្រូចឆ្មារ ដាក់ស្ករផ្អែម និងនិស្សិតខ្លះទៀតផឹកទឹកក្រូច មិនមានដាក់ស្ករទេ ។ លទ្ធផលបង្ហាញថា អ្នកដែលផឹកទឹកក្រូចឆ្មារមានដាក់ស្ករបានកាត់បន្ថយអារម្មណ៍មួរម៉ៅបានពាក់កណ្តាលច្រើនជាងអ្នកដែលផឹកទឹកក្រូចមិនមានដាក់ស្ករ ៕



# ហាងជួសជុលរថយន្តឡូវែល

## Lowell Automatic Transmission









### Spring Special $19.95

**ពិសេសសម្រាប់រដូវផ្ការីក**

- ថ្លៃអាគុយ/តេស្តប្រព័ន្ធបញ្ឆេះភ្លើង
- ពិនិត្យអង់ទីហ្វ្រីស
- ពិនិត្យហ្វ្រាំងទាំងមូល
- ជម្រះប្រេងគ្រប់ប្រភេទ
- បង្វិលកង់រថយន្តឲ្យស្មើ

**ពិនិត្យ**

- បន្ទះជូតកញ្ចក់ឡាន
- ប្រព័ន្ធកំដៅ/ត្រជាក់
- វ៉ែបិលធ៍ / ហូស (Belts & Hoses)
- អំពូលភ្លើងខាងក្រៅទាំងអស់

**ដូរប្រេងតម្លៃត្រឹមតែបន្ថែម $9.95**

- តែកុងអំពូលភ្លើងខាងមុខ
  - តម្លៃ. $79.95
  - បញ្ចុះតម្លៃ $49.95
- ប្រភេទអំពូលបំភ្លឺសម្រាប់
  - Vehicle Flush Options
  - ▸ Transmission ▸ Power Steering
  - ▸ Brake System ▸ Fuel System

202 Chelmsford Street. Lowell, MA 01851
**ប្រព័ន្ធភ្លើង ជួសជុលទូទៅ សំបក និងតួខ្លួនឡាន**
Phone: 978-458-4775|978-453-8621|Fax: 978-454-4599

## ហាងលក់រថយន្តជួរឆិមស្វឺត

## Chelmsford Street Auto Sales

**Auto Sales**
**Full & Part Time**

**Unique opportunity with Fast Growing Auto Sales and Service Used Car Dealership**
**Looking for a self motivated Auto Sales Person with strong computer skills. Auto Sales Experience a plus, but will train the right person.**
**Must speak English and khmer.**
**Benefits include Health and Insurance, Paid Holidays, Paid Vacation, Retirement Plan(Full time).**
**Fax your resume today to 978-454-4599 or Email to Roger@cstreeauto.com**




# កម្មវិធីជំនួយផ្នែកថែទាំសុខភាពតាមផ្ទះរដ្ឋ

## Homecare Agency

Group Adult Foster Care Program (GAFC)
MassHealth

*ជាសេវាមានគុណភាពខ្ពស់ និងទុកចិត្តបាន*
*បុគ្គលិកមានសណ្ដានចិត្តល្អ និងធ្វើការតាមវិជ្ជាជីវៈ*
*អ្នកគ្រប់គ្រង និងបុគ្គលិកនិយាយភាសាខ្មែរ*



*Compassionate Care & Reliable*
*Professional & Cultural Sensitive*
*Management & Staffs speak Khmer*

*កម្មវិធី Group Adult Foster Care (GAFC) គឺជាដំណោះស្រាយល្អបំផុតសំរាប់ចាស់ៗ ខ្មែរយើង ដែលមានប ញ្ហារាំរ៉ៃផ្នែកសុខភាព ឬជរាហើយមិនចង់ ចាកចេញពីលំនៅដ្ឋានខ្លួនឯង ឬមិនចង់បែកពីក្រុមគ្រួសារដែលបានរស់នៅជាមួយគ្នាជាយូរមកហើយ ។ យើងអាចជួយអោយជីវិតលោកអ្នកកាន់តែប្រសើរឡើង តាមរយៈការផ្ដល់នូវសេវាថែទាំសុខភាពមួយទល់មួយដល់ផ្ទះលោកអ្នកតែម្ដង ។*

*Accucare Homecare Agency is the perfect solution for seniors and others who are not ready to leave their home for an institutional setting or live with reltives because of illness or chronic conditions. We improve your life by providing one-on-one compassionate senior care in the comfort of your own home.*

### ដើម្បីអាចចូលរួមក្នុងកម្មវិធីនេះបានលោកអ្នកត្រូវមានលក្ខណៈដូចខាងក្រោម :

*To be eligibled for GAFC you must:*
*-រស់នៅផ្ទះរដ្ឋ (live in subsidized or public housing)*
*-អាយុ ២២ ឆ្នាំឡើងទៅ (age 22 years and older)*
*-មាសប៉េហ៊ែលស្ដង់ដា (eligible for Masshealth Standard)*
*-ត្រូវការជំនួយក្នុងការរស់នៅប្រចាំថ្ងៃយ៉ាងហោចណាស់មួយដូចជា មុជទឹក ស្លៀកពាក់ ពេលប្រើបន្ទប់ទឹក ចំអិនអាហារ ឬ ពេលដើរ (need daily assistance with one or more personal care tasks such as bathing, dressing, toileting, meal preparation and/or moving)*
*-មានការអនុញ្ញាតពីគ្រូពេទ្យផ្ទាល់ខ្លួនអ្នក (have physician statement of your condition)*
*-ត្រូវបានវាយតំលៃផ្នែកសុខភាព នឹងការអនុម័តយល់ព្រមពីកម្មវិធី (be screened and approved for the program )*

### ផលប្រយោជន៍ទទួលបាន :

*Benefits you will get:*
*-ការថែទាំផ្ទាល់ខ្លួនមួយទល់មួយក្នុងផ្ទះរបស់អ្នករាល់ថ្ងៃមួយថ្ងៃមួយម៉ោងលើការរស់នៅប្រចាំថ្ងៃ (personal care service in your home, up to one hour of service each day)*
*-ជំនួយលើការគ្រប់គ្រងថ្នាំសង្កូវអ្នក (Medication Managemant)*
*-ផែនការថែរទាំសុខភាពផ្ទាល់ខ្លួនមួយ ដែលធ្វើឡើងដោយគ្រូពេទ្យ និងខេសមានីជើ (an individual care plan developed by a registered nurse and case manager)*
*-វាយតំលៃលើសេចក្ដីត្រូវការជាប្រចាំជាបន្តបន្ទាប់ (ongoing monitoring of needs)*
*-សមាជិកអាចទាក់ទងមក ២៤ម៉ោង (24-hour access to services)*

**ត្រូវការជ្រើសរើសបុគ្គលិកធ្វើការ PCA/ HHA needed for Lowell, Lynn, Revere, and Boston**

**ដើម្បីចុះឈ្មោះសូមទាក់ទងមក**
To register, please contact:

ឱក តុលាយុត្តិ ឡូវែល
Tolayuth Ok: Lowell
Tel: (978)735-4955, Fax: (978) 735-4956
Office: 144 Merrimack St., Suite 404. Lowell, MA 01852



# ជោគជតារាសីលោកអ្នក

## ទាំង១២ ប្រចាំឆ្នាំរោង

### ឆ្នាំជូត



អាចពោលបានថា លោកអ្នកមានសេចក្ដីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្មុគស្មាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិតផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរនៅទីណាក្ដី គួរចៀសវាងការដាក់ទុនថ្មី ព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕

### ឆ្នាំឆ្លូវ



ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះ ចូរធ្វើចិត្តឱ្យត្រជាក់ ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់ៗចង់ចាញ់ឈ្នះគ្នានោះឯង ៕

### ឆ្នាំខាល



រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះៗ នាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរារាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានការទិញចូលលក់ចេញគ្រាន់ បើអាចរកផលកម្រៃត្រឡប់មកផ្ទះវិញ យ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀប ដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕

### ឆ្នាំថោះ



លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទី ឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបាន ដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ អាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕

### ឆ្នាំរោង



រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះសុទ្ធតែផ្ដល់នូវអត្ថប្រយោជន៍ គួរឱ្យជាទីពេញចិត្តទាំងអស់គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀត នោះគម្រោងការដែលបានត្រៀមទុកជាយូរមក ហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញ មានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នា បើនៅឆ្ងាយ ៕

### ឆ្នាំម្សាញ់



នៅក្នុងរយៈពេលនេះ លោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិ និងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើតែហាមកុំជួញដូរផ្លូវឆ្ងាញប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕

### ឆ្នាំមមី



រាល់ការស្មុគស្មាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះ នឹងត្រូវអហោសិកម្មទាំងអស់ ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មី ទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពូនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែម ទើបជាការប្រសើរ ៕

### ឆ្នាំមមែ



លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះ វាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់ បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហាពុំមានផលរមាស់អ្វីនោះឡើយ ៕

### ឆ្នាំវក



លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្ដីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមួលបង្កាច់បង្ខូចកេរ្តិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្មុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្សតាមឈ្នានីសច្រើន ដូចច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ៕

### ឆ្នាំរកា



លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀតគម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ គួរជួញដូរនៅទីជិតៗ ទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្ដាប់ឱវាទគ្នា ៕

### ឆ្នាំច



រាល់កិច្ចការដែលលោកអ្នកប៉ងប្រាថ្នា ជាយូរមក ហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណង ហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការប៉ងយាយីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហាគូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕

### ឆ្នាំកុរ



រាល់ការបំពេញការងារទាំងឡាយលោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះ សូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហាចូរកុំយកភាពមានះចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕

# សាគូ សាម៉ុត
# ប្រវត្តិសាស្ត្រកម្ពុជា និង ទវជនខ្មែរ

តពីលេខមុន




## លន់ ណុន
(១៩២០ - ១៩៧៥)

លោក លន់ ណុន ជាប្អូនពៅរបស់ លោក លន់ នល់ ។ គាត់កើតឆ្នាំ ១៩២០ និង មានការរៀនសូត្រជា នាយទាហានក្រុមអាវុធហត្ថ ជាមុខងារមិនអាចក្លាយជា អ្នកនយោបាយថ្នាក់លើ បានឡើយ ។ គាត់ទើបតែមានឈ្មោះលេចឮ ក្រោយព្រឹត្តិការណ៍ ឆ្នាំ ១៩៧០ ដោយសារបងរបស់គាត់ លោក លន់ នល់ ។ ពីឆ្នាំ ១៩៧០ ដល់ឆ្នាំ ១៩៧៥ លោក លន់ ណុន បានខំធ្វើបណ្ដាញបង្កើតមិត្តភក្តិ តែជួបប្រទះតែទំនាស់ ពីមជ្ឈដ្ឋាន យោធា ក៏ដូចជា ស៊ីវិល ដែរ ។ បងរបស់គាត់ ក៏មិនសូវទុកចិត្តលើគាត់ដែរ ។ លោក លន់ ណុន បានចូលមកក្រុមខ័ណ្ឌយោធា បានឋានៈ ឧត្តមសេនីយត្រី ដែលអនុញ្ញាតឲ្យគាត់កាន់ជាមេបញ្ជាការទ័ពមួយរយៈ (១៩៧០-៧១) នៅខេត្តកំពង់ស្ពឺ ប្រឆាំងទៅទ័ពយួនកុម្មុយនិស្ត និង ខ្មែរក្រហម ។ អ្នកការទូតអាមេរិកនៅភ្នំពេញ ក៏មិន ចូលចិត្ត ទុកចិត្តរាប់អាន លោកដែរ ។ លោក លន់ ណុន បានសេពគប់រកបង្អែកធ្វើទំនាក់ទំនងជាមួយទូតរុស្ស៊ី ។ ដោយធ្វើការមិនចុះសំរុងនឹងគេឯង ទូតអាមេរិកបានបង្ខំគាត់ឲ្យភៀសខ្លួនទៅអាមេរិក ឆ្នាំ ១៩៧២ ក្រោមស្លាក "បេសកកម្មផ្លូវការ" ក្នុងរយៈពេល ១ ឆ្នាំ ។ នៅភ្នំពេញ ស្ថានភាព យោធា-នយោបាយ បានចុះដល់កំរិតមួយដែលអនុញ្ញាតឲ្យ មានអ្នកស្រោចស្រង់ ។ លោក លន់ ណុន ក៏បានវិលត្រឡប់ចូលស្រុកវិញ មតិមហាជន ក៏មិនជំទាស់ដែរ តែគេសង្ស័យលើរូបគាត់ ជាមួយពួកទាហានមួយក្រុម នឹងធ្វើ "ការបះបោរ" ឬ រដ្ឋប្រហារ ជាមិនខាន ។ តើការស្មាននេះ គ្មានមូលដ្ឋានទេ ? នៅថ្ងៃទី ២៧ មីនា ១៩៧៥ លោក លន់ ណុន បានលាឈប់ពីយោធា មកជាស៊ីវិល ។ ការវិលមកជីវភាពស៊ីវិលនេះ បានទទួលការយល់ព្រមពី លោក លន់ នល់ ដែលនឹងចាកចេញពីភ្នំពេញ ថ្ងៃទី ១ មេសា ១៩៧៥ ទៅហាវ៉ៃ ។ ពេលនេះ លោក លន់ ណុន ក៏មានលទ្ធភាពចាកចេញពីភ្នំពេញដែរ តែគាត់សាកល្បងសំណាង "ចុងក្រោយ" ។ នៅព្រឹកថ្ងៃទី ១៧ មេសា ១៩៧៥ អ្នកភ្នំពេញ ក៏ដូចជាអ្នកសង្កេតការណ៍លើកន្លែង បានឃើញមនុស្សមួយក្រុម ប្រមាណ ២០០ នាក់ ប្រដាប់អាវុធ ស្លៀកពាក់ខ្មៅ ត្រួតត្រាភ្នំពេញមួយពព្រិចភ្នែក ។ អ្នកទាំងនេះ បញ្ជាដោយមេក្រុមម្នាក់ឈ្មោះ ហែម កេតដារា ជាកូន លោក ហែម កេតសាណា អតីតរដ្ឋមន្ត្រី ក្រសួងមហាផ្ទៃ (១៧/១០/១៩៧២-៧/១២/១៩៧៣) មានទូរបញ្ជាពី លន់ ណុន ទំនងជាមានការយល់ព្រមពីទូតរុស្ស៊ីផង ។ ក្រុមនេះ បានត្រូវទាហាន ប៉ុល ពត ខ្មែរក្រហមពិតប្រាកដចាប់សម្លាប់ចោលនៅពេលថ្ងៃរសៀល ។ វាសនា លោក លន់ ណុន ក៏ដូចនោះដែរ បន្ទាប់ពីបានសុំចុះចូល ខ្មែរក្រហមបានសម្លាប់យ៉ាងឃោរឃៅបំផុត នៅថ្ងៃ ១៧ មេសា ១៩៧៥ ។

## ឡុង បូរេត
(១៩៣៣ - ១៩៧៥)

លោក ឡុង បូរេត ជាអ្នកនយោបាយក្មេងជាងគេ និង មានប្រាជ្ញាត្រចះត្រចង់ក្នុង "របប សាធារណរដ្ឋខ្មែរ" ។ គាត់មាននាទីយ៉ាងសំខាន់ក្នុងរយៈពេល ១៥ ខែ ចុងក្រោយរបស់ លន់ នល់ មុននឹងទទួលវាសនាដ៏អាក្រក់ពីខ្មែរក្រហម សម្លាប់យ៉ាងព្រៃផ្សៃ នៅថ្ងៃទី ១៧ មេសា ១៩៧៥ ។

### ជីវប្រវត្តិ

លោក ឡុង បូរេត កើតនៅថ្ងៃទី ៣ មករា ១៩៣៣ នៅច្បារអំពៅ ស្រុកកៀនស្វាយ ខេត្តកណ្ដាល ។ ពីឆ្នាំ ១៩៥១ ដល់ឆ្នាំ ១៩៥៣ គាត់ជា និយោជិត ក្រសួង ពត៌មានបារាំង ។ នៅ ខែមេសា ១៩៥៣ គាត់បានមកសិក្សានៅស្រុកបារាំង បានទទួលសញ្ញាប័ត្រ បរិញ្ញាប័ត្រនីតិសាស្ត្រ ។ ពេលដែលត្រឡប់ចូលកម្ពុជាវិញ ឆ្នាំ ១៩៥៨ គាត់បានបំរើការងារជា នាយគណនេយ្យ របស់ រាជរតនសម្បត្តិ បន្ទាប់មក នៅខែឧសភា ១៩៥៧ ជា អធិការការងារ ។

នៅឆ្នាំ ១៩៥៨ គាត់ជាប់ឆ្នោតជា តំណាងរាស្ត្រ មណ្ឌលលំផាត់ ខេត្តស្ទឹងត្រែង គឺជាតំណាងរាស្ត្រដ៏ក្មេងម្នាក់ នៅក្នុងសភា ។ ពីថ្ងៃ ៣០ មេសា ១៩៥៨ ដល់ថ្ងៃ ១០ កក្កដា ១៩៥៨ គាត់ជា អនុរដ្ឋលេខាធិការ ការងារ និង សង្គមកិច្ច របស់ រដ្ឋាភិបាល ស៊ឹម វ៉ា ។ ពីថ្ងៃ ១៤ មិថុនា ១៩៥៩ ដល់ថ្ងៃ ១៩ មេសា ១៩៦០ គាត់ជា រដ្ឋលេខាធិការ ក្រសួងពត៌មាន របស់ រដ្ឋាភិបាល នរោត្តម សីហនុ ។ នៅឆ្នាំ ១៩៦២ គាត់បានជាប់ឆ្នោតជា តំណាងរាស្ត្រម្ដងទៀត មណ្ឌលលំផាត់ ។ នៅថ្ងៃទី ៧ តុលា ១៩៦២ គាត់ជា រដ្ឋលេខាធិការ ហិរញ្ញវត្ថុ របស់ រដ្ឋាភិបាល នរោត្តម កន្តុល ។ នៅឆ្នាំ ១៩៦៣ គាត់បានប្រឆាំងចេញមុខទៅ សម្ដេច សីហនុ ពីការធ្វើជា តូបនិយកម្ម ធនាគារ និង ពាណិជ្ជកម្ម ក្រៅប្រទេស ។ គាត់បានលាឈប់ពីតំណែង ប៉ុស្តិ៍របស់គាត់ បានត្រូវជំនួសដោយ លោក ចាយ ធុល នៅថ្ងៃទី ២៥ ធ្នូ ១៩៦៤ ។ នៅឆ្នាំ ១៩៦៦ គាត់បានជាប់ឆ្នោតជា តំណាងរាស្ត្រ ម្ដងទៀត មណ្ឌលលំផាត់ដដែល ។ ពីថ្ងៃទី ២៥ តុលា ១៩៦៦ ដល់ថ្ងៃទី ២ ឧសភា ១៩៦៧ គាត់ជា រដ្ឋមន្ត្រី ឧស្សាហកម្ម របស់ រដ្ឋាភិបាល លន់ នល់ ។

នៅពេលមានព្រឹត្តិការណ៍ ឆ្នាំ ១៩៧០ លោក ឡុង បូរេត គ្មានវត្តមាននៅកម្ពុជាទេ គាត់មានបេសកកម្មផ្នែកសេដ្ឋកិច្ចនៅម៉ានីល គាត់ក៏មិនបានចូលរួមក្នុងព្រឹត្តិការណ៍ទំលាក់សម្ដេច សីហនុ ដែរ ។ ពេលក្រោយមក គាត់ដូចជាអល់អែក មិនសំរេចចិត្តចូលមកកម្ពុជាវិញ ដើម្បីធ្វើការជាមួយ របបសាធារណរដ្ឋ ឡើយ ។ ដោយលោកជា បញ្ញវ័ន្ត មួយរូប ចេះ



## ស៊ីសុវត្ថិ យុត្តិវង្ស
(១៩១៣ - ១៩៤៧)

ព្រះអង្គម្ចាស់ ស៊ីសុវត្ថិ យុត្តិវង្ស កើតនៅឆ្នាំ១៩១៣ នៅក្រុងភ្នំពេញ ។ ព្រះបិតា នាម ចំរើន វង្ស ត្រូវជាចៅ ព្រះអង្គភីម ព្រះមាតា នាម យុភិផន ជាចៅ ព្រះបាទ ស៊ីសុវត្ថិ ។

ព្រះអង្គបានធ្វើការសិក្សា បឋមសិក្សា និង មធ្យមសិក្សា នៅ ភ្នំពេញ និង ក្រុងព្រៃនគរ ។ បន្ទាប់មក ព្រះអង្គបានសិក្សាឧត្តមសិក្សា នៅ មហាវិទ្យាល័យ វិទ្យាសាស្ត្រ MONTPELLIER ស្រុកបារាំង ។ ព្រះអង្គបានទទួល សញ្ញាប័ត្រ "បណ្ឌិតរដ្ឋ គណិតវិទ្យា" នៅឆ្នាំ ១៩៤១ ។ ព្រះអង្គមានមហេសីជាស្ត្រីជាតិបារាំងសែស និង ចូលធ្វើ ជាសកម្មជន នៃ គណបក្ស សង្គមនិយមបារាំង (SFIO) ។ ទ្រង់ យុត្តិវង្ស បានវិលត្រឡប់ចូលកម្ពុជា នៅខែមិថុនា ១៩៤៦ និង បានជាប់ឆ្នោតជាប្រធាន "គណបក្ស ប្រជាធិបតេយ្យ" ដែលទើបនឹងបង្កើត នៅខែមេសា ១៩៤៦ ដោយ

តទៅលេខក្រោយ

# ខ្មែរអ្នកជាតិនិយម


និពន្ធដោយ ឡឹក សំអឿន ហៅ "ផ្កាឈូកព្រឹក"

តពីលេខមុន

**សមាជិក:** លោក ហង់ ធុងហាក់ ទទួលបន្ទុកការអប់រំ និងឃោសនាការ ។

**សមាជិក:** លោក អ៊ីវ យ៉ាង ទទួលបន្ទុកខាងសន្តិសុខ និងជាមេបញ្ជាការគ្រប់គ្រងភាគបស្ចិមប្រទេស។

**សមាជិក:** លោក ដួង ចន្ទសារាត ទទួលបន្ទុកខាងយោធា។

**សមាជិក:** លោក កៅ តក់ ទទួលបន្ទុកជាមេបញ្ជាការយធាភាគបស្ចិមទិស។

**សមាជិក:** លោក ងួន ហុង ទទួលបន្ទុកជាមេបញ្ជាការយោធាភាគឧត្តរទិស។

**សមាជិក:** ទ្រង់ ចន្ទរស្សី ទទួលបន្ទុកមេបញ្ជាការគ្រប់គ្រង និងជាមេបញ្ជាការយោធាភាគទក្សិណទិល។

ដើម្បីរៀបចំរចនាសម្ព័ន្ធភាគនីមួយៗឱ្យមានរបៀបវិន័យត្រឹមត្រូវ និងគ្រប់គ្រងឱ្យមានប្រសិទ្ធិភាពល្អស្របនឹងគោលនយោបាយរបស់ចលនានោះគណៈកម្មាធិការនាយកបាយបើកសាលាហ្វឹកហ្វឺនក្របខណ្ឌលំដាប់ថ្នាក់នៃរចនាសម្ព័ន្ធរបស់ចលនា។ នៅដើមឆ្នាំ១៩៥៣ សាលាក្របខណ្ឌអណ្តាប់ភាគជំនាន់ទី១ បានបើកបង្ហាត់ហ្វឹកហ្វឺនសមាជិកក្របខណ្ឌចំនួន៨នាក់គឺ ៦នាក់មកពីវិទ្យាល័យមានលោក អ៊ុម ស៊ីម្ប ស្រី ឫទ្ធិ. អ៊ូ អន. ថាន់ ចេន ហែម សារេត. ម៉ៅ ថេន. ស្តាំ សំជិម. ឡឹក សំអឿន ហើយម្នាក់ទៀតមកពីក្រុមឥស្សរៈ ងួន ហុង ឈ្មោះ ងួន គិមតួ និងម្នាក់ទៀតឈ្មោះ ឈាន ឈួន មកពីក្រុមលោក កៅ តក់ ។ ក្រោយពីបានបញ្ចប់ការហ្វឹកហ្វឺនស្រេចហើយ គណៈកម្មាធិការនាយកក៏តែងតាំងអស់លោកទាំងនោះឱ្យទទួលបំពេញមុខនាទីនៅតាមភាគ និងតាមទីបញ្ជាការកណ្តាលនៃចលនា។ លោក ហែម សារេត ទទួលភារៈកិច្ចជានាយទាហានប្រចាំទក្សិណទិស។ លោក អ៊ឹម ស៊ីម. ម៉ៅ ថេន. ងួន គិមតួ ទៅភាគឦទិសជាមួយលោក តក់ វីម៉ែន និងលោក គាម រ៉េត ។ ភាគបស្ចិមទិស លោក អ៊ូ អន និងលោក ឈាន ឈួន ជារងមេបញ្ជាការយោធាដែលមានលោក កៅ តក់ ជាមេបញ្ជាការយោធា។ លោក ស្រី ឫទ្ធិ ជារងមេបញ្ជាការផ្នែកគ្រប់គ្រងដែលមានលោក សាំង សាវ៉ាត ជាមេបញ្ជាការ។ លោក ស្តាំ សំជិម ជានាយទាហានទទួលខុសត្រូវខាងផ្នែកស្បៀងនៅទីបញ្ជាការកណ្តាល។

ក្នុងភាគនីមួយអ្នកទទួលខុសត្រូវត្រូវមានកិច្ចអប់រំហ្វឹកហ្វឺនលំដាប់ថ្នាក់គ្រប់គ្រងក្នុងភាគរបស់ខ្លួន។ ភាគណាដែលមិនអាចបើកសាលាអប់រំហ្វឹកហ្វឺនបានត្រូវបញ្ជូនសមាជិកដែលត្រូវទទួលការអប់រំហ្វឹកហ្វឺនទីបញ្ជាការកណ្តាលដែលមានសាលាអប់រំហ្វឹកហ្វឺនគ្រប់លំដាប់ថ្នាក់ជាប្រចាំ។ ចាប់តាំងពីនោះមកមិនយូរប៉ុន្មាននៅតាមភូមិភាគនីមួយៗដែលបានរំដោះបានប្រព្រឹត្តទៅស្របនឹងសហប្រតិបត្តការរវាងប្រជាពលរដ្ឋ និងកងកម្លាំងរំដោះបានប្រព្រឹត្តទៅស្របនឹងគោលដៅរបស់រចនាយ៉ាងល្អប្រពៃដែលញ៉ាំងឱ្យប្រជាពរដ្ឋយល់ច្បាស់ហើយស្ម័គ្រចិត្តគាំទ្រចូលរួមបម្រើក្នុងចលនាឥស្សរៈរួមខ្មែរបម្រើជាតិ។ គឺចាប់តំងពីពីពេលនោះឯងហើយដែលចលនានេះបានព្យាយាមពង្រីកសកម្មភាពរបស់ខ្លួនយ៉ាងអង់អាចឱ្យចូលទៅក្នុងតំបន់ដែលពុំទាន់បានរំដោះជាហេតុឱ្យស្តេច សីហនុ មានការព្រួយបារម្ភជាខ្លាំង ហើយយកជាលេសធ្វើជាការតវ៉ាជាមួយបារាំង ដើម្បីទាមទារយកឯករាជ្យ។ ក្នុងកម្លុងពាក់កណ្តាលឆ្នាំ១៩៥៣ ស្តេចសីហនុ ក៏ប្រឹងធ្វើដំណើរស្វែងរកឯករាជ្យឱ្យបានមុនពួកចលនាតស៊ូប្រឆាំងបារាំងដោយកម្លាំងអាវុធ។

ពេលនោះគណៈកម្មាធិការនាយកនៃចលនាឥស្សរៈរួមខ្មែរបម្រើជាតិក៏បានបង្កើនសកម្មភាពឱ្យខ្លាំងនឹងឱ្យលឿនទៅមុខដែរ ព្រោះយល់ឃើញថា ស្ថានការណ៍ទាំងឡាយក្នុងលោកបានកើតមានឡើងហើយ គឺ:

**ទី១-** បញ្ហាប្រទេសអល្ជេរីម៉ង់ដឺ និងអសន្តិសុខនៅទ្វីបអឺរ៉ុប។

**ទី២-** រដ្ឋាភិបាលបារាំងខ្វះស្ថិរភាព គឺវិបត្តិគណៈរដ្ឋមន្ត្រីផ្ទួនៗគ្នា. ការផ្លាស់ឧត្តមសេនីយ៍ទទួលខុសត្រូវនៅឥណ្ឌូចិនញយៗ គឺផ្លាស់ប្តូរឧត្តមសេនីយ៍ ដឺឡង់ក្លាដ ក្នុងឆ្នាំ១៩៥០ម្តង. ឧត្តមសេនីយ៍ សាឡង់ ក្នុងឆ្នាំ១៩៥១ម្តង និងឧត្តមសេនីយ៍ ណាវ៉ាល់ ក្នុងឆ្នាំ១៩៥៨ ម្តង។

**ទី៣-**ប្រទេសចិនក្រោយពីពេលប្រកាសសាធារណរដ្ឋប្រជាមានិតក៏បានចេញមុខជួយគាំទ្រហូ ជីមិញ ដែលជាមេកុម្មុយនិស្តឥណ្ឌូចិនយ៉ាងពេញទំហឹងក្នុងគោលបំណងចង់ធ្វើជាមហាអំណាចដែលមានឥទ្ធិពលមកលើប្រទេសទាំងឡាយនៅអាស៊ីភាគអគ្នេយ៍។

**ទី៤-** ស្ថានការណ៍នៅឥណ្ឌូចិន ពួកយួនយៀកមិញបានធ្វើសកម្មភាពកាន់តែខ្លាំងឡើងៗនៅវៀតណាម និងកម្ពុជា ដូចជាបានបង្កើតរដ្ឋាភិបាលវៀតមិញ ដែលដឹកនាំដោយ សឹង ង៉ុកមិញ ព្រមទាំងបានបញ្ជូនកងកម្លាំងរាប់ពាន់នាក់ចូលក្នុងទឹកដីខ្មែរ ។ល។

ដើម្បីដើរឱ្យបានមុនស្ថានការណ៍ទាំងនេះ លោក សឺន ង៉ុកថាន់ បញ្ចេះលោក អ៊ា ស៊ីចូវ ព្រមទាំងសហការីមួយចំនួនឱ្យបែកចេញពីចលនាឥស្សរៈរួមខ្មែរបម្រើជាតិ ដើម្បីឱ្យរកផ្លូវទាក់ទងជាមួយប្រទេសចិនប្រជាមានិត ពីព្រោះលោកយល់ថាក្រុមបញ្ញវន្តទាំងនោះដែលតាំងខ្លួនឯងជាអ្នកជឿនលឿន ហើយដែលចិនកុម្មុយនិស្តធ្លាប់បានផ្តល់ជំនួយសិក្សាកាលនៅប្រទេសបារាំងនោះ ច្បាស់ជាពុំយល់ពិតប្រាកដនូវបញ្ហាជាតិឡើយ ដោយពុំបានយកប្រយោជន៍ជាតិជាធំទេ ពួកគេច្បាស់ជាយកមប្រយោជន៍មនោគមវិជ្ជាជាធំពុំខាន។ នេះជាគ្រោះថ្នាក់ធំដល់ប្រទេសខ្មែរ និងប្រជាជាតិខ្មែរទាំងមូលទៅថ្ងៃក្រោយ ប្រសិនបើអំណាចប្រទេសធ្លាក់ទៅក្នុងកណ្តាប់ដៃនៃពួកបញ្ញវន្តខ្វះការពិសោធន៍ទាំងនេះ។ ប៉ុន្តែជាចៃដន្យ គួរឱ្យស្តាយណាស់លោក អ៊ា ស៊ីចូវ ត្រូវបានពួកយៀកមិញស្ទាក់ផ្លូវជាប់មិនឱ្យទាក់ទងផ្ទាល់ជាមួយប្រទេសចិនប្រជាមានិតគេថាត្រូវធ្វើតាមរយៈពួកគេ។ លោក អ៊ា ស៊ីចូវ មិនយល់ព្រម រួចក៏នាំគ្នាត្រឡប់មកធ្វើការបម្រើចលនាឥស្សរៈរួមខ្មែរបម្រើជាតិវិញ ហើយក៏ចាត់សមាជិកមួយក្រុមឱ្យស្វែងរកផ្លូវទាក់ទងជាមួយប្រទេសចិនប្រជាមានិតតាមរយៈប្រទេសភូមា។ តែក្រុមនេះក៏មិនអាចធ្វើបានដែរ ហើយក៏ត្រូវហៅឱ្យត្រឡប់មកវិញ នៅពេលបោះឆ្នោតក្នុងឆ្នាំ១៩៥៥ ។ ក្នុងរយៈពេលនោះហើយ ដែលមានពាក្យរហិចរហៀងថា លោក អ៊ា ស៊ីចូវ បានបែកចេញពីចលនាឥស្សរៈរួមខ្មែរបម្រើជាតិដោយមានការខ្វែងគំនិតគ្នាខាងផ្លូវនយោបាយជាមួយលោក សឺន ង៉ុកថាន់ ។ មិនតែប៉ុណ្ណោះនៅភាគឧត្តរទិស ក៏មានពាក្យចចាមអារ៉ាមលេចឮឡើងថា លោក សាំង សាវ៉ាត នឹងត្រូវដកចេញពីតំណែង ហើយដាក់កូនចៅលោក កៅ តក់ ជំនួសវិញ។ មិនយូរប៉ុន្មាន លោក សាំង សាវ៉ាត បានទៅកាន់តំណែងនៅក្នុងគណៈកម្មាធិការនាយកនៅលើភ្នំដងរែក ហើយមានលិខិតតែងតាំងខ្លួនខ្ញុំ (ឡឹក សំអឿន) ជាមេបញ្ជាការទាំងផ្នែកគ្រប់គ្រងទាំងផ្នែកនយោធាជាបណ្តោះអាសន្ន។

ដោយឃើញស្ថានការណ៍កើតឡើងស្របនឹងពាក្យចចាមអារ៉ាមដូច្នេះមួយសប្តាហ៍ក្រោយមកខ្ញុំក៏ធ្វើដំណើរទៅកាន់ទីបញ្ជាការកណ្តាលនៅលើភ្នំដងរែក ដើម្បីឱ្យដឹងនូវការពិតច្បាស់លាស់អំពីពាក្យចចាមអារ៉ាមខាងលើនោះ។ ស្នាក់នៅទីទទួលភ្ញៀវដែលមានលោក ស្តាំ សំជិម ជាអ្នកទទួលខុសត្រូវគាត់បានហុចសំបុត្រមួយច្បាប់ដែលលោក អ៊ា ស៊ីចូវ បានទុកឱ្យខ្ញុំ ដែលក្នុងនោះលោក អ៊ា ស៊ីចូវ បានសុំឱ្យខ្ញុំទៅចូលរួមជាមួយក្រុមរបស់លោក ។ម្យ៉ាងទៀតខ្ញុំបានដំណឹងថាមិត្តភក្តិខ្ញុំមួយក្រុមធំបានទៅនៅក្នុងក្រុមនេះរួចហើយ មានជាអាទិ៍ គឺ លោក អ៊ឹង ម៉េងត្រុយ ស្រី ឫទ្ធិ និង ឃី តាំងលិម។

ស្អែកឡើងខ្ញុំក៏បានចូលទៅថ្វាយបង្គំលោកគ្រូអាចារ្យ ខៀវ ជុំ ដែលជាអគ្គលេខាធិការ ដើម្បីសាកសួរអំពីរឿងហេតុដែលកើតឡើងនោះ។ លោកក៏មានថេរដីកាថា នេះជារឿងពិតមែន ។ មួយរំពេចនោះ ខ្ញុំក៏បានសម្រេចចិត្តសុំលាឈប់ពីមុខដំណែងដោយយកលេសថា ខ្ញុំខ្វះសមត្ថភាពមិនអាចទទួលបាន។ លោកគ្រូអាចារ្យ ខៀវ ជុំ មិនយល់ស្របនឹងសំណើររបស់ខ្ញុំម្តងជាពីរដង ហើយខ្ញុំក៏នៅតែស្ថិតនៅលើជំហររបស់ខ្ញុំដដែល។ នៅល្ងាចថ្ងៃដដែលលោក សឺន ង៉ុកថាន់ បានហៅខ្ញុំ ហើយបានពន្យល់នូវការពិតប្រាប់ខ្ញុំ។ ខ្ញុំក៏ដកពាក្យសុំលាឈប់នោះទៅវិញ។ លុះស្អែកឡើង ខ្ញុំក៏ទៅជួបលោកគ្រូអាចារ្យ ខៀវ ជុំ ម្តងទៀត ដែលនៅទៅនោះមានលោក យុន ហ៊ាង ជាលោខាធិការបានប្រគល់សំបុត្រតែងតាំងខ្ញុំជាផ្លូវការថា ជាមេជាបញ្ជាការទាំងផ្នែកយោធាទាំងផ្នែកគ្រប់គ្រងនៅភាគឧត្តរទិស ព្រមទាំងបានឱ្យអ្នកក្របខណ្ឌ៣នាក់ គឺលោក ស្តាន់ សំជិម. ញ៉ឹក ញុក និង ស កាពុន ទៅជួយធ្វើការផង។

### សីហនុ រំលំរដ្ឋាភិបាល និងរំឡាយរដ្ឋសភា

ចំណែកឯនៅរាជធានីភ្នំពេញស្តេច សីហនុ បានចោទប្រកាន់គណៈបក្សប្រជាធិតេយ្យថា បានធ្វើការទាក់ទងជាមួយប្រជាចលនាឥស្សរៈរួមខ្មែរបម្រើជាតិ។ ដើម្បីបង្ខំរដ្ឋាភិបាលលោក ហ៊ុយ កន្ធុល ឱ្យបោះបង់នយោបាយខ្លួនចោលស្តេច សីហនុ បានបញ្ជាលោក ហ៊ុយ កន្ធុល ឱ្យចាត់ការរុករកកម្ទេចចោលនូវប្រជាចលនាឥស្សរៈរួមខ្មែរបម្រើជាតិ។ លោក ហ៊ុយ កន្ធុល មិនត្រឹមតែមិនអនុវត្តតាមរាជបញ្ជាតែប៉ុណ្ណោះទេ គឺតែទាំងទៅចាប់អ្នកជំនិត២នាក់របស់ស្តេច សីហនុ យកទៅឃុំឃាំងទៀតផង គឺលោក យ៉ែម សំបូរ និង លន់ ណុល។

ថ្ងៃទី ១៥ មិថុនា ១៩៥២ ស្តេច សីហនុ បានបញ្ឈប់រដ្ឋាភិបាល ហ៊ុយ កន្ធុល រួចទ្រង់កាន់តំណែងជានាយករដ្ឋមន្ត្រីខ្លួនឯង។ បន្ទាប់ពីរដ្ឋប្រហារនេះមកទ្រង់ស្នើរទៅរដ្ឋសភាឱ្យអនុម័តប្រគល់អំណាចពិសេសឱ្យទ្រង់ដោយទ្រង់សន្យាថា នឹងយកឯករាជ្យពេញទីឱ្យបានរយៈពេល ៣ ឆ្នាំយ៉ាងយូរ។ ដើម្បីទប់ទល់នឹងប្រជាចលនាឥស្សរៈរួមខ្មែរបម្រើជាតិសីហនុបានដាក់ទៅរដ្ឋសភា នូវគម្រោងថវិកាមួយដែល៣០% នៃថវិកាជាតិទុកសម្រាប់ទិញគ្រឿងអាវុធ ហើយស្នើសុំឱ្យ

តទៅលេខក្រោយ

# Connect with over 20,000 residents in Lowell!


Soben Pin, Managing Partner



KhmerPost USA - Your portal to the 2nd largest Cambodian-American population in the United States

Free Full Color Biweekly Bilingual Cambodian-American Newspaper available over 100 locations serving Greater Lowell, Lynn, Boston and beyond.

**Call 978-677-7163** for a free quote today!









KhmerPost USA | 45 Merrimack St., Suite 218A | Lowell, MA, 01852
Phone: 978.677.7163 | Fax : 978-677-7092
www.khmerpost.us | Info@khmerpost.us